# ខ្មែរប៉ុស្ដិ៍
# THE KHMER POST

KHMER BILINGUAL BIWEEKLY NEWSPAPER

VOLUME 1 | ISSUE 3 | NOVEMBER, 1ST - 15TH, 2007 | ADVERTISING (562) 313-2129 | WWW.THEKHMERPOST.COM



# នួន ជា ៖ សល់ម្នាក់ក៏ធ្វើបដិវត្តន៍បានដែរ?

*ដោយ ៖ មាជ សុវណ្ណារ៉ា*

របបខ្មែរក្រហមត្រូវគេទទួលស្គាល់ និងបានដឹងឮជាទូទៅពាសពេញប្រទេស និងលើពិភពលោកថា ឃោរឃៅសម្លាប់ជាតិសាសន៍ឯងអស់ជិតពីរលាននាក់ ក្នុងអំឡុងពេលពួកនេះកាន់អំណាចតែជាង៣ឆ្នាំ (១៧ មេសា ១៩៧៥ - ៧ មករា ១៩៧៩) ប៉ុន្តែនៅពេលដែលសាលាក្ដីមួយរៀបចំដោយរាជរដ្ឋាភិបាលភ្នំពេញ និង

*(តទៅទំព័រទី 3 ក)*

ការពិត

Photo by Document Center of Cambodia

# ២៣ តុលា ៖ បេះដូងសន្តិភាពកម្ពុជា




ជនភៀសខ្លួនខ្មែរនាឆ្នាំ១៩៨២

Washington DC

ដោយ ៖ ពិន សំខុន

នៅកណ្ដាលបេះដូងនៃទីក្រុង ដ៏សំខាន់ជាងគេបង្អស់ក្នុងសកលលោក គឺ រដ្ឋធានីវ៉ាស៊ីនតុន នៃសហរដ្ឋអាមេរិក តំណាងសហគមន៍ ខ្មែរប្រមាណ៨០នាក់ មកពីគ្រប់ទិសទីមាននៃ ស.រ.អា និងបារាំង រួមគ្នានិងអ្នកការទូតបរទេសផង បានមកជួបជុំគ្នាដើម្បីរំលឹកឡើងវិញនូវ ចំណងដៃពិភពលោកមួយដល់កម្ពុជា គឺសន្តិភាពតាមរយៈ"កិច្ចព្រមព្រៀងក្រុងប៉ារីស"ថ្ងៃទី២៣ តុលា ឆ្នាំ១៩៩១ ។ ដើម្បីធានាឲ្យសន្តិភាពកើតឡើងវិញ នៅក្នុង

*(តទៅទំព័រទី 7 ខ)*

# មិត្តអ្នកអាន ព័ត៌មាននិងសាធារណជន

មានវិធីច្រើនដែលគេបញ្ជូនព័ត៌មានទៅសាធារណជន ហើយគ្រប់ព័ត៌មានទាំងនោះ តែងតែត្រូវគេប្រើវានៅពេលណាមួយដែល វា

*(តទៅទំព័រទី 12 គ)*

(តមកពីទំព័រទី ١ ក)

អង្គការសហប្រជាជាតិកកើតឡើងបណ្តាមេខ្មែរក្រហមដែលនៅរស់ សុទ្ធតែបដិសេធមិនទទួលខុសត្រូវ និង សារភាពអំពីការខុសឆ្គងអនុវត្តគោលនយោបាយរបស់ខ្លួនកាលណោះដែរ។

នួន ជា កាលមិនទាន់ត្រូវចាប់ខ្លួន។ លោក នួន ជា ដែលត្រូវបានមេធាវី និងក្រុមគ្រួសារ គិតសុំធានាឲ្យនៅក្រៅឃុំ ក្រោមលេសពីបញ្ហាសុខភាពនោះ ហាក់មិនបារម្ភ និងការប្រឈមណាមួយជាមួយ និងសាលាក្តីនេះទេ ហើយលោក




ទាំងអស់គ្នាគិតទាំងបងធំទី១ ប៉ុល ពត (សាឡុត ស) តា ម៉ុក និង សុន សេន ដែលបានស្លាប់ទៅផង សុទ្ធតែបាននិយាយថា ខ្លួនមិនបានដឹងពីបទឧក្រិដ្ឋ ធ្វើទុក្ខបុកម្នេញ និង សម្លាប់ជាតិសាសន៍យ៉ាងរង្គាលនេះទេ ។

ថ្មីៗនេះ ក្នុងបទសម្ភាសន៍ចាក់តភាគរវាងលោក សម បូរិន នៃវិទ្យុអាស៊ីសេរីជាមួយនិង អតីតប្រធានរដ្ឋសភា និងជាអគ្គលេខាបក្សរងដែលគេស្គាល់ថា ជាបងធំទី២ នៃកម្ពុជាប្រជាធិបតេយ្យ ហាក់ចង់ បង្ហាញឲ្យសាធារណមតិជាតិ អន្តរជាតិ ចាត់រូបលោកថា គឺជាវរជនតស៊ូនៃការបដិវត្តប្តូររបបថ្មីមួយនៅកម្ពុជា ដែលទំនងវាជាការគិតថា ខ្លួនជា អ្នកស្នេហាជាតិម្នាក់ រហូតដល់ទីបញ្ចប់ក៏មិនដឹង ។ លោក

និយាយថា លោកបានប្រឹងប្រែងរស់ ដើម្បីឡើងតុលាការ ។ នួន ជា និយាយថា លោកពុំមែនរង់ចាំឡើងតុលាការ ក្នុងនាមជាអ្នកទោសទេ ។ តែខ្ញុំសប្បាយចិត្តដោយគិតថា តុលាការគឺជាសមរភូមិចុងក្រោយ សំរាប់ធ្វើការវាយបក និង ស្រោចស្រង់បដិវត្តកម្ពុជាប្រជាធិបតេយ្យរបស់លោក ។ អ្នកនយោបាយខ្លះលើកថា ការលើកឡើងរបស់ នួន ជា ពេលនេះ គឺមិនខុសពីជំហរដែល របបរបស់គាត់កាន់អំណាច ហើយបានបំពាក់បំប៉នទៅលើកម្មាភិបាល និងជាសមមិត្តនានារបស់គាត់ថា "កម្ពុជាប្រជាធិបតេយ្យសល់ម្នាក់ក៏ធ្វើ បដិវត្តបានដែរ " ។

ជាមួយនឹងសំណួរស៊ើបៗ ជាច្រើនរបស់លោក សម បូរិន ដែលហៅលោក នួន ជាថា បងៗត្រូវបានលោក នួន ជា ឆ្លើយតបយ៉ាងស្វាហាប់ និងវាយបកក្នុងន័យលើកសរសើររបបគាត់ដែលសម្លាប់ជាតិសាសន៍ឯង រាប់លាននាក់ដដែល ហើយលោក នួន ជា នៅតែមានមោទនៈនិងការបដិវត្តន៍ ដែលអ្នករងគ្រោះនៅរស់គេយល់ថា ជាអំពើឆ្កួតលីលានោះយ៉ាងគឃ្លើនទៀតផង ។

លោក នួន ជា មិនត្រឹមតែមិនទទួលខុសត្រូវពីការអនុវត្តគោលនយោបាយ ដែលនាំដល់ការអន្តរាយធ្ងន់ធ្ងរដល់ប្រទេសជាតិ និងប្រជាជន ឬក៏មានការសោកស្តាយចំពោះការដែលកន្លងផុតទៅនោះទេ តែលោក នូវបានសរសើរ




ដល់របបដឹកនាំរបស់លោករហូតថា បានជួយឲ្យប្រជាជាតិ មានឯករាជ្យមានមោទនៈភាពដោយវាយឈ្នះ ការត្រួតត្រាពីចក្រពត្តិអាមេរិក និងបរទេសជិតខាង ។ លោកថែមទាំងបាននិយាយពន្យល់ថា ប្រសិន បើរបបកម្ពុជាប្រជាធិបតេយ្យខ្មែរក្រហមលោកសម្លាប់មនុស្ស ឬសម្លាប់គ្នាឯងមែន ម្ល៉េះគឺបដិវត្តលោកមិនអាចធ្វើសង្គ្រាមឈ្នះបរទេសឡើយ ។ មួយវិញទៀតលោកយល់ថា របបលោកគឺមានមោទនៈណាស់ ដែលបានបំបែកបក្សចេញមកដឹកនាំផ្ទាល់ មិនចំណុះឲ្យបក្សកុម្មុយនិស្តចិនដូចកាល ពីបង្កើតដំបូងឡើង ។

(តទៅទំព័រទី 4 ក)

*(តមកពីទំព័រទី 3 ក)*

បច្ចុប្បន្នលោក នួន ជា ដែលត្រូវសហ

*Photo by Document Center of Cambodia*




ចៅក្រម ស៊ើបអង្កេតនៃអង្គជំនុំជម្រះវិសាមញ្ញក្នុងតុលាការកម្ពុជា ដែលគេស្គាល់ និងហៅខ្លីថា សាលាក្តីខ្មែរក្រហមធ្វើការចោទប្រកាន់ និងឃុំខ្លួនសួរចម្លើយរងចាំសវនាការដំបូង ។

បងធំទី២របស់ខ្មែរក្រហមលោក នួន ជា



ត្រូវសមត្ថកិច្ចនាំខ្លួនតាមឧទ្ធម្ភាគចក្រ មកកាន់សាលាក្តីខ្មែរក្រហមកាលពីព្រឹកថ្ងៃទី១៩ ខែកញ្ញា ដើម្បីសួរចម្លើយទាន់ទិននឹងការសម្លាប់មនុស្សអស់ជិត២លាននាក់ ហើយសហចៅក្រម ស៊ើបអង្កេតនៃអង្គជំនុំជម្រះវិសាមញ្ញក្នុងតុលាការកម្ពុជា (ECCC) ចោទប្រកាន់លោកពីបទឧក្រិដ្ឋប្រឆាំងមនុស្សជាតិ និង ពីបទឧក្រិដ្ឋកម្មសង្គ្រាម និងបានសំរេចឃុំខ្លួនលោកជាបណ្តោះអាសន្ននៅល្ងាច ថ្ងៃដដែលនោះ គឺបន្ទាប់ពីបាននាំចូលបន្ទប់សួរចម្លើយអស់ជាច្រើនម៉ោង ។

ក្នុងចំណោមមេខ្មែរក្រហមរស់នៅ ក្រៅឃុំមានលោក ខៀវ សំផន អតីតប្រធានរដ្ឋ លោក អៀង សារី អតីតរដ្ឋមន្ត្រីការបរទេស និង ភរិយាលោក អ្នកស្រី អៀង ធីរិទ្ធ រដ្ឋមន្ត្រីសង្គមកិច្ច ទាំងអស់គ្នាគ្មានអ្នកណាម្នាក់ព្រមទទួលខុសត្រូវពីការសម្លាប់មនុស្ស ក្នុងរបបដឹកនាំរបស់ខ្លួនទេ ហើយពួកគេថែមទាំងថា មិនបានដឹង និងទទួលខុសត្រូវអ្វីលើអំពីឧក្រិដ្ឋកម្មទាំងនេះផង ។

លោក នួន ជា នូវបាននិយាយក្បត់ការពិតទាំងស្រុង ក្នុងបទសម្ភាសន៍ កន្លងទៅក្នុងកាសែតភ្នំពេញប៉ុស្តិ៍ថា ឆ្អឹងលលាដ៍សាកសពដែល បន្សល់នៅតាមស្តូបតាំងនានាក្នុងទូទាំងប្រទេស ដូចជានៅជើងឯកភាគខាងត្បូងភ្នំពេញជាដើម អាចជាឆ្អឹងសិប្បនិម្មិត ផងទេពីព្រោះថា សម័យ វិទ្យាសាស្ត្រជឿនលឿនសព្វថ្ងៃ គឺគេអាចផលិតបាននូវវត្ថុតាងក្លែងក្លាយបែបនេះ។

អំពីការឃុំឃាំងមនុស្ស និងអំពីការបង្កើតកន្លែងឃុំឃាំងដ៏សាហាវព្រៃផ្សៃវិញ លោក នួន ជា មិនទទួលស្គាល់និងថា មិនដឹងរឿងនេះឡើយ ហើយសូម្បីតែឌុកទូលស្លែង ដែលមានឌុច ជាមេគ្រប់គ្រង និងមានទាំងសាក្សីនៅរស់ជាច្រើននិយាយថា បានឃើញលោក នួន ជា ចេញចូល ពិនិត្យមើលកន្លែងនោះញឹកញាប់ក៏ដោយ ។

ទាក់ទិនការបំផ្លាញពុទ្ធសាសនាឲ្យរាបដល់ដីវិញ លោក នួន ជា បានខិតខំបង្ហាញថា ខ្លួនលោកជាពុទ្ធសាសនិកជនមួយរូប ដែលមានការ គោរពជឿជាខ្លាំងនូវការសាងបុណ្យ និងការសាងបាប និងអំពីការធ្វើសីលទាន ភាវនាពិសេសអំពីទ្រឹស្តីអប់រំឲ្យមនុស្សស្រឡាញ់សន្តិភាព និងជួយឲ្យមនុស្សស្គាល់ពីសេចក្តីចំរើន។ លោកអួតខ្លួនលោកថា ជាអ្នកបួសរៀនធម៌អាវ្យចេះដឹងច្រើន ហើយថា ការដែលកម្ពុជាប្រជាធិបតេយ្យមិន ឲ្យមានសាសនានោះ វាមិនមែនដូច្នោះទេ ។ តែលោកថា គឺអ្នកបួសខ្លួនឯងទេដែលយល់ថា ខ្លួនបានប្រព្រឹត្តធម៌វិន័យមិនត្រឹមត្រូវដឹងថា មិន បានផ្តល់ប្រយោជន៍ដល់សង្គមជាតិហើយ ក៏លាសិកចាកសិក្ខាបទដោយគ្មានការបង្ខំ ។

ការនិយាយរបស់លោក នួន ជា មិនបានធ្វើឲ្យអ្នកនៅរស់មានជីវិតយល់ស្របទេ ពីព្រោះថា បើតាមលោក យឿន ដែលត្រូវគេជម្លៀស ទៅស្រុកឯខេត្តព្រៃវែងថា "មិនឲ្យថាបំបាត់សាសនាឯណា? បើមិនឲ្យលោកស្លៀកស្បង់ មិនឲ្យលោកគង់ក្នុងវត្ត វាយកុដិ បំផ្លាញវិហារ យកធ្វើ ថ្នល់ ធ្វើទំនប់ ..រាបអស់ដល់ដី ហើយយកវត្តធ្វើជាទីឃុំឃាំង ធ្វើជាកន្លែងពិសោធន៍កសិកម្ម ចិញ្ចឹមជ្រូក..។ល។" លោកថា និយាយនេះ នួន ជា ហាក់ដូចជាមនុស្សតែម្នាក់គត់ដែលបានសល់ពីក្នុងរបបនោះ សូមកុំភ្លេចថា សាក្សីនៅរស់មានមិនតិចម៉ឺនសែនលាននាក់ទេ ដែលបានដឹងឮអំពីការ បំបិទសាសនានេះ ។ លោក នួន ជា បានពន្យល់តបនិងសំនួរលោក សម ប៊ុរិន ដែលសួរថា ក្នុងនាមលោកជាមេដឹកនាំកំពូលរបស់បក្ស ម្យ៉ាងទៀតលោក ជាអ្នកបួសរៀនចេះដឹងអំពីពុទ្ធសាសនាផង តើលោកគិតថា ការកែទម្រង់ខ្លាំងបែបហ្នឹង គឺវាជ្រុលដល់ទៅជាការបំផ្លាញ និងជាការកំទេចចោល សាសនាទាំងស្រុងទៅវិញទេឬ ? លោក នួន ជា តបថា សាសនាវាស្រុតចុះ វាអន់ថយ និងមានសង្ឃធ្វើឲ្យខូចសាសនាកាន់តែច្រើន (លោក វាទរហូតដល់លោកសង្ឃសម័យបច្ចុប្បន្នក៏ខុសច្រើនណាស់ដែរ ដើរផ្សារអង្គាសគ្មានច្បាប់ទម្លាប់ គ្មានគោរពវិន័យ...) ហេតុនេះការនោះ គឺជាការលុបសាសនារបៀបចាស់ចេញ ហើយបង្កើតសាសនាបែបថ្មីឡើងវិញឲ្យល្អ ដែលគួរឲ្យគោរពជាង ពីព្រោះវាហេតុ មានបច្ច័យ ជាគោលអាងត្រឹមត្រូវ ។ ត្រង់នេះលោក នួន ជា ចង់និយាយ អំពីការកើតសាសនាឡើងវិញនៅជាំជាយដែន ក្រោយដែលរបបខ្លួនត្រូវទ័ពវៀតណាមដេញឲ្យមកដល់ ព្រំដែនជាប់ប្រទេសថៃរវាងទសវត្សឆ្នាំ ១៩៨០ ប្លាយ ។ សរុបទៅអ្វី

*(តទៅទំព័រទី 5 ក)*

# ជំរើសចុងក្រោយរបស់ហ៊្វុនស៊ិនប៉ិចសំរាប់ឱកាសបោះឆ្នោត២០០៨

ក្នុងរយៈពេលពីរថ្ងៃពុធ-ព្រហស្បតិ៍ ១៧-១៨ តុលា សន្និបាតក្រុមប្រឹក្សាជាតិគណបក្សហ៊្វុនស៊ិនប៉ិចបានសំរេចជ្រើសយកព្រះអង្គ ម្ចាស់ក្សត្រីព្រះអនុជ នរោត្តម អរុណរស្មី ធ្វើជាបេក្ខជននាយករដ្ឋមន្ត្រី ដើម្បីប្រជែងយកសន្លឹកឆ្នោតដឹកនាំរដ្ឋាភិបាលអាណត្តិថ្មី ជាមួយនិងបេក្ខជនល្បីៗមានប្រិយភាព និងកំពុងកាន់អំណាច ដូចជាលោក ហ៊ុន សែន ពីគណបក្សប្រជាជនកម្ពុជា លោក សម រង្ស៊ី ពីគណបក្សប្រឆាំង សមរង្ស៊ី ។



ញ៉ឹក ប៊ុនឆៃ

ក្នុងសន្និបាតដែលមានអ្នកចូលរួមប្រមាណ ៣០០០នាក់ និងដែលមានជាតំណាងបក្សពីមូលដ្ឋានចូលរួមផង បានប្រារព្ធនៅសាលសន្និសីទចតុមុខ ទីក្រុងភ្នំពេញ ។ អគ្គលេខាធិកាបក្សលោក ញ៉ឹក ប៊ុនឆៃ ថ្លែងបញ្ជាក់ថាសន្និបាតនេះ មានរបៀបវារៈប្រកាសពីសុពលភាព ក្រុមប្រឹក្សាជាតិនិងមានការជ្រើសរើសបំពេញបន្ថែម នូវសមាជិកគណៈកម្មាធិការនាយក និងធ្វើការពិភាក្សាលើរបៀបវារៈនយោបាយ ដើម្បីប្រកួតប្រជែងយកសន្លឹកឆ្នោតក្នុងឆ្នាំ ២០០៨និងការសំរេចលើបេក្ខភាពសំរាប់តំណែងនាយករដ្ឋមន្ត្រីរបស់គណបក្ស។

នៅថ្ងៃទី ១៨ តុលា ជាថ្ងៃទីពីរនៃអង្គសន្និបាត ព្រះអង្គម្ចាស់ក្សត្រី នរោត្តម អរុណរស្មី ជាអគ្គរាជទូតខ្មែរប្រចាំនៅប្រទេស ម៉ាឡេស៊ី ភរិយាលោក កែវ ពុទ្ធរស្មី ជាប្រធានបក្សហ៊្វុនស៊ិនប៉ិច ដែលឡើងថ្មីបន្ទាប់ពីការដកអតីតប្រធានប្រវត្តិសាស្ត្រទ្រង់ នរោត្តម រណឫទ្ធិ កាលពីសន្និបាតខែតុលាឆ្នាំមុន ត្រូវបានសំរេចជ្រើសតាំងជាបេក្ខជន សំរាប់តំណែងនាយករដ្ឋមន្ត្រី ពេលដែលគណបក្សនេះអាចឈ្នះឆ្នោតបានកាន់អំណាច។ ជុំវិញការកំណត់ពីបេក្ខភាពផ្លូវការសំរាប់តំណែងមួយនេះ បានលេចឮ ពីព្រះនាម ខ្សែរាជវង្ស មាន ម្ចាស់ក្សត្រី នរោត្តម វជរ៉ា ទ្រង់ នរោត្តម សិរីវុឌ្ឍ រហូតដល់ ព្រះនាម សម្តេច ក្រុមព្រះ នរោត្តម រណឫទ្ធិ ថែមទៀតផង ។ ប៉ុន្តែ ទាំងមន្ត្រីនាំពាក្យហ៊្វុនស៊ិនប៉ិច និងទាំងមន្ត្រី នាំពាក្យទ្រង់ រណឫទ្ធិ និងម្ចាស់ក្សត្រី ន.វជរ៉ា សុទ្ធតែបង្ហាញប្រតិកម្មខ្វែងគ្នាទាំងអស់ ។



នរោត្តម អរុណរស្មី

លោក មុត ចន្ថា មន្ត្រីនាំពាក្យទ្រង់ ន.រណឫទ្ធិ បានប្រតិកម្មខ្លាំងៗថា គ្មានគណបក្សណាមួយអាចប្រើប្រាស់ ព្រះនាមប្រធានបក្ស នរោត្តម រណឫទ្ធិ ដើម្បីប្រជាប្រិយភាពបានទេ ហើយថា ប្រការនេះវាខុសទៅនិងច្បាប់បោះឆ្នោតផង។ មន្ត្រីរូបនេះបានព្រមានប្តឹង តបផង ប្រសិនមានគេចេសប្រើប្រាស់ ឈ្មោះមេបក្សខ្លួន ដោយគ្មានការយល់ព្រម។

ចំណែកម្ចាស់ក្សត្រី ន. វជរ៉ា ពីប្រទេសបារាំង ប្រាប់កាសែតក្នុងស្រុកថា ទ្រង់និងព្រះអនុជ សិរីវុឌ្ឍ មិនបានរវីរវាយអំពីតំណែង នាយករដ្ឋមន្ត្រីអីនោះទេ ហេតុនេះសូមកុំយកព្រះនាមទ្រង់ទាំងពីរទៅប្រលែងលេង និងបញ្ហានេះឲ្យសោះ។

ឯមន្ត្រីនាំពាក្យហ៊្វុនស៊ិនប៉ិច លោក នូវ សុវត្ថិ លើកឡើងថា គ្មានការផ្តល់ឱកាសដល់សម្តេចក្រុមព្រះទេ តែជាសញ្ញេតនាគណ បក្សនេះនៅតែចង់ឲ្យអតីតប្រធានប្រវត្តិសាស្ត្រ រូបនេះវិលចូលមកក្នុងប្រទេស ដើម្បីបន្តអាជីពនយោបាយរបស់ទ្រង់ជាធម្មតា ប៉ុន្តែឱកាសដែលហ៊្វុនស៊ិនប៉ិចមានសំរាប់ទ្រង់ រណឫទ្ធិ បានបញ្ចប់ទៅហើយ។ ឯបញ្ហាព្រះអង្គក្សត្រីអនុជសម្តេចឪទាំងពីរ (ទ្រង់ន.វជរ៉ា និងទ្រង់ ន.សិរីវុឌ្ឍ) គណបក្សមិនបានលេងសើចជាមួយ ឡើយ។



នរោត្តម សិរីវុឌ្ឍ

បន្ទាប់ពីមានការបង្ហើបមិនផ្លូវការ នូវឈ្មោះ បេក្ខជននាយករដ្ឋមន្ត្រី នោះក្នុងសមាជពីថ្ងៃ ១៨ តុលា២០០៧ គណបក្សរាជានិយម មួយនេះ ក៏បានជ្រើសបេក្ខភាពជាស្ត្រីដំបូងគេ ដើម្បីធ្វើការប្រកួតប្រជែងអំណាច ។ ដែលប្រការនេះត្រូវគេមើលឃើញពីចំណុចល្អច្រើន របស់បេក្ខភាពជាបុត្រីស្តេចមួយអង្គនេះ។

មន្ត្រីសង្គមស៊ីវិល និងមន្ត្រីបក្សរាជានិយម បានចាប់អារម្មណ៍ថា ម្ចាស់ក្សត្រី នរោត្តម អរុណរស្មី អាចជាបេក្ខជនស្ត្រីទីមួយ សំរាប់តំណែងកំពូលនេះ ណាមួយម្ចាស់ក្សត្រី ក៏ជាបុត្រីសម្តេចព្រះ នរោត្តម សីហនុ អតីតមហាក្សត្រទើបដាក់រាជ្យផង ដូចនេះ ទ្រង់ទំនងជាបេក្ខជនសក្តិសមជាងគេ នឹងសង្ឃឹមថា អាចទាក់ទាញបានសម្លេងគាំទ្រជាងបេក្ខជនដទៃ។

ការដាក់បេក្ខភាព ម្ចាស់ក្សត្រី អរុណរស្មី ត្រូវគេមើលឃើញថា នឹងអាចទាក់ទាញបានសម្លេងគាំទ្រពីស្ត្រី ដែលមានចំនួនច្រើនជាងបុរសក្នុងការបោះឆ្នោត ២០០៨។ ណាមួយម្ចាស់ក្សត្រីជាខ្សែរាជវង្សផង គឺអាចឲ្យគេមើលឃើញថា ជាតំណាងឲ្យនិងធានាពីរបបរាជាធិប តេយ្យយ៉ាងពិតប្រាកដ។ ណាមួយអំពីប្រវត្តិកន្លងមកម្ចាស់ក្សត្រីអង្គនេះ ក៏មិនប្រឡាក់ប្រឡូស និងបញ្ហាអាស្រូវ គួរឲ្យកត់សំគាល់ដែរ ។



នរោត្តម វជរ៉ា

ប៉ុន្តែ សំរាប់អ្នកវិភាគមួយចំនួន គេយល់ដែរថា បេក្ខភាពម្ចាស់ក្សត្រី នរោត្តម អរុណរស្មី មិនអាចទៅប្រជែងជាមួយ លោក ហ៊ុន សែន និងលោក សម រង្ស៊ី បានទេ។ ណាមួយប្រជារាស្ត្រលោកមិនបានស្គាល់ច្បាស់និងជិតស្និទ្ធជាមួយនិងម្ចាស់ក្សត្រីអង្គនេះ ដូចបេក្ខជន មុនៗ គឺព្រះអង្គម្ចាស់ ន.រណឫទ្ធិ នោះឡើយ ។ តែថាទោះជាយ៉ាងណា ក៏គណបក្សហ៊្វុនស៊ិនប៉ិចគ្មានជំរើសផ្សេងក្រៅពីនេះដែរ។

ទាក់ទិននឹងការវិភាគយ៉ាងនេះមន្ត្រីនាំពាក្យ លោក នូវ សុវត្ថិ បានអះអាងថា រយៈពេល៧ខែមកហើយ ព្រះអងម្ចាស់ក្សត្រី អរុណរស្មី បានចុះជួបប្រាស្រ័យផ្ទាល់ និងម្ចាស់ឆ្នោតនៅតាមមូលដ្ឋាននានា ក្នុងទូទាំងប្រទេស។ ចំណែកលោក ញ៉ឹក ប៊ុនឆៃ វិញអះអាងថា បេក្ខភាពម្ចាស់ក្សត្រី យ៉ាងណាក៏វាប្រសើរច្រើនជាងកាលទ្រង់ នរោត្តម រណឫទ្ធិ គ្រប់គ្រងហ៊្វុនស៊ិនប៉ិចឲ្យធ្លាក់ចុះនោះដែរ ហើយជាធម្មតាអ្នកថ្មី ត្រូវតែល្អជាងអ្នកចាស់។

មានការនិទស្សន៍ដែរថា លទ្ធផលក្រោយការបោះឆ្នោតឆ្នាំ ២០០៨ គណបក្សហ៊្វុនស៊ិនប៉ិច នឹងនៅតែទទួលបានអាសនៈក្នុងរដ្ឋ សភាខ្លះ តែបើរំពឹងថា ឲ្យមានការគាំទ្រខ្លាំងដូចកាលពីឆ្នាំ១៩៩៣ នោះទំនងជាមិនអាចទេ ហើយអាចនឹងតិចជាងខ្លាំងក៏មិនដឹង ។/

*ខ្មែរប៉ុស្តិ៍*

*(តមកពីទំព័រ 4 ក)*

ដែលលោក នួន ជា បានបង្ហាញខ្លួននិងលើកឡើងនៅពេលនេះ គឺមិនមានន័យថា លោកកំពុងប្រឈម និងតុលាការមួយនោះ ទេ ?តែលោកទំនងជាកំពុងតែអនុវត្តនូវទ្រឹស្តីបដិវត្តរបស់លទ្ធិម៉ាកលេនីន ដែលថា "មនុស្សម្នាក់ក៏ធ្វើបដិវត្តបានដែរ" នោះហើយ ហើយម្យ៉ាងលោក ទំនងជាចង់យកតុលាការនេះធ្វើជាវេទិកាតស៊ូបដិវត្តប្រឆាំង និងសាធារណៈមតិជាតិ និងប្រាប់ទៅពិភពលោកអំពីសេចក្តីក្លាហាននៃជនបដិវត្តដែល បរាជ័យ និងដែលគេក៏មិនទាន់ដឹងថា លោកគ្រោងនឹងនិយាយអំពីអ្វីខ្លះទៀត ប្រាប់ពីវីរៈភាពតស៊ូចុងក្រោយរបស់លោកនោះ។/

# ជួបជាមួយអ្នកដែលធ្វើអោយស្តេចសីហនុខ្វាល់

From Rhode Island

មគ្គុទេសប្រវត្តិសាស្ត្រខ្មែរ ដែលធ្លាប់ហៅខ្លួនលោកថា កញ្ជ្រោងចាស់ និងមគ្គុទេសវ័យក្មេងជាងម្នាក់ទៀតធ្លាប់ឲ្យឈ្មោះថា កញ្ជ្រោងក្មេង គឺសំដៅទៅអំណាចចក្រ របស់សម្តេចនរោត្តម សីហនុ ហើយនិងលោក ហ៊ុន សែន។ ទាំងពីរនាក់ស្រាប់តែហក់ទៅសង្គ្រិតកូនឆ្មាមួយឈ្មោះ សួន វង្វា រឿងចម្លែកនេះបាននាំឲ្យយើងចូល


សួន វង្វា

ហើយសួរលោក វង្វា ដូចតទៅ ៖

**ខ្មែរប៉ុស្តិ៍** ៖ លោកមានតួនាទីជាអ្វី ?

**ឆ្លើយ** ៖ ខ្ញុំជាអតីតនិពន្ធនាយកវិទ្យុសំបុកឃ្មុំ ធ្លាប់ធ្វើការនៅ KID និងកិច្ចការសហគមន៍មួយចំនួនទៀតនៅកម្ពុជា ។

**ខ្មែរប៉ុស្តិ៍** ៖ គណៈកម្មាធិការដែលលោកចូលរួមបានស្នើសភាខ្មែរ ឲ្យដកអភ័យឯកសិទ្ធិសម្តេចនរោត្តម សីហនុ ក្នុងរឿងតុលាការ ខ្មែរក្រហម តើអង្គការលោកជាអ្វីទៅ ?

**ឆ្លើយ** ៖ គឺជាអង្គការលើកស្ទួយយុត្តិធម៌ និងសមធម៌ ដែលមានសមាជិកនៅប្រទេសធំៗជុំ


ន. សីហនុ

វិញសកលលោក យើងចង់ឃើញ យុត្តិធម៌ និងសមធម៌នៅកម្ពុជា ដោយមិនរើសមុខ មិនថាកូនស្តេច ឬកូនរាស្ត្រ ត្រូវតែស្មើគ្នានៅចំពោះមុខច្បាប់ អ្នកធ្វើខុសត្រូវតែហ៊ាន បង្ហាញខ្លួនចំពោះតុលាការ ហើយបើយើងធ្វើត្រូវៗតែហ៊ានកោតសរសើរ ។

**ខ្មែរប៉ុស្តិ៍** ៖ សម្តេច សីហនុ ធ្លាប់មានព្រះបន្ទូលជាញឹកញយថា "លោកនឹងទៅឆ្លើយនៅតុលាការខ្មែរក្រហម" ក៏ប៉ុន្តែដល់លោក យាងសម្តេចសីហនុ ឲ្យមកជាសាក្សីម្នាក់ បែរជាបានលទ្ធផលផ្ទុយ តើលោកយល់យ៉ាងណាដែរ ?

**ឆ្លើយ** ៖ ការសម្លាប់មនុស្សប្រមាណ២លាននាក់ ពុំមែនជាប្រវត្តិសាស្ត្រសម័យអង្គរនោះទេ ចលនានេះ បានកើតនាទសវត្សរ៍ឆ្នាំ ១៩៦០ ហើយឯកសារសរសេរក៏មាន ឯកសាររស់ក៏មាន ដូច្នេះវាជាការងាយស្រួលក្នុងការរកមុខអ្នកដែលចូលរួមឲ្យមានការសម្លាប់រង្គាល លើពលរដ្ឋខ្មែរ សំខាន់គឺមនុស្សត្រូវហ៊ានទទួលស្គាល់ការពិតហើយនិយាយប្រាប់ពលរដ្ឋខ្មែរ ។

**ខ្មែរប៉ុស្តិ៍** ៖ តាមសម្តីរបស់លោក គឺលោកចង់បង្ហាញឲ្យឃើញការពិតពុំមែនបំណងឲ្យគេកាត់ទោសទេមែនទេ ?

**ឆ្លើយ** ៖ គោលបំណងដើម គឺបើព្រះអង្គនៅមានអភ័យឯកសិទ្ធិ ព្រះអង្គនឹងមិនត្រូវបានតុលាការកោះហៅឲ្យទៅជាសាក្សីបានទេ ព្រះអង្គធ្លាប់និយាយហើយតើថា "ឲ្យតែតុលាការហៅ លោកនឹងដឹកដៃប្រពន្ធទៅតុលាការភ្លាម ព្រោះព្រះអង្គជាជនរងគ្រោះ"។ បើគ្មាន អភ័យឯកសិទ្ធិព្រះអង្គជាជនរងគ្រោះ ក៏អាចជាជនជាប់ចោទដែរ យើងចង់ដឹងការពិត បើព្រះអង្គពុំមែនជាឃាតករទេនោះ គេនឹងអស់ សង្ស័យ ក៏ប៉ុន្តែបើជាប់ចោទវិញ ព្រះអង្គត្រូវតែហ៊ានទទួលខុសត្រូវ ព្រោះព្រះអង្គជាអ្នកដឹកនាំ គេមិនអាចទទួលតែត្រូវ ហើយមិនទទួល ស្គាល់ខុសនោះទេ ។

**ខ្មែរប៉ុស្តិ៍** ៖ តើលោកមានឯកសារបញ្ជាក់ទេថា សម្តេចសីហនុ និយាយមិនសច្ចៈ ?

**ឆ្លើយ** ៖ ថ្ងៃទី៩ មករា វិទ្យុ BBC បានផ្សាយហើយលិខិតខ្ញុំទទួលកាលពីខែ៩ ឆ្នាំ២០០៥ ពីព្រះអង្គផ្ទាល់ និយាយប្រែក្រឡាស់ របៀបនេះ ធ្វើឲ្យរាស្ត្រខ្មែរស្លាប់២លាននាក់នោះមិនបានទទួលភាពយុត្តិធម៌ទេ ។

**ខ្មែរប៉ុស្តិ៍** ៖ តើសម្តេច សីហនុ ក្តី លោក ហ៊ុន សែន ខំប្រឹងការពារគ្នាអីចឹង តើហេតុអ្វី ?

**ឆ្លើយ** ៖ អ្នកណាក៏ដោយ ដែលការពារគ្នាមុនពេលតុលាការថា ខុស ឬថា ត្រូវនោះ គឺជាការរំលោភតុលាការយ៉ាងជាក់ស្តែង ។

**ខ្មែរប៉ុស្តិ៍** ៖ មេខ្មែរក្រហមស្លាប់បន្តគ្នា ដូចជាគេចង់បិទមាត់មិនឲ្យនិយាយ តើកិច្ចការពារមិនឲ្យសម្តេចធ្វើជាសាក្សី គឺជាវិធីបិទ មាត់សម្តេចទេដឹង ?

**ឆ្លើយ** ៖ គួរឲ្យស្តាយដែរ ដែលមេដឹកនាំខ្មែរក្រហមស្លាប់ទៅហើយ ពុំដឹងថា គាត់បាននិយាយអ្វីប្រាប់នរណាខ្លះ ? វាហួសសមត្ថភាពដែលខ្ញុំអាចឆ្លើយបាន ។

**ខ្មែរប៉ុស្តិ៍** ៖ តើនរណា ឬប្រទេសណាដែលចំណេញជាងគេក្នុងការដែល សម្តេចសីហនុមិនអាចនិយាយការពិតបាននោះ ?

**ឆ្លើយ** ៖ គឺបរទេសនៅពីក្រោយខ្នង ករណីខ្មែរក្រហម គឺយួន និងចិន មានភស្តុតាងជាច្រើនបង្ហាញថា កាលពីជំនាន់ខ្មែរក្រហម កាន់កាប់ គឺចិនមានវត្តមាននៅគ្រប់កន្លែង មានទាំងជួយម៉ាស៊ីនធ្វើទារុណកម្ម ឲ្យខ្មែរក្រហមទៀតផង ដូចនេះប្រទេសទាំងពីរនេះ នឹងមិនចង់ឃើញមេខ្មែរក្រហម ឬសីហនុ និយាយនយោបាយនោះទេ ។

**ខ្មែរប៉ុស្តិ៍** ៖ ចម្លែកដែរ សម្តេច សីហនុ ឬលោកហ៊ុន សែន ឆ្លើយតបតែជាមួយពួករដ្ឋមន្ត្រី អ្នកការទូតធំៗ ហេតុអ្វីក៏ពេលនេះឆ្លើយនឹងលោក សួន វង្វា ?

**ឆ្លើយ** ៖ មានមិត្តភ័ក្តិច្រើនសរសេរដូចខ្ញុំដែរ ហើយផ្ញើរទៅថ្វាយសម្តេច សីហនុ ហើយលោកមិនតែតបដូច្នោះមែន ខ្ញុំមិនដឹងដែរ ថាហេតុអ្វីបានជាលោកឆ្លើយនឹងខ្ញុំ ពេលនេះប្រហែលរឿងនេះជារឿងរសើប ដោយសារការសម្លាប់មនុស្ស ។

**ខ្មែរប៉ុស្តិ៍**៖ ក្នុងផ្នែកខ្លឹមសារអាចជាកត្តារសើប ក៏ប៉ុន្តែកត្តាពេលវេលា ទំនងជាសម្តេចសីហនុ និងលោក ហ៊ុន សែន ជ្រើសរើស ពេលនេះសម្រាប់ឆ្លើយតបយ៉ាងប្រញាប់ ទៅនរណាម្នាក់ ទំនងជាប្រាប់ទៅតុលាការខ្មែរក្រហមផង

(តទៅទំព័រទី ៩)

(តមកទំព័រទី 1 ខ)

កម្ពុជា ដែលបរទេសយល់ថា"ខ្មែរមានទំនាស់




ប្រធានខារ៉ាង លោក យ៉ាប់ គឹមទឹង

នឹងគ្នាឯងតាំងតែពីបានឯករាជ្យពីបារាំង មក នោះ" អង្គការសហប្រជាជាតិបានចេញមុខមក ជាអ្នករៀបចំសន្តិភាពនោះ ក្នុងនាមជាអាជ្ញាកណ្តាល ។ ក្នុងតួនាទីនោះ អ.ស.ប ធានាឲ្យកម្ពុជានូវឯករាជ្យភាព,ការពារបូរណភាព មិនឲ្យមានការរំលោភឈ្លានពានទឹកដី និងធានាអព្យាក្រិតភាព និងឯកភាពរបស់កម្ពុជាផង ។

ប្រទេសដែលទាក់ទងនឹងបញ្ហាទំនាស់ នៅកម្ពុជាទាំងជិតឆ្ងាយ ចំនួន ១៨ បានចុះហត្ថលេខាជាមួយនឹងភាគីទំនាស់ក្នុងកម្ពុជា ទាំងដោយមានអ.ស.ប ជាសាក្សី សន្យាថា ទម្លាក់អាវុធទាំងអស់គ្នា ទ័ពបរទេសត្រូវដកចេញឲ្យអស់ពីកម្ពុជា មិនឲ្យមានបរទេសណាទៅលូកដៃជួយភាគីខ្មែរណាមួយ ឲ្យមានការបោះឆ្នោតដោយសេរី និងយុត្តិធម៌ រៀបចំគោលការច្បាប់ឲ្យមានលក្ខណៈប្រជាធិបតេយ្យ បញ្ជូនជនភៀសខ្លួនទៅបរទេសឲ្យធ្វើមាតុភូមិនិវត្តន៍ និងកសាងកម្ពុជាឡើងវិញ ។

ដូចកិច្ចព្រមព្រៀងកំណត់ទុក អ.ស.ប បានបញ្ចេញប្រាក់ប្រមាណជិត ៣ពាន់លានដុល្លារ ហើយដាក់ទ័ព និងស្ថាប័នគ្រប់គ្រងមក ឈរជើងនៅកម្ពុជា នាឆ្នាំ១៩៩២ ដើម្បីអនុវត្តកិច្ចព្រមព្រៀងដ៏សំខាន់ជាងគេបង្អស់ នៅក្នុងលោកនាពេលនោះ ។




ពីឆ្វេងទៅស្តាំ អ៊ូ កៅ- អ្នកស្រី គឹម ណយ (ប្រធានខ្មែរម្ចាស់ស្រុក)-ចក់ សុខុន និងស៊ាន ម៉ាសារ៉ាង

កម្លាំងជំមហិមានៃបេសកកម្ម អ.ស.ប លើកម្ពុជា បាននាំមកនូវសន្តិភាពគួរជាទីសង្ឃឹមដល់ជនជាតិកម្ពុជា បញ្ឈប់ភ្លើងសង្គ្រាម ធំៗ បាន បន្ថយការបាត់បង់ជីវិត បង្កើនជីវភាពជាមនុស្សម្នា បង្កើនជំនឿសេរីភាពរបស់មនុស្ស បង្កើនការគោរពសិទ្ធិមនុស្ស ហើយដាក់ រនាំងការពារមិនឲ្យការគោរពនោះ ចុះថយវិញបានឡើយ ។

កិច្ចប្រជុំសន្និបាតថ្ងៃទី២០-២១ តុលា ឆ្នាំ ២០០៧ នៅរដ្ឋធានី វ៉ាស៊ីនតុន កិច្ចប្រជុំដោយមានការសិក្សាល្អិតល្អន់នៅលើឯកសារ ដែលប្រភពព័ត៌មានគួរឲ្យជឿបាន ទៅលើការវិភាគរបស់វាគ្មិន ដែលធ្លាប់មានស្នាដៃក្នុងការតាមដានព្រឹត្តិការណ៍នៅកម្ពុជាយ៉ាងជិតស្និទ្ធ បានវាយតម្លៃថា "១៦ឆ្នាំក្រោយមកកិច្ចព្រមព្រៀងក្រុងប៉ារីស នៅតែត្រូវភាគីបរទេស និងខ្មែរខ្លួនឯងជាន់ឈ្លីគ្មានឈរ ហើយមិនបានធ្វើ ឲ្យកម្ពុជាមានសន្តិភាព និងស្ថេរភាពបានទេ"។

កិច្ចប្រជុំដែលដឹកនាំ និងរៀបចំផ្តួលដោយអង្គការសិទ្ធិមនុស្សមួយ ឈ្មោះ CAHRAD ខារ៉ាដ នៃរដ្ឋធានីវ៉ាស៊ីនតុន មានអង្គការ មួយចំនួនទៀតចូលរួម ដូចជាខ្មែរម្ចាស់ស្រុក CANC CAF គណៈកម្មាការព្រំដែនខ្មែរ CFC, UCIC ហើយក៏មានតំណាងគណបក្ស សម រង្ស៊ី គណបក្សសិទ្ធិមនុស្ស និងសហព័ន្ធខ្មែរកម្ពុជាក្រោមចូលរួមផង ។

ទាំងអស់គ្នាបាននាំគ្នាសម្រេចថា "ទាមទារឲ្យហត្ថលេខីនៃសន្និសីទក្រុងប៉ារីសស្តីពីកម្ពុជា កោះប្រជុំឡើងវិញដើម្បីតាមដានឲ្យ ឃើញនូវការរំលោភលើអត្ថន័យនៃកិច្ចព្រមព្រៀងថ្ងៃ២៣ តុលា ឆ្នាំ១៩៩១"។

### កិច្ចពិភាក្សា

អង្គប្រជុំបានលើកឡើង នូវការមិនពេញចិត្តចំពោះប្រទេសជិតខាង ដូចជាវៀតណាម ដែលរក្សាកម្លាំងទ័ពសម្ងាត់របស់ខ្លួនរក្សា អំណាចតាមរយៈមន្ត្រីរដ្ឋាភិបាលដែលខ្លួន បានបន្ទុបបញ្ចូនពលរដ្ឋរបស់ខ្លួនរៀងរាល់ថ្ងៃ មករស់នៅកម្ពុជា អាចបង្កើតសមាគមវៀតណាម ចំនួន ១៩ នៅតាមបណ្តាខេត្តនៃកម្ពុជា ហើយមានទាំងអាចបោះឆ្នោតបានទៀតផង ។

វាគ្មិនខ្លះ បានរំលឹកពីព្រឹត្តិការណ៍នៅកម្ពុជាខ្លះដែលផ្ទុះឡើងនៅពេលដែលផលប្រយោជន៍បរទេសខ្លះនៅកម្ពុជាមានការប៉ះពាល់ នៅខ្លះទៀតក៏មានសម្តេចនរោត្តម សីហនុ ជាអ្នកជួយយ៉ាងសកម្មដែរ ដូចជាបង្កើតជា រដ្ឋាភិបាល ដែលមាននាយករដ្ឋមន្ត្រី២ ខុសនឹង អត្ថន័យនៃសន្ធិសញ្ញាក្រុងប៉ារីសយ៉ាងពេញទំហឹង ការបោះឆ្នោតកញ្ចប់ដោយលើកដៃ ហើយអនុញ្ញាត្តិឲ្យមានការចុះហត្ថលេខា របស់ព្រះមហាក្សត្រទទួលស្គាល់សន្ធិសញ្ញាជាមួយវៀតណាម នៅពេលខ្មែរនៅក្រោមអនាព្យាបាលរបស់វៀតណាម ។ វាគ្មិនចង់បង្ហាញពីការ ឃុបឃិតរបស់មន្ត្រីជាន់ខ្ពស់ខ្មែរ ក្នុងការបំពីបរទេសពីលើខ្នងរាស្ត្រខ្មែរ ដែលត្រូវរើបរះពីភាពក្រីក្រ និងមិនចេះដឹងច្រើន។

មានគំនិតខ្លះចង់ស្វែងរក មេធាវីអន្តរជាតិ ដើម្បី "គាស់ខ្ទាចសន្ធិសញ្ញាក្រុងប៉ារីសឲ្យងើបឡើងវិញ "បានន័យថា ការជិះជាន់រំលោភ កិច្ចព្រមព្រៀងអស់រយៈពេលយូរ ធ្វើឲ្យកិច្ចព្រមព្រៀងនោះស្លាប់ ដូច្នេះមានតែរកផ្លូវច្បាប់ទេ ទើបអាចរកយុត្តិធម៌ជូនប្រជាជាតិខ្មែរបាន ។

ប្រទេសវៀតណាម ដោយសារតែគណបក្សប្រជាជន ជាអ្នកជួយជ្រោមជ្រែង ថែរក្សា និងពង្រីកប្រយោជន៍ឲ្យច្រើនពេកទៅ បាន ក្លាយទៅជាស៊ីបនៃការបន្ទោស ពីអង្គប្រជុំស្ទើរមិនដាច់ពេល ។ ជាមួយគ្នានោះ ប្រទេសចិន ដែលបានជួយសម្តេចនរោត្តម សីហនុ ជារៀងរហូតមក ក៏បានក្លាយជាស៊ីបទីពីរបន្ទាប់ពីវៀតណាមនោះដែរ សម្តេចសីហនុ ដោយសារមិត្តភាពចិន វៀតណាម បានជួយលោកនាយក រដ្ឋមន្ត្រី ហ៊ុន សែន ច្រើនដង មិនឲ្យរបូតពីអំណាច បើទោះជាគណបក្សប្រជាជនបានសន្លឹកឆ្នោតតិចជាង គណបក្សហ្វ៊ុនស៊ិនប៉ិច និងគណបក្ស សម រង្ស៊ី ក៏ដោយ ។

សហព័ន្ធខ្មែរកម្ពុជាក្រោម បានមកបញ្ចេញភស្តុតាងជាច្រើនបង្ហាញពីពុតត្បុត របស់យួនក្នុងនយោបាយសម្លាប់ខ្មែរ សម្លាប់នៅ កម្ពុជាក្រោមមិនទាន់អស់ចិត្តមកសម្លាប់ខ្មែរកណ្តាលថែមទៀត ។ តែឥឡូវនេះខ្មែរក្រោមបានត្រូវ អ.ស.ប ទទួលស្គាល់ថា ជាជនជាតិភាគ តិចហើយអាចបង្កើតរដ្ឋាភិបាល របស់ខ្លួនស្របច្បាប់បានទៀតផង ។

សរុបសេចក្តីនៃកិច្ចពិភាក្សាពីរថ្ងៃ នៅសណ្ឋាគារ ហូលីដេអ៊ិច នៃរដ្ឋធានី វ៉ាស៊ីនតុន វាគ្មិនបានមូលមតិគ្នាទាមទារឲ្យមាន"សន្និសីទនៃហត្ថលេខីនៃកិច្ចព្រមព្រៀង ក្រុងប៉ារីសឡើងវិញ ដោយសំអាងនូវភស្តុតាងស្ទើរគ្រប់ជំហាននៃការរំលោភលើសន្ធិសញ្ញាក្រុងប៉ារីស ថ្ងៃទី ២៣ តុលាឆ្នាំ១៩៩១"។

### សន្និដ្ឋានបញ្ចប់

វាគ្មិនម្នាក់ឈ្មោះ សុក សុគុណ ដែលជាអ្នកឯកទេសខាងឯកសារ បានសំដែងការពេញចិត្ត ដោយឃើញខ្មែរយើងអាចប្រជុំគ្នាបានយ៉ាងយូរ ដោយគ្មានទំនាស់គ្នា ខុសពីពេលមុនៗដែលចុងបញ្ចប់ច្រើននាំកំហឹង និងទំនាស់ទៅផ្ទះវិញរៀងៗខ្លួន រីឯខ្លឹមសារវិញ លោកនិយាយថា យើងនិយាយនៅវែងអន្លាយនៅឡើយ ដោយខ្វះការសិក្សាឯកសារ គួរសិក្សាអំពីរឿងច្បាប់ឲ្យបានច្រើន ពីព្រោះរឿងតវ៉ា លើសន្និសីទក្រុងប៉ារីសនេះ គឺជារឿងច្បាប់ ។ មតិ

(តទៅទំព័រទី 10 ខ)

## សោភ័ណភាព៖ ការថែរក្សាសម្រស់ដោយមិនបាច់ចំណាយច្រើន

**តែបៃតងលាយទឹកឃ្មុំធ្វើឲ្យស្បែកមុខតឹងល្អ:** បើចង់ឲ្យស្បែកមុខរបស់អ្នកតឹងរលោង ប្រាសចាកស្នាមជ្រីវជ្រួញ ចូរយកស្លឹក តែបៃតងកិនឲ្យល្អិត ហើយយកមកលាយជាមួយទឹកឃ្មុំ រួចយកមកលាបបំពោកមុខប្រមាណ១៥នាទី ។ បន្ទាប់មកសឹមលាងសំអាត មុខដោយទឹកធម្មតា ហើយស្បែកមុខរបស់អ្នកនឹងតឹងរលោង ធ្វើឲ្យមានអារម្មណ៍ស្រស់បស់ភ្លាម ។

**ប៉េងប៉ោះធ្វើឲ្យស្បែកស្អាត៖** យកប៉េងប៉ោះពណ៌ក្រហមពីរផ្លែ មកកិនលាយជាមួយទឹកដោះគោជូរ ៣-៤ស្លាបព្រា ហើយលាបបំពោកមុខ លើកលែងតែនៅជុំវិញរង្វង់ភ្នែក ប្រមាណ១០នាទី។ ក្រែមប៉េងប៉ោះទឹកដោះគោជូរនោះ នឹងធ្វើឲ្យមុខរបស់អ្នកស្អាត ស្រស់ថ្លាមិនខាន បើអ្នកឧស្សាហ៍ធ្វើបែបនេះញឹកញាប់ មុខរបស់អ្នកនឹងកាន់តែមានសម្រស់ គួរឲ្យគយគន់ យ៉ាងប្រាកដ ។

**បក"មុន"អង្គាមដោយស៊ុតស្ងោរ៖** ស៊ុតស្ងោរមិនត្រឹមតែជាអាហារ សម្បូរទៅដោយសារធាតុអាហារយ៉ាងច្រើនទេ តែវាក៏ អាចយកទៅធ្វើប្រដាប់បក "មុន" អង្គាមល្អិតៗចេញពីមុខរបស់យើងទៀតផង ។ ចូរសាកល្បងយកស៊ុតស្ងោរ មកលញ់លាប់លើមុខ ហើយទុកឲ្យស្ងួត ។ នៅពេលដែលអ្នកបកស្រទាប់ស៊ុតស្ងោរចេញអ្នក នឹងបានឃើញគ្រាប់ "មុន" អង្គាមល្អិតៗជាប់មកជាមួយមិនខាន ។/

សុខភាព

ទឹក... សារធាតុសំខាន់ សម្រាប់ទ្រទ្រង់ជីវិត

តើអ្នកដឹងទេថា ទឹកមានសារសំខាន់ និងមានសកម្មភាពអ្វីខ្លះនៅក្នុងរាងកាយរបស់អ្នក ?

ជារៀងរាល់ថ្ងៃរាងកាយរបស់អ្នក ត្រូវបាត់បង់អស់ជាតិទឹកប្រមាណជាងមួយលីត្រកន្លះ ទៅពីរលីត្រ ។ នៅក្នុងខួរក្បាលរបស់ អ្នកមានជាតិទឹក៨០% នៅក្នុងសាច់ដុំ មានជាតិទឹក៧០% និងនៅក្នុងជាតិប្លាស្មាក្នុងឈាមរបស់អ្នក មានជាតិទឹកដល់ទៅ៩២ភាគរយ ។

ទឹកពិតជាមានសារសំខាន់ សម្រាប់បន្ថែមចំណុះនៅក្នុងបរិមាណឈាមរបស់អ្នក ។ ទឹកអាចជួយកំចាត់រាល់ជាតិពុលចេញអំពី រាងកាយ និងផលិតផលដទៃទៀត ។ ទឹកមានសារប្រយោជន៍ជួយជម្រុញឲ្យខួរក្បាលមាត់,ច្រមុះ,ភ្នែក និងខួរក្បាលឆ្អឹងខ្នងឲ្យរលោស់ បានស្រួល ទឹកមានតួនាទីសំខាន់នៅក្នុងការរំលាយអាហារ ក៏ដូចជាការសម្រួលដល់ការបឺតស្រូបអាហារទៅចិញ្ចឹមកោសិកានៅពាស ពេញរាងកាយយើង ។

ទោះបីជាទឹកជាវត្ថុធាតុដើមដ៏សម្បូរបែបពីប្រភពធម្មជាតិក្តី តែបរិមាណទឹកដែលផ្គត់ផ្គង់ជាទឹកស្អាតដល់តម្រូវការរបស់ មនុស្សលោកមានតែត្រឹមបីភាគរយប៉ុណ្ណោះ ក្រៅពីនោះគឺសុទ្ធតែទឹកមិនស្អាត និងទឹកប្រៃ ។

គិតជាមធ្យមភាគជនជាតិកេនយ៉ា បានចំណាយពេលវេលាអស់បីម៉ោងក្នុងមួយថ្ងៃ ដើម្បីស្វែងរកទឹកមកផ្គត់ផ្គង់ដល់ជីវិត រស់នៅប្រចាំថ្ងៃរបស់ពួកគេ ។/

(តមកពីទំព័រទី 6 )

កំមិនដឹង?

ឆ្លើយ ៖ ខ្ញុំអាចយល់ស្របបានដែរ ប្រតិកម្មធំនោះ គឺដាក់កំហុសទៅសហរដ្ឋអាមេរិក ប្រទេសដែលខ្ញុំកំពុងរស់នៅ ចំណែកឯចិន និងយួន ជាអ្នកដៃដល់នោះ លោកឥតនិយាយអ្វីទាំងអស់ ចំណែករឿងអ្វីទៀតខ្ញុំមិនទាន់ហ៊ាននិយាយអ្វីនៅឡើយទេ ។

ខ្មែរប៉ុស្តិ៍ ៖ សូមអរគុណ លោក សួន វង្ហា។ ជុំវិញប្រតិកម្មរបស់ សម្តេចសីហនុ ពីបំណងចង់ឲ្យព្រះអង្គចូលព្រះកាយ ទៅបំភ្លឺនៅតុលាការខ្មែរក្រហម ដោយការចោទប្រកាន់ពីលោក សួន វង្ហា ដែលយើងបានធ្វើកិច្ចសំភាសន៍ជូនខាងលើនេះថា ព្រះអង្គជាប់ជំពាក់ទៅនឹងរបបប្រឡាក់ឈាមនាអតីតកាលនោះ ។ ទាំងរដ្ឋាភិបាលកម្ពុជា ឬអង្គការសង្គមស៊ីវិល បានចេញលិខិតឬ សំដីផ្ទាល់ជាប្រតិកម្មក្នុងន័យគួរតែកុំប៉ះពាល់ដល់អតីត ស្តេចផែនដីខ្មែរមួយ នេះព្រោះមានអភ័យឯកសិទ្ធិដែលគ្មាននរណាប៉ះពាល់បានដោយ ច្បាប់រដ្ឋធម្មនុញ្ញនោះ ។ គេគួរទុកឱកាសសំរាប់ព្រះអង្គផ្ទាល់ក្នុងការ សម្រេចព្រះទ័យថា តើចង់ ឬមិនចង់ប្រឈមមុខនឹងតុលាការខ្មែរក្រហម ។ ប្រសិនព្រះអង្គពិតជាចង់រកយុត្តិធម៌ នូវការស្វែងរកការពិតពី របបកាប់សម្លាប់ខ្មែរក្រហមនោះ។ បញ្ហានេះមិនត្រឹមតែប្រតិកម្មពីអ្នកនយោបាយខ្មែរក្នុងស្រុកទេ ហើយនៅឯក្រៅស្រុកពីក្រុង Long Beach រដ្ឋ California ខ្មែរប៉ុស្តិ៍ បានទទួលទូរស័ព្ទពីប្រធានគណបក្ស




ប្រជាជនកម្ពុជាប្រចាំរដ្ឋ California លោក នូវ ផល្លី បានបញ្ចេញសំដីជាមតិរបស់លោកថា យុត្តិធម៌ សំរាប់ប្រយោជន៍ជាតិធំធេងណាស់ ភស្តុតាង និងឯកសារ សាក្សី មានមិនអស់ ដែលយើងត្រូវចោទប្រកាន់ ឬកាត់ទោស ដូចដែល ក្រុមអ្នកស្រាវជ្រាវឯកសារប្រល័យពូជសាសន៍, អ្នកឯកទេសច្បាប់អន្តរជាតិបានធ្វើ ឬកំពុងធ្វើដើម្បីយុត្តិធម៌ដល់មនុស្សដែលបានស្លាប់ អស់ជិត២លាននាក់ ។ ដោយមិនសំខាន់តែទៅលើស្តេច ន-សីហនុ ម្នាក់នោះទេ ។/

# MAYORAL HOPEFULS FOR THE ELECTION

I was told to write about the mayoral hopefuls for the election. I can not in my right mind comply. I have been researching our candidates for quite some time and have many thoughts and opinions on their highlights and their downfalls. Michael Nutter will be elected mayor, he will have my vote and he should have yours, and this is why. Michael Nutter is the only candidate to have a plan for anything. There were others in the Democratic primary, which is the actually election considering a Republican hasn't won in this city in 60 years. But now that the Republican's and an Independent are in the race, it is already over. I seem to always vote independent myself. I am a moderate and have found that many candidates decide which way to go on issues because that is what their party does. Independents don't have parties, therefore there is no set agenda. Nutter is an independent at heart. He looks at everything not as Democrat or Republican, but as what is a good idea for the city, and what will make it worse. Michael Nutter went to St. Joes's Prep, Undergrad at University of Pennsylvania and then on to the Wharton School of Business. He is in my opinion the smartest person running for mayor that I have been alive to witness. He has some radical opinions for this city, and less face it, the way things are needs to change. Our opinions of this city need a revaluation. This city has so much potential. Center city has a vibrant night life, too many museums to keep track, and even more art venue's. What else do we have; passion, culture, food, just to name a few things. The things we need to focus on are things that will make people want to come here. Education and crime are the hot topics. How do we keep more of these students in Philadelphia once they graduate from our inner city Universities. Temple, U Penn, Drexel, University of the Sciences, University of the arts, La Salle, Pennsylvania Academy of the Fine Arts, Philadelphia College, Thomas Jefferson University, Moore, just to name a few. These students come, and live here from all over the world, and then leave. What are we doing to them? Do they not like the way we refuse to use turn signals? Or when we do, it's to tell you I'm changing lanes, instead of a request. Maybe it's the speeding that the police pay no attention to. The crime rate that is rising because of little economic opportunity. Public Schools are embarrassingly bad rite now. Everything that goes bad in Philadelphia is seen as "what do you expect?" I have lived here my entire life and have seen this place lose more and more hope. Have heard it compared to places that have little or no hope, the devastation in the eyes of the people as if we live in Ireland, or Germany. This is America, and we will have a remarkable city if we want one. But there is the problem. Who cares, this is Philadelphia? Well Michael Nutter cares! And we should join him. The person at the top can come up with any idea, and if he doesn't have the backing nothing will happen. Right now everything from education, to pot-hole fixing needs to be dissected. We advertise as a bike friendly town and there are potholes all over, and when we do fill them in, and Walla! Now we have a speed bump. If you want to continue to live in a city where tourists are scarred to stay the night. Where people would never want to raise children, where if its not sports related nobody cares. Then just put your head down and sleep through life. People have died for a lot less than making a city great again. We won independence, beat the yellow fever plague and the depression. A few things like high crime/murder, lacking education system, poor opportunities, low quality of air, should not muffle our passion. Why are we so passionate about sports, but when things really matter we turn the other cheek. Stand up for your liberties and fight for the government the first American's fought for. Not for this one, but for one of meaning, and hope. Go out now to the poles, keep yourself informed and keep your mind open, and vote, vote, vote!

(តមកពីទំព័រទី 7 ខ)

របៀបនេះយើងបានឮសំដែងច្រើនគ្នានាចន្លោះពេលអង្គប្រជុំម្ដងៗ ។

នារីក្មេងក្នុងចំណោមអ្នកនយោបាយ ឈ្មោះ រ៉ានី លុស៊ិនស្ដី មានទឹកមុខស្រស់បស់ តែ


វេជ្ជបណ្ឌិត នីកូល អ៊ុង

Photo by Khmer Post

នឿយហត់ ដោយបដិសណ្ឋារកិច្ច បានត្រូវវាគ្មិនរំលឹកឈ្មោះ និងកោតសរសើរច្រើនដង ដោយសារតែការរៀបចំទទួលភ្ញៀវសមរម្យ ឥតខ្ចោះ ហើយសំដីទន់ភ្លន់ ។ តែគេនៅចងចាំសិល្បករ អូបូន ស៊ូឌីយូ ម្នាក់ ឈ្មោះ ចាន់ធូ អឿ ដែលចេះរំលឹកសិល្បៈវប្បធម៌ខ្មែរ ក្នុងពាក្យពេចន៍ និងកំណាព្យកាព្យឃ្លោងដ៏សែនពិរោះចាប់ចិត្ត ។ លោក ចាន់ធូ អឿ ជាជាងគំនូរ និងចម្លាក់ខ្មែរតែម្នាក់គត់ដែលបានយកចំណេះនេះជាអាជីព តាំងច្រើនសិបឆ្នាំមកហើយ ។ ហើយក៏មាននារីបញ្ញវន្តម្នាក់ទៀត គឺ នីកូល អ៊ុង Nicole Ung ជាវេជ្ជបណ្ឌិតខាងធ្មេញ មានចិត្តអាណិតអាសូរដល់ពលរដ្ឋខ្មែរ ដែលខកខានពុំមានសំណាង នឹងទទួលលាភសក្ការៈ ពី "កិច្ចព្រមព្រៀងក្រុងប៉ារីស" តែផ្ទុយ


Photo by Khmer Post

ទៅវិញ បានត្រូវកេងប្រវ័ញ្ចដោយបរទេស និងមន្ត្រីជាន់ខ្ពស់ខ្មែរ។ Nicole ក៏បានប្រកាសធ្វើកូដកម្មឥតអាហារចំនួនបីថ្ងៃ ដើម្បីសម្ដែងការចូលរួមរងទុក្ខជាមួយប្រជាពលរដ្ឋខ្មែរ នាចុងពេលប្រជុំនោះដែរ ។/


ជំរំជនភៀសខ្លួនតាមបណ្ដោយព្រំដែន ខ្មែរ ថៃ ក្នុងទសវត្ស ៨០

# VISUAL JUSTICE – Media and the Khmer Rouge Tribunal

Written by Khmer Post: Tiara Delgado

## Part 3: Preserving history through media

Non-profit organizations have been busy preserving history through evidence and testimonies. The preservation of history is important for the upcoming tribunal. The Documentation Center of Cambodia (DCCAM) in Phnom Penh and the Cambodian Genocide Project at Yale University have been collecting evidence, creating archives and preserving documentation since the mid-1990's. DCCAM is arguably the leader in research, preservation and education of the Khmer Rouge legacy and the tribunal process. DCCAM has used media in numerous ways to achieve its mission of seeking "truth, justice and memory."

*Photo Exhibit*: DCCAM has created a permanent photo exhibit at Toul Sleng Museum titled "Victims and Perpetrators." The exhibit displays photos of Khmer Rouge cadre as teenagers and as they are today. Along with their testimony this exhibit gives a chilling explanation of how Khmer people could inflict brutality on their fellow citizens.

DCCAM has another chilling photo exhibit displayed at Toul Sleng. The forensic skull exhibit is part of the mass-grave mapping project. This photo exhibit shows exhumed skulls cracked open due to blunt force trauma – evidence of Khmer Rouge atrocities.


THE PLAYERS

*Documentary Film:* Filmmaker Rachana Phat and DCCAM produced a documentary titled "The Khmer Rouge Rice Fields." It tells the story of a woman who survived being raped by a Khmer Rouge soldier. This film is unique because it documents one of only a few accounts of a survivor raped by the Khmer Rouge. As the woman explains in the film, Khmer Rouge cadre were forbidden to have sex outside marriage. Therefore women who were raped by Khmer Rouge were usually those en route to being executed. The documentary helps expose this crime against humanity that may have otherwise not been able to be prosecuted in court.

*Magazine:* Since 2000 DCCAM has published a quarterly magazine called "Searching for the Truth." Published in English and Khmer languages, it is entirely dedicated to foster public and academic debate about the Khmer Rouge law, history and politic. It also discusses human rights law and reports regularly on tribunal developments.

*Radio:* In 2004 DCCAM in cooperation with the Women's Media Center began radio broadcast two days a week, reading articles from the Searching for the Truth magazine. This is important for the great majority of Cambodian people are illiterate or have no access to the magazine.

*Internet:* Internet will be an essential media for connecting and educating the world. New York- based NGO Open Society Initiative funds the Khmer Rouge Trial Web Portal www.krtrial.info. The website consolidates information from various NGO's, the United Nations and other media organizations about Khmer Rouge issues and even about other genocide tribunals. The "information superhighway" is at the fingertips of people worldwide but inaccessible to most Cambodians. When the trial begins how can media reach average Khmer citizens?

**Next Issue: PART 4- MEDIA INSIDE THE KRT COURTROOM**

# 32 years after Killing Fields commemorated at CSULB

Written by Khmer Post: Tiara

On Saturday October 20 Cal State University Long Beach hosted an event-packed day to celebrate Cambodian culture and remember history. "Cambodia- 32 Years after the Killing Fields" was presented by the Dr. Haing S. Ngor Foundation in cooperation with CSULB Sociology department. The afternoon extravaganza featured films, dance, music, guest speakers and community information tables. "The Dr. Haing S. Ngor Foundation produces events like the one at CSULB: it's an effort to educate by putting some focus on Cambodia, past and present" said Jack Ong president of the foundation and the event's Master of Ceremonies.

The event celebrated Cambodian culture with the grace and beauty of the Spirit of Angkor dancers and lively music from the Ho Chan Ensemble and the Pich Keo Sambath Family. There was also a special premiere screening of ***"What I see when I close my eyes."*** This documentary explored the plight of Cambodian street children and the work of the FRIENDS organization in Phnom Penh. Filmmakers Leslie Hope and Adam Kane were there to discuss the film. Another documentary was screened called ***"The Road to Closure – Understanding the Khmer Rouge Tribunal."*** Jack Ong says," The world should never forget the heinous crimes perpetrated against humanity, no matter where or when they happen. By remembering, we remind each other of the mistakes of the past."


Jack Ong

Following the screening the filmmaker Tiara Delgado answered questions on a panel along with Los Angeles attorney Sean Butler. " The goal of my film is to explain the struggle between the UN and Cambodian government to organize a tribunal and how Cambodians and Cambodian-Americans feel about having a tribunal at this late stage," says Ms. Delgado. Sean Butler is co-chair and president of the International Criminal Court Alliance, a California non-profit corporation with a mission to inform and educate about the International Criminal Court. He answered many of the audience questions about the tribunal proceeding. "It is important that for some types of activities-genocide and crimes against humanity included-that there should be no time after which those who committed those activities should not need to worry about accountability," says Mr. Butler. "To show the rule of law applies to even the most powerful of former leaders instills the reliance on institutions rather than the individuals who occupy offices."

The full day event which lasted from noon to 5pm was a great success. Author Navy Phim attended the event and sold her new book ***"Reflections of a Khmer Soul"***. Ms. Phim stated" I am a supporter of these types of events. I hope we continue to have them." Jack Ong was very pleased with the outcome of the event. " I felt that Dr. Ngor would be very pleased to see the resilient spirit of his fellow Cambodians. The post-Khmer Rouge generations are doing a tremendous job of rebuilding a knowledge of their culture."

(តមកពីទំព័រទី 1 ខ)

នឹងផ្តល់ប្រយោជន៍ឲ្យអ្នកប្រើនោះ ។ ក៏ប៉ុន្តែឥទ្ធិពលនៃព័ត៌មានទាំងនោះវាស្ថិតនៅលើគេជឿ ឬមិនជឿ ។ អ្នកសារព័ត៌មានទាំងអស់ចង់ បានណាស់នូវជំនឿរបស់សាធារណជនចំពោះការអាន ឬស្តាប់ ឬមើលរបស់ខ្លួន ។ អ្នកសារព័ត៌មានតិចតួចដែលទោះជាខ្លួនខំបង្ហាញការពិតយ៉ាងណាក្តី ក៏នៅតែគេមិនជឿ រីឯមួយចំនួនធំនោះ ពុំមានខ្វាយខ្វល់អំពីការពិតអ្វីបន្តិចទេ ។ ក៏ប៉ុន្តែអ្នកអាន អ្នកស្តាប់ និងអ្នកមើល អាចសំគាល់ និងចំណាំអត្ថបទដែលគួឲ្យជឿបានយ៉ាងងាយស្រួលពីអត្ថបទព័ត៌មានដែលអ្នកសារសេរមានការព្យាយាមយកការពិតជា សីលធម៌សម្រាប់ថ្វីដៃរបស់ខ្លួន ។

អត្ថបទមួយនិយាយថា "ខ្ញុំនឹងនិយាយរឿងកំប្លែងមួយ"ឬក៏"រឿងដែលខ្ញុំរ៉ាយរ៉ាប់នេះជារឿងព្រេង"ឬក៏ម្យ៉ាងទៀតថា"បើខ្ញុំមិន ច្រឡំទេ ខ្ញុំឮគេនិយាយថា" ពាក្យទាំងនេះយើងច្រើនច្រឡំថា ជាពាក្យភូតភរ តែផ្ទុយទៅវិញ គឺជាការពិតមួយដែលគេសូមឲ្យអ្នកអានកុំ យកជាការពិតប្រាកដជាក់ស្តែងធ្វើអ្វី ។ ខ្លះយករឿងកំប្លែងថាជៀមជាមដល់រឿងពិតរបស់ខ្លួន ឯការពិតនោះគឺភូតភរទាំងស្រុងសំរាប់ កំសាន្តតែប៉ុណ្ណោះ ។ គេច្រើនច្រឡំថា អ្នកកំប្លែងជាអ្នកព័ត៌មានតែពួកគេ ត្រឹមតែជាអ្នកបញ្ចេញយោបល់តែប៉ុណ្ណោះ ដែលច្បាប់ស្តីពីការ បញ្ចេញយោបល់ពុំអាចឲ្យនរណាម្នាក់ ខុសនឹងច្បាប់បានឡើយ ។ អ្នកកំប្លែងនៃប្រទេសសេរី គេបានយល់ប្រការទាំងនេះច្បាស់លាស់ ហើយ យកការឲ្យយោបល់នេះជាអាជីពបាន ។

ក្នុងសហគមន៍ខ្មែរយើង គេនៅនិយាយនៅឡើយថា ជាសហគមន៍ដែលបាត់បង់ជំនឿលើខ្លួនឯង និងជំនឿដល់អ្នកដទៃ គឺជំនឿ នេះហើយដែលគេត្រូវហាត់រៀនថា "ជឿអ្វីបានចំរើនអ្វីដែលនឹងនាំឲ្យវិនាស "។ សហគមន៍ខ្មែរច្រើនជឿលើមនុស្សសំគាល់ថាអ្នកនេះល្អ អ្នកនោះអាក្រក់ ក៏ប៉ុន្តែមនុស្សល្អជាច្រើនបានក្លាយទៅជាមហាមគ្គុទេស ចាប់ផ្តើមជំនឿអ្នកដទៃយ៉ាងជ្រាលជ្រៅហួតដល់មានគ្រោះ កំណាចធំៗធ្លាក់មកដល់គ្នាទៀតផង ទាំងនេះបានក្លាយជាភាសិតថា"ឲ្យតែខ្មែរជឿក្រង់ណា ការអស់សង្ឃឹមនៅត្រង់នោះ"។ គេច្រើនយក ការគិតស្រួលមកប្រើ ដូចជាទីពឹងទៅលើកគ្គាមនុស្សជាជាងការគិតត្រូវ ដែលយកកគ្គាគំនិតមកប្រើ...នៅពេលមនុស្សម្នាក់សន្យាថា "បោះឆ្នោតឲ្យខ្ញុំ ប្រទេសខ្មែរនឹងមានប្រជាធិបតេយ្យ"ដល់ជាប់ឆ្នោតហើយគ្មានអ្វីប្រែប្រួល អ្នកប្រើកគ្គាមនុស្សនិយាយថា "រឿងជាតិវាធំធេងពុំអាចប្រែប្រួលបានភ្លាមៗទេ" គឺជាការអត់ឱនលើកគ្គាមនុស្សមួយ រីឯអ្នកគំនិតនិយមគេថា "អ្នកសន្យានោះបាននិយាយភរគេ"។ ការប្រើកគ្គាពីរខុសគ្នានេះ វានឹងនាំឲ្យមានប្រតិកម្មខុសគ្នាពីសហគមន៍ ហើយនឹងមានអ្នកខាតប្រយោជន៍ និងអស់ជំនឿលើមនុស្ស ព្រមទាំងអ្នក ឆ្លៀតយកចំណេញរឹតតែកើនធំឡើង ។

ទប់ស្កាត់នឹងការបាត់បង់ជំនឿនេះ អ្នកសារព័ត៌មាន ត្រូវបង្ហាញការប្តូរផ្តាច់នឹងការផ្សាយព័ត៌មានពិត មានប្រភពច្រើនគាំទ្រ កាលណារកឃើញថាខុសហើយ ត្រូវប្រកាសសំដែងការសោកស្តាយថា "ខុស" ជូសជុលឲ្យមកត្រូវវិញ មិនបំភ្លៃការពិត មិនលាក់ការពិត ។ បន្ថែមពីលើនោះ អ្នកសារព័ត៌មានមិនសរសេរដើម្បីបុព្វហេតុនៃប្រយោជន៍ផ្ទាល់ខ្លួន មិនសរសេរនៅក្នុងបរិកាសគំរាមកំហែង មិនសរសេរ ដោយសារខ្លួនត្រូវបំពីភាគីណាមួយ បង្ខូមសេចក្តីទៅត្រូវបំបាត់រូបភាពនៃអ្នកសរសេរ កុំឲ្យអ្នកអានអាចមើលឃើញនៅក្នុងសេចក្តីនៃអត្ថ បទនោះ ។ ហើយជាបញ្ចប់ការសរសេរត្រូវប្រកបដោយការទទួលខុសត្រូវចំពោះអ្វីដែលអាចបណ្តាលឲ្យមានការគ្រោះថ្នាក់ ឲ្យខូច ប្រយោជន៍ ក៏បំផ្លាញលទ្ធភាពល្អណាមួយ ។

"ខ្មែរប៉ុស្តិ៍" មានជំនឿថា ទទួលព័ត៌មានពិតសហគមន៍អាចនឹងមានការគិតត្រូវ ហើយផ្លាស់ប្តូរទស្សនៈបាន ។ ព័ត៌មានដែលយើង និយាយថា គេនឹងប្រើវានៅពេលដែលវាផ្តល់ប្រយោជន៍ដល់អ្នកប្រើនោះ វាជាការពិត ក៏ប៉ុន្តែមានតែទំនាក់ទំនងជាមួយព័ត៌មានតែប៉ុណ្ណោះ ដែលទទួលផលវិជ្ជមានបិតបេរបាន ។ បើសហគមន៍ខ្មែរយើង មិនត្រឹមតែទទួលព័ត៌មានពិតតែប៉ុណ្ណោះទេ តែថែមទាំងស្រលាញ់ការពិត ភាពបរិសុទ្ធគ្រប់គ្នា ជំនឿ និងការទុកចិត្ត នឹងកើតឡើងវិញ ។/

ខ្មែរប៉ុស្តិ៍

# រន្ទះបាញ់ចំម៉ាស៊ីនពិតជាធ្វើឲ្យយន្តហោះដឹកឥវ៉ាន់ធ្លាក់មុនមកដល់គោលដៅ ?

យន្តហោះធ្លាក់ជាលើក ទីពីរនៅកម្ពុជា

ការធ្លាក់យន្តហោះជាលើកទីពីរនៅកម្ពុជា ក្នុងឆ្នាំនេះ ត្រូវក្រុមអាកាសយាននិកអះអាងថា បណ្តាលមកពីរន្ទះបាញ់ ។ តែមន្ត្រីនៃ រដ្ឋលេខាធិការដ្ឋានអាកាសចរណ៍ស៊ីវិលអះអាងថា ការស៊ើបអង្កេតកំពុងបន្តធ្វើនៅឡើយទេ ខណៈដែលប្រអប់ខ្មៅត្រូវបានរកឃើញនិងត្រូវ បានបញ្ជូនទៅធ្វើការស្រាវជ្រាវរកមូលហេតុ។ ចំណែកមន្ត្រីឧតុនិយមវិញយល់ថា មូលហេតុដែលថា រន្ទះបាញ់មួយនេះមិនសូវឡូហ្សិកទេ។

វាជាហេតុការណ៍ដំរន្ទត់ផ្ទួនៗគ្នា ដែលមិនបានប៉ុន្មានខែផង ក៏មានការធ្លាក់យន្តហោះជាថ្មីទៀតនៅស្រុកខ្មែរ តែយ៉ាងណាការធ្លាក់ យន្តហោះពីយប់ថ្ងៃ ១៧ តុលា ២០០៧ នៅចម្ងាយ២០គីឡូម៉ែត្រ ខាងត្បូងភ្នំពេញ នៅក្នុងភូមិតាកុច ឃុំដើមឫស ស្រុកណ្តាលស្ទឹង ខេត្ត កណ្តាល លើកនេះជាសំណាងដែរព្រោះជាប្រភេទយន្តហោះ AN-12 ផលិតនៅរុស្ស៊ី របស់ក្រុមហ៊ុន IMTREC ផ្ទុកឥវ៉ាន់ទម្ងន់ប្រមាណជា ១១ តោន ជាទំនិញផលិតនៅរោងចក្រសាប្រីណា ពុំមានមនុស្សជិះជាមួយច្រើន និងមានរបួសបាក់ជើងយាននិកម្នាក់ និងអ្នកជិះជា ម្ចាស់ទំនិញជាតិចិនម្នាក់ប៉ុណ្ណោះ ពីក្នុងចំណោមអ្នកជិះ៥នាក់ដែលមានយាននិក៤នាក់ សញ្ជាតិអ៊ូបេគីស្តង់។ អ្នករបួសបានដឹកមកសង្គ្រោះ នៅមន្ទីរពេទ្យកាល់ម៉ែតក្រុងភ្នំពេញ ។

តាមសេចក្តីរាយការណ៍ បន្តបន្ទាប់អំពីការធ្លាក់យន្តនោះថា យន្តហោះបានដឹងកាតុងខោអាវទម្ងន់ ១១តោននោះ ចេញពីភ្នំពេញ ក្នុងគោលដៅឆ្ពោះទៅកាន់ប្រទេសសិង្ហបុរី ។ ប៉ុន្តែ បន្ទាប់ពីបានហោះ

(តទៅទំព័រ 23)

# លិខិតឆ្លើយតបមិត្តអ្នកអាន


លិខិតអ្នកអាន

ក្នុងនាមកាសែតខ្មែរប៉ុស្តិ៍ យើងសូមអរគុណចំពោះមិត្តអ្នកអានឈ្មោះ ម៉ម យ៉ិន ដែលបានផ្ញើលិខិតមកកាន់ការិយាល័យយើង ក្នុងបំណងចាប់អារម្មណ៍ និងកោតសរសើរ និងការជំរុញឲ្យកាសែតខ្មែរប៉ុស្តិ៍ប្រឹងប្រែងបេសកកម្មរបស់ខ្លួន ដើម្បីតម្កល់នូវប្រយោជន៍ ជួយអភិវឌ្ឍន៍សង្គមជាតិតាមអំណាចសារព័ត៌មានដែលឈរលើគោលការណ៍នៃក្រមសីលធម៌ជាវិជ្ជាជីវៈ ។

ខ្មែរប៉ុស្តិ៍ នឹងធ្វើការជាមួយមិត្តអ្នកអានក្នុងការទទួលនូវព័ត៌មានយោបល់, ការរិះគន់ស្ថាបនានូវអ្វីជាកត្តាពិតនៃព័ត៌មាន ប្រយោជន៍ដើម្បីសិក្សាស្រាវជ្រាវពីអ្វីជាគុណប្រយោជន៍ប្រកបដោយសីលធម៌ គុណធម៌ សំរាប់យើងទាំងអស់គ្នា ពោលគឺសហគមន៍ ខ្មែរនៃយើង ។

ខ្មែរប៉ុស្តិ៍ សូមឆ្លើយតបនូវសំណួរទាំង៥ របស់មិត្តអ្នកអាន ម៉ម យ៉ិន ។

សំណួរទី១ ៖ សួរថា តើកាសែតខ្មែរប៉ុស្តិ៍ជា សារព័ត៌មានឯករាជ្យ ឬជាសារព័ត៌មានប្រភេទណា ?

-ចម្លើយទី១ ៖ កាសែតខ្មែរប៉ុស្តិ៍ ជាកាសែតឯករាជ្យ ឈរលើគោលការណ៍នៃក្រមសីលធម៌ជាវិជ្ជាជីវៈសារព័ត៌មាន ដែល និយាយនូវអ្វីដែលបង្ហាញឡើងលើទំព័រកាសែតជាការពិត មិនបំពីលើគោលការណ៍អគតិ៤យ៉ាងដែលចែងថា ឆន្ទាគតិ គឺការលំអៀងព្រោះស្រលាញ់, ទោសាគតិ ការលំអៀងព្រោះសេចក្តីស្អប់, ភយាគតិ ការលំអៀង ព្រោះសេចក្តីខ្លាច, មោហាគតិ ការ លំអៀងព្រោះសេចក្តីល្ងង់ ។ ដូច្នេះអគតិទាំង៤នេះ ខ្មែរប៉ុស្តិ៍មិនអាចដើរតាមគន្លងមួយណាបានឡើយ ។

-សំណួរទី២ ៖ តើសារព័ត៌មានខ្មែរប៉ុស្តិ៍ចេញផ្សាយដោយឥតគិតថ្លៃ ឬបើសិនជាគិតថ្លៃ តម្លៃ១ច្បាប់ប៉ុន្មាន ?

-ចម្លើយទី២ ៖ កាសែតខ្មែរប៉ុស្តិ៍ចេញផ្សាយដោយឥតគិតថ្លៃ ចំពោះអ្នកអានក្នុងសហគមន៍ខ្មែរ ដែលកាសែតមួយនេះកំពុង ចរាចរនោះ លោកអ្នកអាចស្នើសុំឲ្យកាសែតខ្មែរប៉ុស្តិ៍ផ្ញើជូន ទៅដល់លំនៅដ្ឋានអស់លោកអ្នកបាន ដោយគ្រាន់តែចុះឈ្មោះជាសមាជិក គាំទ្រថវិកាដល់ខ្មែរប៉ុស្តិ៍បន្តិចបន្តួចសំរាប់ការចំណាយផ្ញើជូន តែប៉ុណ្ណោះជាប្រចាំ១ខែ, ៣ខែ ឬ១ឆ្នាំម្តង តាមតម្រូវការចង់បានរបស់ លោកអ្នក ។

-សំណួរទី៣ ៖ តើសារព័ត៌មានត្រូវការ ឬទទួលអត្ថបទស្តីពីព្រឹត្តិការណ៍ពិតៗ ដែលជនជាតិខ្មែររាប់ច្រើនលាននាក់បានជួប ប្រទះនៅក្នុងជីវិតរបស់ខ្លួន ដែលជាសោកនាដកម្មមួយ សឹងតែធ្វើឲ្យបណ្តាជនខ្លះជឿពុំបាន មិនតែប៉ុណ្ណោះ ព្រឹត្តិការណ៍ទាំងនោះធ្វើឲ្យ ប៉ះពាល់ដល់អាយុជីវិតប្រទេសជាតិ មាតុភូមិ មានន័យថា ធ្វើឲ្យប្រទេសជាតិមាតុភូមិ ត្រូវធ្លាក់ក្នុងមហន្តរាយប្រៀបដូចដើមឈើធំ មួយដើមបានត្រូវដើមពោធិ៍ជ្រៃដុះរួមរឹតពីលើបន្តិចម្តងៗ មិនយូរប៉ុន្មានដើមឈើនោះត្រូវដើមជ្រៃចាក់ឫសរុំជិតអស់ ហើយបាត់រូបរាង ទៅអស់រលីង ? ។

-ចម្លើយទី៣ ៖ ខ្មែរប៉ុស្តិ៍រីករាយចំពោះមិត្តអ្នកអានដែលមានបំណងចង់បង្ហាញស្នាដៃ ជាអត្ថបទព័ត៌មាន ឬទស្សនៈ និងជា ឯកសារអ្វីនោះ យើងនឹងទទួលចុះផ្សាយ ប៉ុន្តែត្រូវឈរលើគោលការណ៍ពិត មានភស្តុតាងនៃការសរសេរ ពោលគឺប្រភពត្រូវមាន តុល្យភាព Check and Balance ឬសេចក្តីសម្រេចត្រឹមត្រូវ Fair Decision ការរួមគំនិតផ្តល់នូវបញ្ញាញាណច្រើនគ្នា គឺជាការល្អដើម្បីតម្កល់ផលប្រយោជន៍រួមនៃសហគមន៍ខ្មែរយើង ។

-សំណួរទី៤ ៖ តើអត្ថបទមានលក្ខណៈដូចម្តេចខ្លះ ដែលអាចចុះផ្សាយនៅក្នុងសារព័ត៌មាន? ឧទាហរណ៍ ៖ អត្ថបទសិក្សាស្តីពី ប្រវត្តិសាស្ត្រនយោបាយ សំរាប់ជួយទ្រទ្រង់ថែរក្សាការពារប្រទេសជាតិ មាតុភូមិ និងពូជសាសន៍ខ្មែរឲ្យបានគង់វង្ស ស្ថិតស្ថេរជារៀង រហូតតទៅជាដើម ។

-ចម្លើយទី៤ ៖ ខ្មែរប៉ុស្តិ៍មិនរុញរាក្នុងការចុះផ្សាយទេ ក្រោមការត្រួតពិនិត្យពីក្រុមគណៈកម្មការ និងចាងហ្វាងការផ្សាយថា តើអត្ថបទណាមួយដែលគួរ ឬមិនគួរចុះផ្សាយ ក្នុងន័យនេះមិនមែនចង់បង្ហាញថា ខ្មែរប៉ុស្តិ៍ខ្លាចប្រឈមមុខនឹងស្ថានការណ៍ ឬសំពាធពី អំណាចឥទ្ធិពលបុគ្គលបក្សពួក ឬនិន្នាការនយោបាយណាមួយឡើយ ក្នុងនាមជាអ្នកកាសែតឯករាជ្យ ឈរលើគោលការណ៍ច្បាស់លាស់ នោះ ។ អ្វីដែលយើងចង់និយាយ គឺថាតើអត្ថបទទាំងនោះដែលមិត្តអ្នកអានផ្ញើមកជាសារព័ត៌មានពិត ឬជាឯកសារច្បាស់លាស់ ដើម្បីកុំឲ្យធ្លាក់ចូលទៅក្នុងផ្លូវអគតិ៤យ៉ាង ដែលបានបង្ហាញក្នុងចម្លើយទី១នោះ ។ ដោយយើងត្រូវការសិក្សាស្រាវជ្រាវបន្ថែម ឬស្វះស្វែង រកប្រភពឲ្យមានតុល្យភាពដំណឹង ។

-សំណួរទី៥៖ បើសិនជាទទួលបាន តើអត្ថបទធម្មតា ឬកំណាព្យត្រូវមានកំណត់ចំនួនប៉ុន្មានទំព័រសៀវភៅ ដែលអាចចុះផ្សាយ បានម្តងៗ ?

-ចម្លើយទី៥ ៖ ខ្មែរប៉ុស្តិ៍ មិនអាចកំណត់នៃទំព័រថា ប៉ុន្មានទំព័រសំរាប់អត្ថបទមិត្តអ្នកអានបានទេ ? ពោលគឺធ្វើទៅបានក្នុងការ ចុះផ្សាយ វាអាស្រ័យទៅលើអត្ថន័យអត្ថបទនិងការសម្រេចពីចាងហ្វាងការផ្សាយ ។

ចុងបញ្ចប់នៃវាចាឆ្លើយតបរបស់ខ្មែរប៉ុស្តិ៍ សូមថ្លែងអំណរគុណមិត្តអ្នកអានឈ្មោះ ម៉ម យ៉ិន ដែលចាប់អារម្មណ៍ជាមួយយើង ដោយសង្ឃឹមថាការចេញផ្សាយ របស់កាសែតខ្មែរប៉ុស្តិ៍ លេខក្រោយៗប្រាកដនឹងមានអត្ថបទ ឬទស្សនៈរបស់លោកអ្នក ជូនចំពោះមិត្ត អ្នកអានយើងនូវអ្វីជាគុណប្រយោជន៍សំរាប់សហគមន៍ខ្មែរយើង ។ ខ្មែរប៉ុស្តិ៍សូមជូនពរឲ្យលោក ម៉ម យ៉ិន មានសុខភាពល្អ អាយុយឺនយូរ ប្រាជ្ញា ស្មារតីវាងវៃជានិច្ចនិរន្តរ៍ ។/

*បំណងល្អពី ខ្មែរប៉ុស្តិ៍*

# លិខិតឆ្លើយតបមិត្តអ្នកអាន

## មានឈ្មោះនៅក្នុងកាសែត


លោក ផាំង សុង

ខ្ញុំភ្ញាក់ខ្លួនព្រើត ត្រេកអរខ្លាំងណាស់ដោយក្រឡេកឃើញរូបថតខ្លួនឯង ដែលសារព័ត៌មានខ្មែរប៉ុស្តិ៍បានបោះពុម្ពផ្សាយជាមួយ អត្ថបទមួយនៅលើទំព័រមុខស្តីអំពីការខិតខំបំរើជាតិរបស់ខ្ញុំ ។ អរណាស់ ពីព្រោះខ្ញុំមានឈ្មោះនៅក្នុងកាសែតវិញហើយ! ។

ខ្ញុំបានអានអត្ថបទនេះ ដោយរីករាយ ហើយខ្ញុំសូមថ្លែងអំណរគុណភ្លាមចំពោះអ្នកនិពន្ធ មាជ សុវណ្ណារ៉ា ដែលបានខិតខំផ្ទៀងផ្ទាត់ និពន្ធអត្ថបទនេះឡើង ប្រកបដោយសមានចិត្តយ៉ាងស្មោះស្ម័គ្រចំពោះរូបខ្ញុំ។

ក្រឡេកមួយភ្លែតទៅអត្ថបទនេះ ហាក់ដូចជាអាណិត អាសូរខ្ញុំខ្លាំងពេក ។ ដោយឃើញខ្ញុំចាស់ធុន្ទ ធុរា ដើរញើរញ៉ៅ តាមដងមហាវិថីអាណាហែម ទីក្រុងឡុងប៊ិច ដោយអស់សង្ឃឹមក្នុង ចិត្តឥតទិសដៅក្នុងស្មារតី ក្រោយពេលបានធ្លាក់ខ្លួនពីអ្នកនយោបាយខ្លាំងពូកែខ្មែរម្នាក់ មកជាអ្នកក្រខ្សត់ ដេកស៊ីប្រាក់បន្តក់ជាក់ទាន អាមេរិកាំង រកដីមួយបង្គីនៅស្រុកខ្មែរសំរាប់តាំងខ្លួនជា"ខ្មែរម្ចាស់ស្រុក"ជាមួយខ្មែរអ្នកស្នេហាជាតិឯទៀតពុំបាន ។

ប៉ុន្តែ ដោយសង្ខេបទៅ ការរៀបរាប់តិ-បិចំណុចរបស់អ្នកនិពន្ធ មាជ សុវណ្ណារ៉ា អំពីរូបខ្ញុំនេះ វាជាការពិតមែន ទោះបីមិនបាន លំអិតដល់ជម្រៅក្តី ។ ប៉ុន្តែខ្ញុំសូមបំភ្លឺចំណុចខ្លះ ជូនមិត្តអ្នកអាន ខ្ញុំបានមករស់នៅក្នុងឡុងប៊ិចនេះ ដើម្បីព្យាបាលជម្ងឺបានកើតឡើងជាមួយអាយុចាស់របស់ខ្ញុំ ។ ក្រោយពីបានចេញចូលមន្ទីរពេទ្យជាញឹកញយហើយ ខ្ញុំតែងធ្វើដំណើរ ដើរចុះឡើង នៅតាមដងវិថីនានា ដើម្បីហាត់ប្រាណឲ្យបានរឹងប៉ឹងឡើងវិញ ដូចលោកគ្រូពេទ្យលោកបានបង្គាប់ទុកមក ។ មិនមែនផ្សងព្រេងតាមផ្លូវដើររកសេចក្តីសង្ឃឹមទេ។ នៅពេលខ្លះខ្ញុំរីករាយជាខ្លាំងដោយខ្ញុំអាចឈប់សម្រាកតាមផ្លូវ សាកសួរសុខទុក្ខបងប្អូនខ្មែរកំពុងជជែកប្តូរយោបល់គ្នា អំពីរឿងស្រុកទេស និងរឿងរ៉ាវផ្ទាល់ខ្លួននានា ។ ខ្ញុំសប្បាយចិត្តណាស់ នៅពេលខ្ញុំបានស្តាប់ឮសម្លេងភាសាខ្មែរខ្លួនឯងដែលបងប្អូនខ្មែរ នោះនិយាយឡើង ទោះបីជារឿងអាក្រក់ក្តីរឿងល្អក្តី ។ ខ្ញុំស្រឡាញ់ភាសាខ្មែរ ខ្ញុំចូលចិត្តស្តាប់គេនិយាយខ្មែរ មិនមែនលួចស្តាប់រឿងសំងាត់ណាមួយ ដើម្បីយកទៅធ្វើរបាយការណ៍និយាយបំបែកបំបាក់ខ្មែរ ឲ្យបែកបក្សបែកពួករត់ទៅធ្វើបុណ្យវត្តផ្សេងទេ ។

បងប្អូនជាអ្នកអានគួរជ្រាបដែរថា ខ្ញុំបានជាប់ជំពាក់វាក់វិនជាមួយនយោបាយខ្មែរចំនួន៤០ឆ្នាំមកហើយ។

ខ្ញុំមិនអាចរស់នៅក្រៅរង្វង់ នយោបាយបានទេ ទោះបីខ្ញុំដើរត្រុកៗតាមដងផ្លូវ អាណាហែម នៅទីក្រុងឡុងប៊ិច ក្តី ឬនៅតាមដងវិថីមុនីវង្ស នៅទីក្រុងភ្នំពេញក្តី ។ យ៉ាងហោចណាស់ ខ្ញុំគោងប្រើវិធីណាមួយភ្ជាប់បញ្ហានយោបាយខ្មែរ ពិតប្រាកដខ្ញុំស្ថិតនៅក្នុងការរិភាគរបស់ខ្ញុំជានិច្ច ទោះបីខ្ញុំបានបញ្ចេញសកម្មភាពក្តី ឬមិនបានបញ្ចេញសមកម្មភាពក្តី ។

ពិតមែនតែមានពេលជាច្រើន ដែលខ្ញុំស្ថិតនៅក្នុងទីក្រុងអាមេរិកាំង ប៉ុន្តែ មូលដ្ឋាននយោបាយរបស់ខ្ញុំស្ថិតនៅក្នុងប្រទេសខ្មែរ ឯណោះទេ ។ រីឯមធ្យោបាយសំរាប់គាំទ្រនយោបាយរបស់ខ្ញុំ ក៏មានសព្វគ្រប់ហើយដែរ ។ ទោះបីខ្ញុំត្រូវគេដេញចេញពីមុខតំណែង ឬ ត្រូវគេប្រគល់កិត្តិយសឲ្យបំរើជាតិធំក្តីតូចក្តី ខ្ញុំនៅតែខិតខំជួយកម្ពុជាឲ្យមានច្បាប់សំរាប់រដ្ឋឲ្យបានរឹងប៉ឹង មានរូបភាពប្រសើរឡើងនៅ បរទេសដើម្បីជម្រុញឲ្យមានការគោរព និងការទុកចិត្តអន្តរជាតិ រីតចំណងឲ្យបានរឹងមាំថែមទៀត ជាមួយសហរដ្ឋអាមេរិក ក្នុងការ ជួយបណ្តុះបណ្តាលកម្ពុជាឲ្យមានការរីកចំរើនឡើង តាមរយៈជំនួយក្តី តាមរយៈវិនិយោគទុនក្តី ។

អស់លោកអ្នកអានគួរជ្រាបដែរថា ចំនួន ៥០ ឆ្នាំមុន នៅពេលដែលនិស្សិតខ្មែរកំពុងនាំគ្នាទៅរៀនភ្លក់ទឹកភ្លក់ដីនៅស្រុកបារាំង ឯណោះ ខ្ញុំបានរស់នៅបានសិក្សា បានបង្រៀន ដឹកនាំវិទ្យាល័យ និងមហាវិទ្យាល័យនៅសហរដ្ឋអាមេរិក បំរើការក្នុងបណ្តាប្រជាជន អាមេរិកាំង តាំងពីពេលសហរដ្ឋអាមេរិកកសាងផ្លូវលេខ ៤ ពីភ្នំពេញទៅកំពង់សោម ទុកជា ផ្លូវមិត្តភាពខ្មែរ-អាមេរិកាំង រហូតមក ម្ល៉េះ ។ ដើមឡើយ ខ្ញុំជាបុគ្គលិកខ្មែរ ដែលមានសញ្ញាប័ត្រមធ្យមសិក្សាខ្មែរ-បារាំង និងសញ្ញាប័ត្រឧត្តមសិក្សាភាសាអង់គ្លេស តែម្នាក់ គត់ដែលបំរើការនៅក្នុងស្ថានទូតអាមេរិកាំង ។ ដូច្នេះហើយ គេអាចនិយាយថា៖ ទឹកដីអាមេរិក ទោះបីនៅទីក្រុងឡុងប៊ិចនេះ ឬនៅ ទីក្រុងណាផ្សេងទៀត ក្នុងសហរដ្ឋអាមេរិក ក៏ជាទឹកដីរបស់ខ្ញុំដែរ ។ រីឯថវិកាសម្រាប់ឧបត្ថម្ភការរស់នៅរបស់ខ្ញុំសព្វថ្ងៃ គឺបានមក ពីប្រាក់រ៉ឺត្រែតបន្តិចបន្តួច ដែលបានសន្សំទុកពីបៀវត្សរ៍របស់ខ្ញុំ នៅពេលខ្ញុំបានបំរើការងារនៅសហរដ្ឋអាមេរិកអស់ជាច្រើនឆ្នាំ ។

ដោយរក្សាគំនិតទឹកដីខ្មែរផង អាមេរិកផង នេះហើយបានជាខ្ញុំមានកម្លាំងកំហែង ពុះពារឧបសគ្គនានា លើកយករឿងកាប់សម្លាប់ បំផុតពូជខ្មែរ មកផ្សព្វផ្សាយបានពាសពេញសហរដ្ឋអាមេរិក និងនៅអង្គការសហប្រជាជាតិថែមទៀត ។ ជាពិសេស ខ្ញុំនិងមិត្តភ័ក្តិមួយ ក្រុមតូចបានរៀបចំកម្មវិធី ឡប៊ី ដ៏សាហាវមួយ ដើម្បីជួយយកអាសារជនភៀសខ្លួនយើងជាច្រើនម៉ឺននាក់ទៀត ដែលបានរត់ចេញរួច ចូលមកដល់ជំរំនៅប្រទេសក្រៅ មានប្រទេសថៃជាដើមឲ្យចូលមកតាំងទីលំនៅក្នុងសហរដ្ឋអាមេរិកតទៅ ដូចជនអ្នករដ្ឋការធំៗ និង នាយទាហានជាន់ខ្ពស់ចំនួន ៧ ពាន់នាក់ ដែលបានចេញរួចមួយក្រុមធំមុន ។

ខ្ញុំសូមអរគុណសារព័ត៌មាន ខ្មែរប៉ុស្តិ៍ ដែលបាននឹកឃើញដល់គំរោងការរបស់ខ្ញុំ ដែលសម្រួលយកជនភៀសខ្លួនខ្មែរយើងចំនួន ២៤ ម៉ឺននាក់ មកកាន់សហរដ្ឋអាមេរិក ចាប់ពីឆ្នាំ ១៩៧៩ មក ។ បើអស់លោកអ្នកអានចង់ជ្រាបច្បាស់អំពីកម្មវិធីនេះ ទុកជាតំរុតទៅ ខ្ញុំនឹងរៀបរាប់យ៉ាងលំអិតជូនបាន នៅពេលជួបជាមួយខ្ញុំផ្ទាល់ក្តី ឬនៅពេលប្រជុំ-សិក្សា ដែលអស់លោកអាចរៀបចំឡើងនៅពេលណា មួយក្តី ។/

ចប់

# សភាពាណិជ្ជកម្មក្រុងខ្មែរធ្វើអ្វីខ្លះ?




*(ក្រុងខ្មែរ Long Beach) ដោយ ៖ មាជ សុវណ្ណារ៉ា*

ថ្នាក់ដឹកនាំរបស់សភាពាណិជ្ជកម្ម ខ្មែរ-អាមេរិកាំង ដែលបានជាប់ឆ្នោតកាលពីខែតុលានេះ បានអះអាងថា ស្ថាប័នខ្លួនបានធ្វើ ការងារជាបណ្ដើរៗមកហើយដែរ ដើម្បីជួយសហគមន៍ខ្មែររហូតគាំទ្រទាំងស្រុងឲ្យកើតមានតំបន់សេដ្ឋកិច្ចក្រុងខ្មែរលេចធ្លោឡើង ។ នៅ ខណៈដែលមានការរិះគន់ និងវាយប្រហារនូវមតិជាច្រើនបាននិយាយថា ស្ថាប័នសភាពាណិជ្ជកម្មខ្មែរ-

*(តទៅទំព័រ 18 ច)*

# ក្រុងខ្មែរមានអ្វីប្លែក!




ដោយ៖ មាជ សុវណ្ណារ៉ា

*(តទៅទំព័រ 20 ង)*

# សូភី៖ ចៅកែម៉ែធម៌ក្រមុំ...ចុងភៅចំណាន

*ដោយ៖ មាស សុវណ្ណរិទ្ធិ*




"បើទោះបីជីវិតខ្ញុំមិនបានដើរតាមគន្លងឪពុកដែលជាអ្នកនយោបាយដឹងចាស់តាំងពីសម័យខ្មែរឥស្សរៈបារាំងចូលស្រុក រហូតមក ដល់បច្ចុប្បន្នក៏ដោយ ប៉ុន្តែការជួយកសាងមាតុភូមិ និងក្ដីអាណិតអាសូរមាននៅក្នុងចិត្តខ្ញុំជានិច្ច"។

នេះជាសំដីរបស់ម្ដាយធម៌ក្រមុំ កូន៥នាក់ កញ្ញា យុគ សូភី ថ្លែងឲ្យខ្មែរប៉ុស្តិ៍យើងដឹងថា នាងបានឃ្លាតចាកចោលស្រុកកំណើត តាំងពីឆ្នាំ១៩៧៦ ដែលកាលនោះកញ្ញាមានអាយុ៩ឆ្នាំ ជាមួយឪពុកម្ដាយមករស់នៅសហរដ្ឋអាមេរិក ។ ដែលការឃ្លាតចំណាកស្រុកនេះ ធ្វើឲ្យកញ្ញានឹកស្រមៃថា ថ្ងៃណាមួយការខិតខំរៀនសូត្រ របស់នាងបានសម្រេចបញ្ចប់ថ្នាក់បរិញ្ញាប័ត្រ និងប្រឹងប្រែងរកស៊ីឲ្យមានបាន ដើម្បីមានប្រាក់ទៅជួយស្រុកកំណើតខ្លួន ពិសេសក្មេងកំព្រា ដូចដែលឪពុកនាងបានជួយស្រុកទេសគ្រប់បែបយ៉ាង ក្នុងនាមជាអ្នកនយោបាយតំរូម្នាក់ដែលបានលះបង់ស្ទើរតែមិនគិតខ្លួនឯង ។

យុគ សូភី ដែលត្រូវបានគេស្គាល់ថា ជាចៅកែភោជនីយដ្ឋាន សូភី (Sophy's Thai-Cambodian Cuisine) នៅផ្លូវ Anaheim ក្រុងខ្មែរ Long Beach និយាយថា ជីវិតនាងសម្រេចបំណងដូចការស្រមៃ ពីអតីតកាលហើយ ដែលសព្វថ្ងៃនាងចិញ្ចឹមក្មេងកំព្រា ៥ នាក់ ដែលឪពុកម្ដាយពួកគេបានស្លាប់ដោយជម្ងឺអេដស៍តាំងពីឆ្នាំ២០០៣ ។ ក្នុងនាមជាម្ដាយចិត្តធម៌ នាងត្រូវមើលបីបាច់ថែរក្សាពួកគេដោយផ្ញើលុយកាក់ទៅចិញ្ចឹមពួកគេ ជារៀងរាល់ខែនៅឯកម្ពុជា និងរួមការជួយកសាងស្រុកទេសដោយខ្លួនចុះទៅផ្ទាល់ ឬតាមរយៈឪពុក នាងផងនោះ ។

សូភី និទានបន្តថា តាមរយៈរបររកស៊ីរបស់នាងជាម្ចាស់ភោជនីយដ្ឋាន បានធ្វើឲ្យនាងមានលទ្ធភាពច្រើនក្នុងការជួយអភិវឌ្ឍន៍សង្គមជាតិ មិនថាសហគមន៍ខ្មែរ Long Beach ឬបងប្អូនខ្មែរយើងនៅកម្ពុជា ។ នឹងអ្វីដែលលើស

*(តទៅទំព័រ 20 ឃ)*

# ផ្សារ យុនហេង និងជនជាតិថៃ




Long Beach *ដោយ៖ មាជ សុវណ្ណារ៉ា* ផ្សារខ្មែរ យុន ហេង នៅតាមផ្លូវ Anaheim

*(តមកពីទំព័រ ២៤ ង)*


រចនាសម្ព័ន្ធសារព័ត៌មាន ខ្មែរប៉ុស្តិ៍

- ប្រធានក្រុមប្រឹក្សាភិបាលៈ លោក ពិន សំខុន
- នាយកគ្រប់គ្រងៈ លោក មាជ សុវណ្ណារ៉ា
- និពន្ធនាយកៈ លោក គុជ សុជាតិ
- និពន្ធនាយករងៈ លោក សួន សិលា
- ប្រធានក្រុមបច្ចេកទេសកុំព្យូទ័រៈ លោក ហេង ប៊ុនឡេង
- អ្នកយកការណ៍និងថតរូបៈ លោក ឯល វ៉ាន់ថា

អ្នកគ្រប់គ្រងផ្នែកផ្សាយ និង ពាណិជ្ជកម្ម

- លោក ឯល វ៉ាន់ថា (562) 739-5928 (Long Beach)
- កញ្ញា ថាច់ សុបិន្ត (267) 253-3947 (Philadelphia)

ទីស្នាក់ការសារព័ត៌មាននៅ Long Beach

The Khmer Post
SOVANNARA MEACH
1129 Gardenia Ave.
Long Beach, CA 90813
ទូរស័ព្ទ៖ (562) 313-2129
Sovannara@TheKhmerPost.com

សាខាការិយាល័យសារព័ត៌មាននៅ Philadelphia

The Khmer Post
ROGER SAMKHON PIN
5730 Rising Sun Ave.
Philadelphia, PA 19120
ទូរស័ព្ទ៖ (215) 712-2226 or (267) 254-8758
SamkhonPin@TheKhmerPost.com

## នាទីព្រះពុទ្ធសាសនា

# ថ្ងៃដែលអ្នកកាន់សាសនាចម្រុះមកគាំទ្រព្រះពុទ្ធសាសនា



ដោយ ៖ ពិន សំខុន

**Philadelphia**

"នៅវិហារកាតូលិកដ៏ធំនៅកណ្តាលក្រុងហ្វីឡាដែលហ្វីយ៉ា ក្រុមជំនុំមួយបានត្រូវរៀបចំឡើងសំរាប់ទទួលគ្រូបង្ហាត់វិបស្សនា មកពីច្រើនតំបន់នាឆ្នេរខាងកើត ស.រ.អា កាលពីថ្ងៃទី៦ និងទី៧ ខែតុលា ឆ្នាំ២០០៧នេះ ។ មនុស្សម្នាដែលមកចូលប្រជុំ មានសញ្ជាតិឥណ្ឌា, ចិន, អាមេរិកាំងស អាមេរិកាំងខ្មៅ, មិចស៊ិកាំង និងខ្មែរផងដែរ ទាំងអស់មានប្រមាណ៣០នាក់ ហើយមិនកាន់សាសនាដូចគ្នាទេ ក្នុងនោះមាន អ្នកកាន់សាសនាហិណ្ឌូ, សាសនាកាតូលិក, សាសនាព្រះពុទ្ធមហាយាន និងសាសនាព្រះពុទ្ធថេរវាទ ។ ក៏ប៉ុន្តែភាពចម្លែកមួយដែល មិនដែលប្រទះ គឺមនុស្សមួយភាគធំសុទ្ធសឹងជាបញ្ញវ័ន្ត វិទ្យាសាស្ត្រ ទស្សនវិទូធំៗ នាំគ្នាប្រកាន់ភ្ជាប់នូវបច្ចេកវិជ្ជា បង្រៀនដោយព្រះពុទ្ធ សមណគោត្តម ហើយពិភាក្សាគ្នាអំពីការពង្រីកព្រះពុទ្ធសាសនាឲ្យ បានរីកសុះសាយកាន់តែប្រសើរឡើង ។ អ្នកទាំងនោះក្នុងរូបភាពដ៏សាមញ្ញបំផុត សុទ្ធសឹងតែបានដឹកនាំសិស្សវិបស្សនាច្រើនរយនាក់ ហើយបានច្រើនដងតែរៀងៗខ្លួន ។ ហេតុអ្វីក៏អ្នកកាន់សាសនាផ្សេងបែរជាមានជំនឿមកលើការណែនាំរបស់ ព្រះពុទ្ធទាំងមិនចោលសាសនាដើម របស់ខ្លួនយ៉ាងដូច្នេះ ? ។

នៅវិហារកាតូលិក ផ្លូវឆេសណុត នាថ្ងៃទី៦ និងទី៧ ខែតុលានោះ បើគេតាមពិនិត្យការរៀបចំឲ្យបានជិត គេឃើញថាពិតជាពុំមែនកិច្ចប្រជុំដែលមានមនុស្សមក អង្គុយផដែកគ្នាដូចធម្មតានោះទេ គឺជាវិធីដែលត្រូវធ្វើមិនឲ្យខុសពីវិន័យរបស់ព្រះធម៌ ហើយឲ្យត្រូវនឹង សទ្ធារបស់មនុស្សថែមទៀត ។ ដេប៊ី DEBBIE ជាស្ត្រីជាតិអាមេរិកាំង ជាប្រធានក្រុមវិបស្សនាប្រចាំហ្វីឡាដែលហ្វីយ៉ា និង ធីម អនុប្រធានជាបុរសខ្មែរ បានរៀបចំទទួលបដិសណ្ឋារកិច្ចជាមួយនឹងសមាជិកនៃសហគមន៍ តាមកម្មវិធីដែលជាពិធីការមានលក្ខណៈច្បាស់លាស់តាំងតែពីការទទួលភោជនាហារ ក៏មានពិធីការ មានអ្នកស្ម័គ្រចិត្តធ្វើម្ហូបប្រណីតដូចគ្នា នឹងចង្ហាន់ប្រគេនលោកដូច្នោះដែរ ។ កិច្ចប្រជុំ ក៏រឹតតែពិធីការតឹងរឹងថែមទៀត គឺមុននឹងផ្តើមពិភាក្សា គេសម្រេចនាំគ្នាស្តាប់ព្រះធម៌ដ៏ខ្លីមួយ សម្តែងដោយគ្រូធំបង្អស់នៃវិបស្សនា គឺ លោកគ្រូ "គោអិនកា" ហើយអង្គុយភាវនាយ៉ាងស្ងាត់ស្ងៀមចំនួន១ម៉ោង បន្ទាប់មកគេលើករឿងយ៉ាងច្រើនមកពិគ្រោះគ្នា ជាពិសេស គេគ្រោងបង្កើតកន្លែងអង្គុយធម៌ (ពាក្យសំដៅរកវិបស្សនា) ការកែទម្រង់សម្រួលកិច្ចការប្រតិបត្តិមួយចំនួន ដែលការពិគ្រោះគ្នាស្ថិតក្នុង សភាពស្ងប់ត្រជាក់ ការផ្តល់ប្តូរយោបល់ក៏បានផលគួរឲ្យរីករាយ ។ អ្នកដែល ចូលប្រជុំដំបូង តែងមានអារម្មណ៍អង្គុយក្នុងចំណោមព្រះ អរហន្ត ហើយប្រជុំជាសង្ឃវិច្ឆរៈ ដែលក្នុងនោះមានសុទ្ធតែអ្នកប្រាជ្ញជាព្រះសង្ឃជាន់ខ្ពស់ចូលរួម ។ គេអាចនិយាយយ៉ាងនេះបានថា គឺ ច្បាស់ជាកិច្ចប្រជុំរបស់ក្រុមសង្ឃ តែពួកគេគ្រាន់តែពុំស្លៀកចីវរតែប៉ុណ្ណោះ ។

ហ្វីឡាដែលហ្វីយ៉ា នេះ ជាតំបន់ដែលសំបូរជនជាតិអាស៊ី ជាពិសេសខ្មែរដែលបានប្រតិបត្តិបច្ចេកវិជ្ជាវិបស្សនានេះច្រើនជាងគេ នាច្រាយខាងកើតនៃសហរដ្ឋអាមេរិក ក៏ប៉ុន្តែពុំទាន់មានមជ្ឈមណ្ឌលរបស់ខ្លួននូវឡើយទេ ។ អ្នកដែលចង់អង្គុយភាវនាក្នុងបរិយាកាសស្ងប់ ស្ងាត់ម្តងម្កាល តែងនាំគ្នាទៅប្រតិបត្តិពិធីនេះនៅវត្តខាងជើងនៅផ្លូវ Rising Sun Ave. ឬទៅវត្តខ្មែរនៅ New Jersey វត្តឯទៀតៗពុំទាន់បានលើកទឹកចិត្តឲ្យធ្វើពិធីនេះនៅឡើយទេ។ ចំពោះអ្នកដែលចង់បំពេញកិច្ចឲ្យបានពេញលេញចំពោះព្រះធម៌នេះចំនួន១០ថ្ងៃ ឬលើសពី នេះ គេត្រូវទៅចុះឈ្មោះនៅមជ្ឈមណ្ឌលដ៏ធំមួយនៅរដ្ឋ Massachusetts ដែលទទួលសិស្សរបស់វិបស្សនាម្តងបាន២០០នាក់ ។ ក្រៅពីនេះ គេអាចចុះឈ្មោះធ្វើវិបស្សនានៅតំបន់ខ្លះទៀត ដូចជានៅ Maryland ជាដើមបានដែរ ។ នៅមានពិធីអង្គុយភាវនាធម៌មួយរបៀបទៀតដែរ គឺចំពោះសិស្សណាដែលបាន "អង្គុយធម៌" ចំនួន១០ថ្ងៃយ៉ាងហោចណាស់បាន១ម្តង (មានឈ្មោះថាសិស្សចាស់)អាចទៅចូលរួមអង្គុយធម៌ ១ម៉ោង ៣ម៉ោង ឬ១ថ្ងៃ ឬ២ថ្ងៃបាន នៅផ្ទះសិស្សជាឯកជនខ្លះដែលគេរៀបចំទុកបន្ទប់មួយ ជាពិសេសសំរាប់សិស្សរបស់ព្រះធម៌មកអង្គុយឲ្យ បានទៀងទាត់១ដង ឬច្រើនដងក្នុងមួយអាទិត្យ ។ នៅហ្វីឡាដែលហ្វីយ៉ា នេះ មានមនុស្សសកម្មក្នុងការគាំទ្រវិបស្សនាច្រើននាក់ដែល សំខាន់ៗ គឺ មឹងអុន, ប្រពន្ធប្តី បូរី និងធីម, នាង ម៉ុន និងប្តី, លោក សារុំ និងភរិយាកល្យាណ, អ្នកស្រី ស៊ីម៉ន, លោក ផាត និងភរិយានាង សៀម, លោក គឹម កៀន ។ល។ អ្នកទាំងនេះជាក្បាលម៉ាស៊ីនយ៉ាងស្វាហាប់ ដឹកនាំចលនាវិបស្សនានេះដោយមិនចេះនឿយហត់ ថ្វីត្បិតតែ ម្នាក់ៗមានអាយុជិតដល់ ឬលើស៥០តែរៀងៗខ្លួនក៏ដោយ។ អ្នកទាំងនោះធ្លាប់បានឲ្យដឹងថា ពួកគាត់សុទ្ធតែធ្លាប់មានជម្ងឺ ជាប្រចាំដែល ម្នាក់ៗរង់ចាំតែមច្ចុរាជមកយកជីវិតតែប៉ុណ្ណោះ។ ក៏ប៉ុន្តែនៅពេលដែលបានទៅប្រតិបត្តិ វិបស្សនា ១០ថ្ងៃជាដំបូងរួចមក ជម្ងឺពុំដឹងរលត់បាត់ ទៅណាអស់ កម្លាំងក៏កើតមាន ប្រាជ្ញា និងស្មារតីក៏សម្បូរមកវិញដែរ ធ្វើឲ្យអ្នកទាំងអស់ចង់ត្រឡប់ទៅអង្គុយធម៌វិញ ឲ្យបានច្រើនដងថែមទៀត ។ ការសប្បាយនិងសេចក្តីស្ងប់ ចិត្តពុះពោរដោយសទ្ធា ហើយនឹងមានសុខភាពមានបរិបូណ៌ឡើងវិញ ដូច្នោះនាំឲ្យពួកគាត់មានការអរគុណចំពោះព្រះធម៌ របស់ព្រះពុទ្ធជាអនេកប្បការ ពួកគាត់បានរៀបគម្រោងទៅអង្គុយធម៌នៅកន្លែងដែលព្រះពុទ្ធបានប្រសូត្រ និងត្រាស់ដឹង ការនេះក៏ធ្វើបានសម្រេចថែមទៀត ។



ប្រមាណជា១០ឆ្នាំចុងក្រោយនេះ ជំនឿទៅលើវិបស្សនានេះ បានឆ្លងពីម្នាក់ទៅម្នាក់ គ្រហស្ថច្រើនម៉ឺន ច្រើនសែននាក់បានប្រារព្ធពិធីនេះ មិនថាជាតិសាសន៍ណានោះទេ ។ ខ្មែរច្រាយខាងកើតបានចាប់ដៃខ្មែរ ច្រាយខាងលិចបានយ៉ាង ងាយស្រួល ដោយសារអំណោយផលរបស់ព្រះធម៌នេះ ។ ព្រះគ្រូ ស័ង្គពោធិ ជាសង្ឃដំបូងបង្អស់ដែលបាននាំវិបស្សនា ចូលទៅកម្ពុជា ដោយ បង្កើតមជ្ឈមណ្ឌលមួយនៅកំពង់គរ ខេត្តកណ្តាល ឥឡូវនេះមានមជ្ឈមណ្ឌលមួយទៀតបានកើតឡើងនៅភ្នំទ្រុងមាន់ នៃខេត្តបាត់ដំបង ដឹកនាំដោយ លោកគ្រូជំនួយ សៅថាច់ ទៅពី ហ្វីឡាដែលហ្វីយ៉ា ស.ហ.អា ។

**តើនរណាជាអ្នកដឹកនាំចលនាវិបស្សនានេះ?**

គឺបុរសចំណាស់ម្នាក់ជាជនជាតិឥណ្ឌា មានកំណើតនៅប្រទេសភូមា គាត់ឈ្មោះ គោអិនកា Goenka គាត់ និងក្រុមគ្រួសារទាំង អស់ប្រកាន់សាសនា "ហិណ្ឌូ" ។

ហេតុអ្វីក៏លោក គោអិនកា មកដឹកនាំចលនាសាសនារបស់ព្រះពុទ្ធយ៉ាងដូច្នោះ? គឺចាប់ផ្តើមឡើងកាលពីគាត់នៅក្មេង គាត់រស់នៅក្នុងគ្រួសារឥណ្ឌាអ្នកមានកំពូលមួយ គាត់មានជម្ងឺជាប្រចាំ គឺឈឺក្បាលមិនចេះឈប់ ខ្មែរហៅថា ជម្ងឺប្រកាំង ។ លោក គោអិនកា បានធ្វើដំណើរទៅប្រទេសជាច្រើន មានតាំងពីអឺរ៉ុប, អាមេរិកដើម្បីព្យាបាលជម្ងឺប្រកាំងរបស់គាត់ តែអកុសលគ្មានពេទ្យណាមួយមើលជម្ងឺគាត់ជាសោះ ។ គាត់មានមិត្តម្នាក់ឈ្មោះ អ៊ូបាឃិន ជាព្រះសង្ឃចៅអធិការវត្តមួយនៅភូមា។ ព្រះសង្ឃនោះជាសាវកជំនាន់ក្រោយរបស់ព្រះពុទ្ធ គឺមុនពេលសុគត ព្រះសមណគោត្តមបានបញ្ជូនសាវក ដែលបានស្គាល់ព្រះធម៌ច្បាស់លាស់២អង្គឲ្យមករក្សាព្រះធម៌នៅប្រទេសភូមា កាលពី២៥០០ឆ្នាំមុន ។ ការរក្សាជំនាប់ខ្លួននេះបានធ្វើជាបន្តបន្ទាប់គ្នារហូតមកដល់ព្រះគ្រូចៅអធិការ អ៊ូបាឃិន នេះ ។ ព្រះគ្រូ អ៊ូបាឃិន បានសួរទៅមិត្តលោក គឺលោក គោអិនកា យ៉ាងនេះថា "តើញោម គួរសាកវិធីរបស់អាត្មាចំនួន១០ថ្ងៃនោះទេ បើគ្មានពេទ្យណាមើលជម្ងឺ ញោមជានៅឡើយនោះ?" លោក គោអិនកា ប្រញាប់តបថា "ទេៗ ខ្ញុំព្រះករុណាមិនសាកទេ ពីព្រោះខ្ញុំព្រះករុណា និងក្រុមគ្រួសារទាំងមូល កាន់សាសនាហិណ្ឌូ មិនអាចគោរពព្រះពុទ្ធបានទេ" ព្រះគ្រូ អ៊ូបាឃិន ក៏តបទៅវិញថា "ចុះអាត្មាមានឲ្យញោមប្តូរសាសនារបស់ញោមពី កាលណា? ញោមអាចធ្វើវិបស្សនាតាមអាត្មា តែ១០ថ្ងៃ ហើយបន្ទាប់ពីនោះចង់ត្រឡប់ទៅធ្វើអ្វី ក៏ធ្វើទៅ"។ លោក គោអិនកា យក ប្រយោគព្រះគ្រូ អ៊ូបាឃិន ទៅគិតច្រើនថ្ងៃ ហើយដោយសារការឈឺចាប់ទ្រាំពុំបាន ក៏សម្រេចប្រគល់ខ្លួនតាមឱវាទព្រះគ្រូ អ៊ូបាឃិន ចំនួន ១០ថ្ងៃនោះទៅ ។

គឺ១០ថ្ងៃនៃការប្រតិបត្តិ វិធីវិបស្សនានោះហើយ ដែលបានផ្លាស់ប្តូរជីវិតលោក គោអិនកា ខុសស្រឡះពីភាពមុន ជម្ងឺប្រកាំងបាន ជាស្រឡះដោយគ្មានប្រើថ្នាំ ព្រឹត្តិការណ៍នៃបញ្ហានៃទុក្ខា បានប្រែប្រួលទៅជាប្រសើរ ធ្វើឲ្យលោក គោអិនកា មានបិតិក្នុងការសិក្សាព្រះ ធម៌ និងអង្គុយធម៌ម្តងហើយម្តងទៀងពីព្រះគ្រូ អ៊ូបាឃិន រហូតដល់មានចំណេះគ្រប់គ្រាន់អាចបំពេញភារកិច្ចជាអ្នកផ្សព្វផ្សាយព្រះធម៌ តាមរយៈវិបស្សនានេះបាន ។

ចាប់តាំងពីព្រះគ្រូ អ៊ូបាឃិន សុគតទៅ លោក គោអិនកា បានចេញទៅបង្រៀនវិបស្សនាដំបូងបង្អស់ចំពោះម្តាយឪពុក របស់លោក រួចហើយញាតិញោមជិតខាង រហូតបាន

(តទៅទំព័រ 17)

(តមកពីទំព័រ 16)

ត្រូវគេហៅថា លោកគ្រូ គោអិនកា រហូតមក ។ ដោយអំណាចជំនឿយ៉ាងជ្រាលជ្រៅទៅលើព្រះធម៌ លោកគ្រូ គោអិនកា បានណែនាំមនុស្សម្ដងបន្តិចរហូតដល់រាប់ម៉ឺននាក់ មកប្រតិបត្តិវិបស្សនាដំបូងនៅភូមា បន្ទាប់មកនៅឥណ្ឌា ឥឡូវ នេះបានសុះសាយពេញសាកលលោក ហើយ ។ លោកគ្រូ គោអិនកា បាននិយាយថា "ដោយសារវិបស្សនានេះ ព្រះពុទ្ធសមណគោត្តម បានរំដោះនាង បដាចារ ឲ្យរួចពីវិកលចរិត កើតមកពីការសោកស្ដាយជីវិតរបស់កូននាងពីរនាក់ដែលបានស្លាប់ផ្ទួនៗគ្នា បានរំដោះមោគល្លាន ដែលជាចោរព្រៃកំណាចសម្លាប់មនុស្ស ឲ្យមករស់នៅជាសាវករបស់ព្រះវិញបាន..." លោកបានបន្តទៀតថា "វិធីនេះនៅតែមានប្រសិទ្ធិភាព ដដែលមកដល់សព្វថ្ងៃនេះ គឺព្រះធម៌នឹងកើតមាន នៅក្នុងខ្លួនអ្នកប្រតិបត្តិ ហើយអាចរំដោះខ្លួនបាន ក៏ប៉ុន្តែបើគ្រាន់តែបានឮ ឬបានរៀនសូត្រ តែក្នុងគម្ពីរ ពុំអាចបង្កើតព្រះធម៌ក្នុងខ្លួនបានទេ"។

នៅលេខក្រោយ ខ្ញុំនឹងរៀបរៀងជូនជាសណ្ដាប់ថា "តើពិធីវិបស្សនានោះ គេធ្វើរបៀបណា? ហើយអ្នកដែលបានធ្វើតាម ឱវាទព្រះពុទ្ធរួចហើយនោះ គេនិយាយយ៉ាងដូចម្ដេចខ្លះ? ។/

Website: www.dhamma.org

(តមកពីទំព័រ 19 ង)

តាមទ្រឹស្ដីព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃនោះ ។ ប៉ុន្តែទោះបីជាយ៉ាងណាក៏ដោយ ក៏វាជាគំរូមួយសំរាប់សហគមន៍ខ្មែរ ក្រៅប្រទេសបានខិតខំបង្ហាញនូវទំនៀមទំលាប់សាសនា របស់ខ្លួនតាមរយៈទីវត្តអារាមឬ ព្រះសង្ឃដើម្បីអោយជនបរទេសបានស្គាល់ពីអរិយធម៌ខ្មែរ ផងដែរ។

**ទីកន្លែងដើរលេងកំសាន្តពេលចុងសប្ដាហ៍**

ក្រោយពីភាពនឿយហត់ ពេញមួយដើមសប្ដាហ៍ ខ្មែរនៅ Long Beach ជាច្រើននាក់បានចាប់យកការដើរកំសាន្ត នាចុងអាទិត្យពេលព្រឹកមិនថាថ្ងៃសុក្រ, សៅរ៍, អាទិត្យ មនុស្សម្នា បាននាំគ្នាកុះករនៅតាមភោជនីយដ្ឋានដែលកំដរកំសាន្តទៅដោយ តន្ត្រីសម័យមានតារាចម្រៀងស្រីៗ សាច់សខ្ចីបង្អួតបង្ហាញសម្រស់លិចលើ លិចក្រោម គួរឲ្យខ្នាញ់ ។



Photo by Vantha El

Khmer Liquor Store at Walnut and Anaheim

នៅតាមភោជនីយដ្ឋាន មានហាងសុគ៌ថ្មី ព្រះច័ន្ទពេញវង់ La Lune និងហាក់ហៀង ហាងនិមួយៗ សម្បូរទៅដោយជនជាតិខ្មែរ ជាលក្ខណៈគ្រួសារ ឬមិត្តភ័ក្តិ ជួបជុំគ្នាញ៉ាំបាយគុយទាវ ក្លែមសម្ដីប្លែកប្រាជ្ញការសប្បាយនូវអ្វីដែលពួកគេចង់បរិយាយបង្កើតរឿងរ៉ាវសំណើច ឬជួបគ្នារកដំណោះស្រាយទុក្ខសោក...វិបត្តិបញ្ហានានា ឯអ្នកខ្លះស្វែងជួបគ្នាដើម្បីជជែកពីនយោបាយស្រុកទេស ឬប្រមូលគ្នា ធ្វើនយោបាយគាំទ្រឲ្យគណបក្សណាមួយ ដែលខ្លួនចូលចិត្ត ។ ចំណែកក្រុមមិនខ្វល់ពីនយោបាយ ពួកគេជួបជុំនិយាយពីស្រីស្នេហ៍ប្រុសថ្លៃ មិនថានៅស្រុកអាមេរិក ឬនៅឯស្រុកខ្មែរ ។ល។

**នៅពេលរាត្រី អ្នក Long Beach ទៅលេងឯណា ?**

អ្នកនិយមចូលចិត្តសប្បាយ ជាមួយភ្លើងពណ៌នាពេលរាត្រី ពួកគេបាននាំគ្នាទៅកាន់រង្គសាល នាគព័ន្ធ Dragon House ដើម្បីសប្បាយ ជាមួយការផឹកស៊ី រាំកំដរជាលក្ខណៈប្ដីប្រពន្ធ, សង្សារ ឬមិត្តភ័ក្តិ ដើម្បីបំបាត់ភាពតប់ប្រមល់ ហត់នឿយពីការងារ តាមទ្រឹស្ដីមួយចែងថា "ការសប្បាយ១នាទី ចំរើនអាយុបាន១ឆ្នាំ" ។ ដែលទ្រឹស្ដីនេះបានរុញច្រានឲ្យបុរសស្ត្រីខ្លះដែលនៅទំនេរ ពោះម៉ាយ ឬមេម៉ាយ ចោលភ្នែកឈ្លោកគ្នាដើម្បីផ្ដោះផ្ដងស្នេហា ឬបង្កើតមិត្តភាពបង្កការសប្បាយរាំផឹកផឹកស៊ីជាមួយគ្នារហូតដល់មានពាក្យនិយាយតៗគ្នា បន្លឺឡើងថា "បើចង់បានគូស្នេហ៍ សូមទៅ Night Club Dragon House " ព្រោះនៅទីនោះ ចម្រុះទៅដោយមនុស្សប្រុស-ស្រីគ្រប់ស្រទាប់វណ្ណៈ ។

អ្នកទៅកំសាន្តជាច្រើននិយាយថា ទីណា របស់ខ្មែរប៉ុស្ដិ៍ ដើម្បីទុកជាការចងចាំនៅ ពេល



Photo by Vantha El

សប្បាយ ទីនោះក៏មានទុក្ខដែរ ដែលយើងត្រូវប្រយ័ត្នប្រយែង ព្រោះទីផឹកស៊ីនៃគ្រឿង ស្រវឹង វាអាចបញ្ហាឲ្យមនុស្សមួយចំនួន បង្កើតហឹង្សាបង្កជម្លោះ ពិសេសបញ្ហាស្រីញី ដណ្ដើមគ្នាធ្វើជាម្ចាស់បេះដូងស្នេហ៍នោះ ។

ប៉ុន្តែប៉ុន្មានឆ្នាំចុងក្រោយនេះ បញ្ហាជម្លោះវាយដំគ្នានៅតាមរង្គសាលហាក់ត្រូវបញ្ចប់គ្មានបញ្ហា ព្រោះបងប្អូនខ្មែរយើងដូចជា យល់ចិត្តថ្លើមគ្នា ក្នុងន័យថា "ជាខ្មែរដូចគ្នា ឈាមជ័រតែមួយ រស់នៅជាជនចំណាកស្រុកដូចគ្នា " ។

អ្នកទេសចរណ៍កំសាន្តក្រៅក្រុងខ្មែរ Long Beach នឹងបានជ្រាបតាមដំណឹងពណ៌នា សម្រេចចិត្តមកកាន់តំបន់នេះ ។ ហើយយើងសង្ឃឹមថា តំបន់នេះមិនយូរមិនឆាប់នឹងប្រែមុខមាត់ថ្មីតាមរយៈការរីកចំរើននៃពួក ពាណិជ្ជកររកស៊ី, ពួកអ្នកដឹកនាំក្រុងខ្មែរ, សមាគម, សហគមន៍ រួមកម្លាំងគ្នាដើម្បីឲ្យតំបន់ក្រុងខ្មែរនេះខ្លាំងឡើង ដែលយើងស្រមៃទៅ ៥ឆ្នាំ ឬ ១០ឆ្នាំទៀត មានអគារជារបៀបខ្មែរ ក្លោងទ្វារជាប្រាសាទអង្គរវត្ត, ផ្ទាំងគំនូរស្រុកស្រែ ភ្ជាប់ជញ្ជាំងផ្សារ-ហាងសិប្បកម្ម នានាជាដើម ។ល។/

(តមកពីទំព័រ 23)

យ៉ាងច្រើន។ តែយ៉ាងណាក៏សមត្ថកិច្ចបានរាំង និងបានហាមមិនឲ្យចូលជិតយន្តហោះនោះក្នុងចម្ងាយ ១០០ម៉ែត្រដែរ។

ទាក់ទងនឹងករណីដែលលើកឡើងថា យន្តហោះនោះត្រូវរន្ទះបាញ់ មន្ត្រីនាយកដ្ឋានឧតុនិយមនៃក្រសួងធនធានទឹក និងឧតុនិយម លោក ឡុង សារ៉ាវុធ អះអាងថា ការនិយាយបែបនេះដូចជាមិនឡូហ្សិកសោះ ពីព្រោះថា បើសិនយន្តហោះបានជួបអព្ភូតហេតុបែបនេះមែន ម្ល៉េះយន្តហោះនោះមិនអាចបន្ទាបរកកន្លែងចុះចតបានទេគឺអាចត្រូវធ្លាក់ជាពីធ្លាក់តែម្ដង។

លោក សារ៉ាវុធ មានប្រសាសន៍ថា ជាធម្មតាយន្តហោះមុនចេញដំណើរអ្នកទទួលខុសត្រូវការហោះហើរគេបានជូនព័ត៌មានអំពី ស្ថានភាពអាកាសធាតុអីរួចអស់ហើយ ថាអាចហោះបាន ឬមិនបាន ? មានពពកមានល្បឿនខ្យល់យ៉ាងម៉េចខ្លះ ?...។ល។ លោកថា ពពក ផ្ទុកកខ្មៅៗគឺមានបន្ទុកអគ្គិសនី ដែលវារកតែភ្ជាប់មកប៉ូលនៅនឹងផែនដី ហេតុនេះបានជាគេតែងសង្កេតឃើញរន្ទះបាញ់តែដើមឈើខ្ពស់ៗ ពី ព្រោះវាបានចម្លងចរន្តផ្ទុយគ្នា។ លោកឲ្យដឹងថា ធម្មតាកំដៅរន្ទះ គឺមានដល់រាប់ម៉ឺនអង្សាសេក៏មាន ហេតុនេះការអះអាងថា ការធ្លាក់យន្ត ហោះបណ្ដាលមកពីរន្ទះបាញ់ ខណៈដែលយន្តហោះមានបំពាក់ប្រព័ន្ធការពាររន្ទះនោះ លោកយល់ថាហាក់ដូចជាមិនសូវឡូហ្សិកឡើយ។

បើតាមរបាយការណ៍ព័ត៌មានកាសែតក្នុងស្រុកឲ្យដឹងថា យន្តហោះនេះធ្លាប់ខូចតាំងវ៉ែអាក់ទ័រជាញឹកញាប់តាំងពីមុនមក ។ ជាក់ ស្ដែងកាលពីខែសីហា ដោយសារតែការតាំងវ៉ែអាក់ទ័រ យន្តហោះមួយនេះបានហោះត្រឡប់មកចុះចតកន្លែងដើមម្ដងដែរ តែកាលណោះបាន ចុះចតទាន់ពេលវេលាមិនមានគ្រោះថ្នាក់។

ក្រុមមន្ត្រីបញ្ជាការហោះហើរប្រចាំព្រលានយន្តហោះភ្នំពេញ មិនធ្វើអត្ថាធិប្បាយទេ ដោយគ្រាន់តែថា ពួកគេកំពុងតែពិនិត្យ មើលពីរបាយការណ៍នានា ស្ដីអំពីយន្តហោះមួយនេះនៅឡើយ។

សូមរំលឹកថា ហេតុការណ៍ធ្លាក់យន្តហោះធំៗនិងមានអន្តរាយធំធេងកើតមានឆ្នាំនេះពីរលើក។ កាលពីខែមិថុនា យន្តហោះប្រភេទ U4-241 របស់ក្រុមហ៊ុន PMT ដែលផ្ទុកអ្នកដំណើរនិងយាននិក ២២នាក់ បានបុកភ្នំបូកគោ នៅខេត្តកំពតធ្លាក់ស្លាប់មនុស្សទាំងអស់ហើយ អាជ្ញាធរដោយមានការដឹកនាំបញ្ជាផ្ទាល់ពីលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានចំណាយពេលអស់ពីរថ្ងៃទម្រាំបានរកឃើញបំណែកដែលធ្លាក់។ ការធ្លាក់នោះត្រូវបានបន្ទោសទៅលើអាកាសធាតុ និងលក្ខណៈភូមិសាស្ត្រ។ លទ្ធផលការស្រាវជ្រាវប្រអប់ខ្មៅមិនត្រូវបានប្រាប់ឲ្យ ដឹងជាសាធារណៈទេ។

កាលពីថ្ងៃទី៥ ខែកញ្ញា ឆ្នាំ ១៩៩៧ យន្តហោះក្រុមហ៊ុនអាកាសចរវៀតណាមមួយ ក៏បានធ្លាក់ដែរ នៅពេលហោះឡើងពីព្រលាន យន្តហោះភ្នំពេញបានបន្តិចហើយក៏ធ្លាក់នៅម្ដុំចោមចៅប្រមាណ ៣០០-៤០០ ម៉ែត្រពីព្រលាន ខណៈដែលហោះបានកំពស់ជាង ១០០ម៉ែត្រ បណ្ដាលឲ្យមនុស្សជាង៦០នាក់ស្លាប់ តែជាសំណាងមួយលើមួយពាន់គ្រោះថ្នាក់ ដែលក្នុងការធ្លាក់លើកនោះ មានក្មេងបៅដោះម្នាក់បានរួច រស់នៅមានជីវិត។

រាល់លើកនៃការធ្លាក់យន្តហោះនៅកម្ពុជា គ្មានការពន្យល់ភ្លាមៗអំពីមូលហេតុនៃការធ្លាក់នោះ ឲ្យឡូហ្សិកទេហើយការសង្ឃឹមការស្រាវជ្រាវក្នុងប្រអប់ខ្មៅនោះ ក៏មិនត្រូវបានបង្ហើបឲ្យដឹងជាសាធារណៈដែរ តែអាជ្ញាធរតែងតែបន្ទោសទៅលើ បាតុភូតធម្មជាតិជាជាងករណីខុសឆ្គងខាងបច្ចេកទេស។/ *ខ្មែរប៉ុស្ដិ៍*

*(តមកពីទំព័រ 15 ច)*

អាមេរិកាំងមួយនេះមិនបានជួយឈឺ ឆ្អាលដល់ពួកប្រជាជន ឬឈ្មួញពាណិជ្ជករខ្មែរអ្វីធំដុំទេ ក្រៅតែពីកិច្ចការក្រុមបក្ខពួកគេ ក្រោមរូបភាពឡប់ឡែវរៀបចំបោះឆ្នោតគាំទ្រតែ មនុស្សរបស់ខ្លួនមួយក្រុមតែប៉ុណ្ណោះ ។ ពួកឈ្មួញ អ្នកធ្វើការ មេធាវី និងវេជ្ជបណ្ឌិតកូនខ្មែរបានប្រាប់ដោយមិនលាតត្រដាងឈ្មោះឲ្យដឹងថា ពួកគេមិនត្រូវបានបញ្ជូន ឬហៅទៅពិគ្រោះយោបល់ ឬចូលរួមបោះឆ្នោត ដើម្បីនាំគ្នាជួយធ្វើកិច្ចការសំរាប់ប្រយោជន៍ដល់សង្គមខ្មែរទេ ក្រៅតែពីប្រយោជន៍ជារបៀបប្រជាភិថុត អត្តទត្តបុគ្គល (ផ្ទាល់ខ្លួនម្នាក់ៗ)។ ក្រុមអ្នករិះគន់លើកហេតុផលថា ក្រុមពួកសភាពាណិជ្ជកម្ម ខ្មែរ-អាមេរិកាំងទាំងនោះហាក់មិនចង់ឲ្យក្រុមដទៃចូលទៅធ្វើការងារជាមួយទេ ព្រោះពួកគេមិនចង់ឲ្យអ្នកណាដឹងឮ នូវអ្វីដែលគេបានធ្វើជំពាក់ទៅនឹងបញ្ហានយោបាយជាមួយអ្នកដឹកនាំ នៅឯប្រទេសកម្ពុជា ក្នុងបញ្ហាខ្លះ មិនត្រឹមត្រូវតាមផ្លូវច្បាប់ ។ ចំណោទបញ្ហានេះត្រូវបានច្រានចោលដោយមេដឹកនាំថ្មីនៃសភាពាណិជ្ជកម្ម ខ្មែរ-អាមេរិកាំង លោក EDWARD SANA TAN ដែលទើបជាប់ឆ្នោតមិនទាន់បានមួយខែផងនោះ ឲ្យដឹងថា អ្វីៗធ្វើដោយតម្លាភាព(ភាពត្រឹមត្រូវ)គោលការណ៍ ប្រជាធិបតេយ្យត្រូវលើកយកមកអនុវត្តតាមការបោះឆ្នោត និងការអំពាវនាវឲ្យពួកពាណិជ្ជករខ្មែរ ឬអ្នកចេះដឹងជំនាញឯកទេសនាំគ្នាមក ចូលរួមផងដែរ ។ ប៉ុន្តែត្រង់តែពួកគេទាំងនោះចង់ ឬមិនចង់ជារឿងរបស់គេ ព្រោះអ្នកធ្វើតែងតែមានការរិះគន់...តែអ្នកចាំតែថា មិនដែល ឃើញធ្វើអ្វីសោះ ។

តើអ្វីខ្លះដែលស្ថាប័ន សភាពាណិជ្ជកម្មខ្មែរ-អាមេរិកាំងមួយនេះ អះអាងថា បង្កើតឡើងដើម្បីជួយប្រយោជន៍ខ្មែរនោះ សូម អញ្ជើញអានកិច្ចសំភាសន៍របស់ខ្មែរប៉ុស្តិ៍ជាមួយប្រធានសភាពាណិជ្ជកម្មនេះ ។

មាជ សុវណ្ណារ៉ា ៖ អ្វីដែលជាគោលបំណងក្នុងដំណើរបេសកកម្មរបស់សភាពាណិជ្ជកម្ម ខ្មែរ-អាមេរិកាំង ?

EDWARD៖ សភាពាណិជ្ជកម្មខ្មែរ-អាមេរិកាំង ត្រូវបានបង្កើតឡើងស្របទៅតាមច្បាប់នៃអង្គការមិនយកកម្រៃ (Non Profit) មានទិសដៅក្នុងការជួយសម្រួលជំរុញឲ្យពលរដ្ឋ អាមេរិកាំងបានជ្រួតជ្រាប អំពីវប្បធម៌របស់ខ្មែរយើង និងការពង្រឹងបង្កើត ការយល់ដឹងពីគ្នាទៅវិញទៅមកលើវិស័យសេដ្ឋកិច្ច ទំនៀមទំលាប់ និងរបៀបរៀបរយ ឆ្ពោះទៅរកកិច្ចសហប្រតិបត្តិការរវាងគ្នា ដើម្បី ភាពរស់នៅសុខដុមរម្យនា ក្នុងសង្គមជាមួយគ្នា ។

មាជ សុវណ្ណារ៉ា ៖ តើស្ថាប័នមួយនេះ មានទំនាក់ទំនងយ៉ាងណាដែរជាមួយវិនិយោគទុន អាមេរិក ដើម្បីទាក់ទាញពួកឈ្មួញឲ្យរក ស៊ីជាមួយខ្មែរក្នុងស្រុក ឬក្រៅស្រុកនោះ?

EDWARD៖ មនុស្សគ្រប់ជនជាតិតែងតែចង់ឲ្យប្រទេសកំណើតរបស់ខ្លួន មានការរីកចំរើនដូចប្រទេសដទៃ បំណងរបស់សភាពាណិជ្ជកម្ម ខ្មែរ-អាមេរិកាំង ក៏មានសេចក្តីប្រាថ្នាយ៉ាងដូច្នោះដែរ ។ នៅពេលដែលយើងមានលទ្ធភាពគ្រប់គ្រាន់រឹងដៃរឹងជើងនោះយើងពិតជាទាក់ទងជាមួយពួកអ្នកវិនិយោគទុនអាមេរិកាំងទៅរកស៊ីបណ្តាក់ទុននៅប្រទេសកម្ពុជាឬក្នុងសហគមន៍ខ្មែរ ។ ប៉ុន្តែទន្ទឹម នឹងនេះ ក៏យើងបានធ្វើខ្លះៗរួចមកហើយដែរ ។

មាជ សុវណ្ណារ៉ា ៖ តើសភាពាណិជ្ជកម្មនឹងជួយនាំផ្លូវបង្ហាញបងប្អូនខ្មែរ ក្នុងការរកស៊ីធ្វើជំនួញដែរឬទេ នៅខណៈដែលក្រុងខ្មែរ កើតហើយនោះ ?

EDWARD៖ ពិតប្រាកដណាស់នេះជាគោលបំណងទី១ របស់យើងដែលថានឹងត្រូវធ្វើបែបណាឲ្យទីក្រុងខ្មែរ ដែលទើបនឹងបានទទួលស្គាល់ជាផ្លូវការដោយអាជ្ញាធរក្រុង Long Beach ដោយផ្តល់នូវលទ្ធភាព និងឱកាសគ្រប់គ្រាន់ដល់ខ្មែរយើងបានប្រកបមុខ ជំនួញជាហូរហែរឡើង ។

មាជ សុវណ្ណារ៉ា ៖ តើសភាពាណិជ្ជកម្មខ្មែរ-អាមេរិកាំង មានចំណងការងារជាមួយស្ថាប័នសភាពាណិជ្ជកម្មកម្ពុជាយ៉ាងម្តេចដែរ ដើម្បីអ្នកវិនិយោគទុន ឬបង្កើតជំនួញក្នុងតំបន់ ?

EDWARD៖ មកទល់នឹងពេលនេះ យើងមានទំនាក់ទំនងធ្វើការជាមួយគ្នាខ្លះៗ ហើយក្នុងផ្នែកវិនិយោគទុនរកស៊ីនៅ កម្ពុជា ប៉ុន្តែការវិនិយោគទុនជាអ្វី យើងមិនទាន់ប្រាប់បានទេ ព្រោះរង់ចាំលទ្ធផលកើតចេញសិន ។ ប៉ុន្តែនាអនាគតដូចយើងខ្ញុំបានជំរាបជូន នូវចម្លើយខាងលើរួចមកហើយ គណៈកម្មាធិការយើងខ្ញុំច្បាស់ជានឹងរំពឹងគិតរកមធ្យោបាយរួម សហប្រតិបត្តិការជាមួយគ្នា ដោយយកច្បាប់ ជាតិ និងអន្តរជាតិជាគោល ក្នុងការទាក់ទាញវិនិយោគទុន ឬបង្កើតជំនួញក្នុងតំបន់ ។

មាជ សុវណ្ណារ៉ា ៖ តើស្ថាប័នមួយនេះ បង្កើតនៅឆ្នាំណា ? បានធ្វើអ្វីខ្លះជាស្នាដៃកន្លងមក ?

EDWARD៖ សភាពាណិជ្ជកម្មខ្មែរ-អាមេរិកាំងមានកំណើតពីឆ្នាំ ២០០១ ដែលចាប់ពីពេលនោះមក យើងបានចូលរួម សហការ និងការអភិវឌ្ឍន៍សហគមន៍ខ្មែរ Long Beach បំណងរក្សាវប្បធម៌ ស្តារសេដ្ឋកិច្ចតំបន់ខ្មែរពិសេសបង្កើតក្រុងខ្មែរជាមួយរដ្ឋ អំណាច ឬជាតិសាសន៍ដទៃ ក្នុងទំនាក់ទំនងទៅរកកិច្ចប្រតិបត្តិការរកស៊ី ឬរដ្ឋបាលសាធារណៈ ។ ជួយគាំទ្រជំរុញបង្កើតឲ្យមាន ពិធីហែរក្បួនព្យុហយាត្រាអបអរសាទរបុណ្យចូលឆ្នាំខ្មែរចាប់តាំងពីឆ្នាំ២០០៣ និងបានចូលជាសមាជិកជាមួយពួកក្រុមពាណិជ្ជកម្មតំបន់ Long Beach ចម្រុះជាតិសាសន៍ រួមនឹងការបន្តលើកស្ទួយសេដ្ឋកិច្ចនៅក្រុងខ្មែរ ឲ្យមានភាពប្រសើរឡើង ។/

*(តមកពីទំព័រ 15 ឆ)*

ក្រុងខ្មែរ ត្រូវបានពួកប្រជាជនថៃមួយចំនួននៅ



តំបន់ Thai Town, Los Angeles លើកយកមកនិយាយនៅក្នុងហាងគុយទាវ ថៃមួយក្នុងបំណងបង្ហាញថា ពួកគេបានទៅកាន់ទីនោះដើម្បីដើរកំសាន្តមើល ក្រុងខ្មែរ ដែលទើបតែកើត ហើយបានហួស ចូលផ្សារ យុន ហេង បានសរសើរថាម្ហូបអាហារ បន្លែផ្លែឈើ សាច់ត្រីស្រស់ៗមិនរលួយស្អុយ តម្លៃ ថោកគ្រាន់បើ ក្មេងៗលក់ដូរទាក់ទាញភ្ញៀវក្នុង សំដីរាក់ទាក់ញញឹមញញែម ។

ការជជែកបែបនេះ ជាការសន្ទនាភាសាថៃលាយឡំភាសា English ដែលខ្មែរប៉ុស្តិ៍យើងស្តាប់ឮ ពួកគេនិយាយថា យើងជួយគ្នាទៅជនជាតិអាស៊ីដូចគ្នា បើ ទោះបីខុសជាតិសាសន៍ក៏ដោយព្រោះជាអ្នកចំណាកស្រុកដូចគ្នា ។ ហើយខ្មែរក៏គេបានមកកំសាន្តក្រុងយើង ជួយទិញរបស់របររបស់ថៃយើងដែរ វាគួរតែមាន ទៅមានមក ។

ជនជាតិថៃប្រមាណ ១០នាក់ ភាគច្រើនជា វ័យចំណាស់បានបន្តភាសាជាតិដើមគេ ឲ្យដឹងថាបញ្ហានយោបាយ ឬប្រវត្តិសាស្ត្រ និងជីវភាពរស់នៅគួរត្រូវ បែងចែកគ្នាឲ្យដាច់ជាមួយការទំនាក់ទំនង ដោយមិនប្រកាន់ពូជសាសន៍ ។

វាជារឿងកម្រដែលពួកជនជាតិថៃ ដូចពួកមួយក្រុមនេះចេះថ្លឹងថ្លែង ដោយការបែងចែកឲ្យដាច់ពីគ្នា ពីស្ថានភាពនយោបាយ ជម្លោះជាតិសាសន៍នោះ ។

សារ៉ុងរ៉ាត់ អាយុ ៥៦ឆ្នាំ បាននិយាយជាភាសាថៃប្រាប់យើងថា ជាដំបូងពួកគេគោរពឈ្មោះជាមុនគឺ "យុន" មានន័យថាជាខ្សែស្តេចព្រះរាជវង្សសាលោហិតព្រះមហាក្សត្រ។ ដូច្នេះប្រជាជនថៃពួកគេគោរព ផ្តល់កិត្តិយត្រូវតែកើតមាន ។ ប៉ុន្តែសំរាប់ផ្សារ យុន ហេង ជារបស់ខ្មែរទេ តែយើងរំលឹកគិត ដល់គោរម្យងាររបស់ជាតិសាសន៍យើងដែលធ្វើឲ្យយើងចូលចិត្ត យើងទៅគេទិញរបស់គេគេមកទិញរបស់យើងមានទៅមានមក ។

ចំណែកកញ្ញា ផាក្ញូងថៃ អាយុ ៣០ ឆ្នាំ និយាយថា នាងមិនទាន់ឃើញស្គាល់ផ្សារ យុន ហេង ទេ ដោយគ្រាន់តែឃើញមានការផ្សាយពាណិជ្ជកម្មតែប៉ុណ្ណោះ ។ ដោយនាងបន្តថា នឹងទៅកាន់ទីនោះនាបុណ្យចូលឆ្នាំខ្មែរ-ថៃ ឬពេលការហែរក្បួនចូលឆ្នាំរបស់ខ្មែរនាឆ្នាំក្រោយថា តើក្រុងខ្មែរ និងផ្សារខ្មែរ អ្នកលក់ដូរ មានស្ថានភាពបែបណា ? ។

នៅតំបន់ខ្មែរ Long Beach គេឃើញមានហាងថៃ, ថៃ-ឡាវ និងហាងខ្មែរខ្លះរហូតលាយឡំភ្ជាប់ពាក្យថៃ ដើម្បីបង្កើនប្រជាប្រិយភាពរកស៊ីទៅតាមការយល់ឃើញ របស់គេ រៀងៗខ្លួន ។

ថៅកែផ្សារ យុន ហេង ម៉ុយ ហាង បានប្រាប់ខ្មែរប៉ុស្តិ៍យើងឲ្យដឹងថា វាជាមោទនភាពនៅពេលឮដំណឹងនេះ ព្រោះអ្នកធ្វើជំនួញតែងតែចង់បានការជោគ ជ័យ ។ យើងបានចុះផ្សាយពាណិជ្ជកម្មជាមួយកាសែតថៃ ឈ្មោះ Asian Pacific News ដើម្បីទាក់ទាញភ្ញៀវបរទេសចំពោះផ្សារខ្មែរទំនិញខ្មែរ ដែលនេះជាការលើកស្ទួយជាតិខ្មែរ វប្បធម៌ខ្មែរម្ហូបខ្មែរមួយកំរិតដែរ ។

ថៅកែ យុន ហេង បានបន្តថា ឥឡូវយើងឃើញមានភ្ញៀវបរទេសមិនថា ថៃ យួន ចិន អាគាំង ឬ Mexican មកកាន់ទីផ្សារយើងគួរឲ្យកត់សំគាល់ ព្រោះទំនិញមានគុណភាព សាច់ បន្លែ ផ្លែឈើស្រស់ៗមិនរលួយស្អុយជាមួយភាសាទំនាក់ទំនងល្អជាមួយភ្ញៀវផងនោះ ។

ពីអតីតកាលមិនថា ជាប្រវត្តិសាស្ត្រ ឬជីវភាពរស់នៅបច្ចុប្បន្នក្តី ជនជាតិថៃតែងតែបង្កកំហឹងជាក់គ្នាជាមួយខ្មែរ ពីបញ្ហាប្រកាន់ពូជសាសន៍ រំលោភបំពាន ដីធ្លីព្រំដែន ដណ្តើមកម្មសិទ្ធិធ្វើជាម្ចាស់កេរតំណែល វប្បធម៌ អរិយធម៌ បេតិកភ័ណ្ឌជាតិពីខ្មែរឥតឈប់ឈរ ដែលរហូតដល់ធ្វើឲ្យខ្មែរទ្រាំអត់ធ្មត់មិនបាន បង្កឡើងនូវការវាយដុតបំផ្លាញស្ថានទូតថៃ នៅកម្ពុជា កាលពីឆ្នាំ ២០០២ ព្រោះតែថៃដែលដឹកមុខ ដោយតារាកុនថៃ នាងផ្កាយព្រឹកអះអាងបង្ហាញពិភពលោកថា អង្គរវត្តជាសម្បត្តិរដ្ឋរបស់ខ្លួន ដែលខ្មែររំលោភយកទៅវិញ Sic ។ នេះយើងមិននិយាយដល់អតីតកាលមួយនៃជនភៀសខ្លួនខ្មែរនៅតាមជំរំព្រំដែន ថាតើពួកថៃគេ ធ្វើបាបអ្វីខ្លះមកលើខ្មែរនោះ ប៉ុន្តែក្នុងនាមខ្មែរជាអ្នកកាន់ផ្លូវព្រះពុទ្ធសាសនា តែងតែប្រកាន់មេត្តាធម៌ "ពារវៀរាប់ដោយការមិនចងពារ" ដើម្បីសេចក្តីសុខ ឬទៅ តាមកម្មផល "ចាញ់ជាព្រះ ឈ្នះជាមា" នោះ ។/

(តមកពីទំព័រ 20 ង)




**Khmer Businesses Center along Anaheim Street of *Cambodia Town* in Long Beach, California**

Photo by Vantha El

ទូរស័ព្ទក្តីថា តើក្រុងខ្មែរមានអ្វីប្លែក ? ការរស់នៅបងប្អូនខ្មែរមានទិដ្ឋភាពដូចអ្នកក្រុងភ្នំពេញទេ ? ។

ថ្ងៃនេះដើម្បីនាំចក្ខុអារម្មណ៍លោកអ្នក តាមការអានកាសែតខ្មែរប៉ុស្តិ៍ ចំពោះអ្នកមិនធ្លាប់មកធ្វើដំណើរកំសាន្តសហគមន៍ខ្មែរ Long Beach ទាល់តែសោះ ក្នុងន័យ "ត្រឹមតែឮ មិនដែលឃើញ" ថា តើក្រុងខ្មែរមួយនេះមានអ្វីប្លែក ? ។

ក្នុងក្តីស្រមៃ របស់បងប្អូនប្រហែលជាគិតថា ក្រុងខ្មែរមានទិដ្ឋភាពដូចគ្នាទៅនឹងក្រុងចិន ឬក្រុងយួន តាមការបានឃើញក្នុងរឿងកុន Hollywood ហើយមើលទៅ! ។

ប៉ុន្តែស្ថានការណ៍ពិត វាមានទិដ្ឋភាពខុសគ្នាឆ្ងាយរវាងក្រុងខ្មែរ ដែលទើបតែកកើតជាមួយទ្រព្យធនស្តួចស្តើង អ្នកជំនួញមិនសូវ លូតលាស់ ព្រោះថវិកា និងទំហំទីផ្សារខ្មែរតូចចង្អៀតក្នុងការរកស៊ីជាមួយគ្នា រួមជាមួយជីវភាពប្រជាជនយើងភាគច្រើន មិនសូវមានជីវភាពធូរធារប៉ុន្មាន និងជាច្រើននាក់ទៀតស្ថិតក្រោមជំនួយ ពីរដ្ឋផងនោះ ។

ដូច្នេះការប្រៀបធៀបណាមួយទៅនិង ចិន-យួន មិនអាចទាន់បានទៅកើតទេ ពីព្រោះធនធានមនុស្ស និងទ្រព្យសម្បត្តិខុសគ្នាឆ្ងាយណាស់ ក្រៅតែពីការរៀនសូត្រ និងមើលពីគេជាគំរូ ដើម្បីជាបទពិសោធន៍នៃមេរៀនអភិវឌ្ឍន៍សង្គមខ្មែរយើង ។

**ទីប្រជុំជនសេដ្ឋកិច្ចខ្មែរ**

នៅលើបណ្តោយផ្លូវ Anaheim ពី Junipero រហូតដល់ផ្លូវ Atlantic ហាងខ្មែរលក់ដូរទំនិញគ្រប់សព្វចម្រុះ, មានផ្សារ, ហាង ជួសជុលរថយន្ត, ក្រុមហ៊ុនលក់ ការធានារ៉ាប់រង (ធានារ៉ាប់រងជីវិត, ជំនួញ, រថយន្ត, ផ្ទះ សម្បែង), ហាងលក់គ្រឿងសង្ហារឹម, មាសប្រាក់, ការិយាល័យមេធាវីខ្មែរ, គ្លីនិកពិនិត្យព្យាបាលរបស់វេជ្ជបណ្ឌិតខ្មែរ, កន្លែងលក់សំបុត្រយន្តហោះ និងផ្ញើប្រាក់, សំអាងការ, កាត់ សម្លៀកបំពាក់, ហាងកាត់សក់, ឱសថស្ថានលក់ថ្នាំពេទ្យ និងក្រុមហ៊ុនវីដេអូខារ៉ាអូខេនិងហាងលក់ស្រាបៀរជាដើម ។ល។

ផងផ្លូវជាបេះដូងខ្មែរមួយនេះ គឺជាទីផ្សារសេដ្ឋកិច្ចដល់បងប្អូនខ្មែរតំបន់ Long Beach ជាង៦ម៉ឺននាក់ដើម្បីទៅកាន់ទីនោះ ក្នុងការស្វែងរកទំនិញ ឬដោះដូរ ។ គេឃើញ ជនជាតិខ្មែរអាស៊ីមួយនេះ បានជួបគ្នានៅតាមទីផ្សារ, ភោជនីយដ្ឋាន ឬទីកន្លែងផ្សេងៗទៀត ។ ប៉ុន្តែទិដ្ឋភាពអ៊ូអរមិនបានបង្ហាញឲ្យច្រើន កុះករដូចក្រុងចិន នៅ Los Angeles ឬក្រុងយួននៅ Westminster នោះទេ ។ ក្បាច់ក្បូរចនាអគារពុំទាន់ត្រូវបានគេប្រទះឃើញថាជាលក្ខណៈខ្មែរនៅឡើយទេ ក្រៅតែពីរំលេចអក្សរខ្មែរចារនៅលើជញ្ជាំងតាមហាងពាណិជ្ជកម្ម ឬសមាគមនោះ ។

ការរកស៊ីជួញដូរក្នុងតំបន់ខ្មែរមួយនេះ ត្រូវពួកអ្នកពាណិជ្ជករថ្ងូចថ្ងូរថា ពុំសូវកាក់កបប៉ុន្មានទេ ២-៣ ឆ្នាំចុងក្រោយនេះ ។

ពួកម្ចាស់ភោជនីយដ្ឋាននានា សុទ្ធតែបំភ្លឺសម្តីឲ្យដឹងថា ភ្ញៀវមានការថយចុះ ព្រោះមនុស្សពិបាករកលុយ ដោយសារសេដ្ឋកិច្ច ស.រ.អា បានធ្លាក់ចុះ, ទំនិញទីផ្សារឡើងថ្លៃ, មនុស្សផ្អាកការងារធ្វើច្រើន, ប្រាក់ខែការងារនៅដដែល និងមនុស្សផ្លាស់ប្តូរទីលំនៅចេញពី Long Beach ទៅរស់នៅក្រៅរដ្ឋ ។

ចំណែកពួកម្ចាស់ផលិតកម្ម Video Karaoke ក៏បានអះអាងថា ពួកគេរកស៊ីខាត ព្រោះទីផ្សារមានការទម្លាក់តម្លៃដោយសារ ការលួចចម្លងស្នាដៃកើតមានបែបអនាធិបតេយ្យ រហូតដល់ក្រុមហ៊ុនមួយចំនួនត្រូវដួលរលំ ព្រោះការចំណាយ និងចំណូលពុំមានតុល្យភាព។ រីឯផ្សារខ្មែរជាច្រើនក៏បានផ្លាស់ប្តូរម្ចាស់មិនតិចដែរ ដោយសារការរកស៊ីហាក់ដូចជាមិនទៅមុខ។ ទន្ទឹមនឹងការមិនសូវមាន សន្ទុះសេដ្ឋកិច្ចជំនួញគួរឲ្យកត់សម្គាល់យ៉ាងណានោះ ។ ក៏ក្រុងខ្មែរមួយនេះកំពុងប្រឹងប្រែងដើម្បីជំនះ ឧបសគ្គក្នុងការរកស៊ី និងជួយគាំទ្រគ្នាដើម្បីដើរឆ្ពោះទៅដល់ទិសដៅនៅថ្ងៃណាមួយជាមិនខាន ។ ប្រសិនណាអ្នកដឹកនាំក្រុងខ្មែរ ពួកឈ្មួញចេះនិយាយគ្នា ទុកចិត្តគ្នា ដើម្បីប្រយោជន៍តំបន់ខ្លួន ជាងការតម្លើងចង្អុលដាក់គ្នា, កាច់ឫករាងគ្មាននរណាស្មើខ្លួននោះ ។

**តំបន់វប្បធម៌អក្សរសាស្ត្រ និងសាសនា ៖**

យើងមានក្រុងខ្មែរ ប៉ុន្តែមជ្ឈមណ្ឌលអក្សរសាស្ត្រ ឬសារមន្ទីរពុំទាន់ត្រូវបានគេគិតគូរនៅឡើយឬយ៉ាងណាទេ ? ប៉ុន្តែក្រុមអ្នកដឹកនាំក្រុងខ្មែរ និងសប្បុរសជនបានរួមគ្នាដាក់វិភាគទាន១៥ម៉ឺនដុល្លារ ឲ្យទៅបណ្ណាល័យ Mark Twain មួយនៅលើផ្លូវ Anaheim ដើម្បីតម្កល់កន្លែងមួយទៅជាកន្លែង រក្សាតម្លៃវប្បធម៌ខ្មែរ ដែលចម្រុះវត្ថុតាំងទៅដោយអ្វីខ្លះនោះ គឺពុំទាន់ឃើញមានអ្វី ដែលគួរឲ្យកត់សម្គាល់នៅឡើយទេ។ ក្រៅតែពីកាសែត អានចាស់ៗ ភាពយន្តខ្មែរអតីតសម័យកុម្មុយនីស្ត, សៀវភៅកុមារអាន ក...ខ...គ...តែប៉ុណ្ណោះ ។ ចំណែកនៅហាងមាតុភូមិ និងបន្ទាយស្រី រួមទាំងផ្សារបាយ័ន្ត យើងឃើញសៀវភៅចម្រុះជាច្រើននិយាយទៅដល់សេដ្ឋកិច្ច,សង្គម, នយោបាយ, ប្រវត្តិសាស្ត្រ និងព្រឹត្តិការណ៍របស់ពិភពលោក, អ្នក ប្រាជ្ញល្បីល្បាញ ។ល។

ប៉ុន្តែនៅទីនោះជារបស់ឈ្មួញ អ្នកដែលចង់អានមិនអាចមើលសេរី ក្រៅតែពីការទិញនោះទេ។

នៅក្រោមដំបូលអតីតសហគមន៍ខ្មែរ UCC ដែលឥឡូវនេះជាទ្រព្យសម្បត្តិរបស់ ជាតិអាមេរិកម្នាក់ កូនខ្មែរបានទៅកាន់ទីនោះ ដើម្បីរៀនភាសាខ្មែរ និងរៀនហាត់រាំរបាំបុរាណខ្មែរដើម្បីរក្សាការស្នងកេរ្តិ៍តំណែលបន្តពីដូនតាម៉ែឪខ្លួន។ ពួកក្មេងៗទាំងនោះចង់ទៅរៀន ផ្នែកវប្បធម៌នេះណាស់នៅពេលចុងសប្តាហ៍ ។ ប៉ុន្តែការចង់រក្សាសម្បត្តិជាតិខ្មែរនោះ នៅពុំទាន់ទាញទាំងស្រុងឲ្យពួកគេចេះនិយាយខ្មែរ ឲ្យល្អនៅឡើយទេ ។ ព្រោះភាសាជាអត្តសញ្ញាណជាតិដំបូងដែលបង្ហាញថា ជាជាតិសាសន៍អ្វី មុននឹងបង្ហាញតឹកតាង តាមការចង្អុលវប្បធម៌សិល្បៈ ផ្សេងៗ ។ ក្រុមអ្នកជំនាញវប្បធម៌ខ្មែរនិយាយថា ឪពុកម្តាយត្រូវជួយកូនឲ្យចេះនិយាយភាសាដើមកំណើតខ្លួនថា ខ្លួនជាកត្តាសំខាន់ដើម្បី តំណាជាតិខ្មែរនៅលើទឹកដីគេ។

ត្រូវក្រឡេកមើលពួកកូនចៅ យួន,ចិន, Mexican ។ កូនរបស់គេចេះភាសាដើមរបស់ម៉ែឪគេច្បាស់លាស់ ណាស់ ។ បើយើងគ្មានការគិតគូរ និងប្រុងប្រយ័ត្ន អនាគតនឹងទទួលគ្រោះថ្នាក់នៃពូជខ្មែរជំនាន់ក្រោយ ។

**ទីវត្តអារាមសាសនាព្រះពុទ្ធ ៖**

នៅតំបន់ក្រុងខ្មែរ Long Beach មានទីវត្តអារាមសំរាប់ជាទីគោរពបូជា ធ្វើបុណ្យដាក់ទានសន្សំកុសលចំនួន១០វត្ត ដើម្បីទ្រទ្រង់សាសនាព្រះពុទ្ធឲ្យស្ថិតស្ថេរ ។ ការរីករាលដាលនៃវត្តអារាមច្រើន វាឆ្លុះនូវទស្សនៈពីរយ៉ាងចង់បង្ហាញថា ទីមួយអាចធ្វើឲ្យ សាសនាមានការរីកចំរើនតាមរយៈការរីកដុះដាល នៃវត្តអារាម, ទី២ អាចមកពីការបែកបាក់ផ្ទៃក្នុងព្រះសង្ឃ និងក្រុមគណៈកម្មការវត្ត ដែលមិនអាចរស់នៅជាមួយគ្នាបាន ក៏បែកគំនិតនាំគ្នាទៅបង្កើតវត្តថ្មីផ្សេងៗទៀត ដែលចំណោទនេះជាបញ្ហាត្រូវគិត ហើយពិបាកដោះ ស្រាយចំណង ព្រោះផ្នែកផ្លូវពុទ្ធចក្រព្រះសង្ឃនៅស្រុកអាមេរិកគ្មានមេគណ ឬគណៈកម្មការនាយកសង្ឃដើម្បីស្រាយចំណងជម្លោះ ។

អ្នកនិយមកណ្តាលនៃពុទ្ធសាសនិកជនម្នាក់និយាយថា ការទ្រទង់ព្រះពុទ្ធសាសនា ឲ្យស្ថិតស្ថេរ មិនសំខាន់លើការបង្កើតឲ្យមាន វត្តច្រើននោះទេ ។ បើយើងចេះសាមគ្គីភាពគ្នា ចៀសវាងអំពើលោភលន់ជាធំ (អត្តទត្ថបុគ្គល) គឺយើងអាចធ្វើអ្វីៗបានជោគជ័យ ទាំងអស់ ។

អ្នកនិយមកណ្តាលរូបនោះបានបន្តថា ព្រះសង្ឃ និងអាចារ្យ ដូនជីខ្លះ បាននាំទុក្ខបង្កបាតុភាពឲ្យបែកបាក់ បំបែកវត្តអារាមគ្នា ទៅបង្កើតនៅតំបន់នេះ តំបន់នោះ យ៉ាងច្រើនដែលជាភាពទន់ខ្សោយទៅវិញទេ។ ព្រោះរឿងអាស្រូវធ្វើឲ្យពុទ្ធបរិស័ទអស់ជំនឿដើម្បី គោរពប្រតិបត្តិ

(តទៅទំព័រ ២២ ង)

(តមកពីទំព័រ 15 ឃ)




ថៅកែ សុភី កំពុងធ្វើម្ហូបបង្ហាញស្នាដៃដល់អ្នកកាសែតខ្មែរប៉ុស្តិ៍

ពីនេះទៀត នាងចង់ឲ្យគេស្គាល់ពី វប្បធម៌ខ្មែរ ម្ហូបអាហារខ្មែរ តាមរយៈហាងរបស់នាងដល់ភ្ញៀវបរទេសថា តើជនជាតិខ្មែរមានតម្លៃជាប្រវត្តិសាស្ត្រថ្លៃថ្នូរបែបណាពីអតីតកាល? ម្ហូប មានរសជាតិឆ្ងុយឆ្ងាញ់បែបណា?។




ភ្ញៀវបរទេសពីរនាក់នេះកំពុងញ៉ាំនំបាញ់ឆែវខ្មែរ

ភោជនីយដ្ឋាន សុភី បានចាប់ផ្តើមបើកបំរើអតិថិជនតាំងពីឆ្នាំ២០០០ ដែលមាននាងជាម្ចាស់ផង ធ្វើចុងភៅខ្លួនឯងផងរហូតមកដល់បច្ចុប្បន្ន បានធ្វើឲ្យភ្ញៀវមានការចាប់អារម្មណ៍ និងជក់ចិត្តជាមួយម្ហូបដែលសុភី បានអះអាងថា វាមានកត្តា៣យ៉ាងដែលយើងទទួលជោគជ័យ គឺអ្នកទទួលភ្ញៀវមានការរួសរាយរាក់ទាក់, ម្ហូបមានការច្នៃប្រឌិតដើម្បីលើកកំរិតរស់ជាតិ ទីកន្លែងត្រូវមានជាសុកភាពស្អាតបាត តាំងដាក់ច្នៃបង្កើតសម្រស់ទាក់ទាញភ្នែកភ្ញៀវ ។ ដែលនេះជាសំណុំបង្ហាញហៅភ្ញៀវឲ្យមកកាន់ទី កន្លែងរបស់នាង ។ ពួកភ្ញៀវមិនថា ខ្មែរ ឬជាតិសាសន៍ផ្សេងៗដែលបានទៅកាន់ភោជនីយដ្ឋាន សុភី ក្នុងការជ្រើសរើសម្ហូបអាហារដើម្បី បរិភោគ បាននិយាយថា នៅទីនោះម្ហូបខ្មែរដែលទាក់ទាញភ្ញៀវបរទេស មានជាតិអាមេរិក Mexican ឬជាតិ Asian ដ៏ទៃទៀត គឺមាន ម្ហូបដូចជា សម្លម្ជូរគ្រឿង, ស្ងោរជ្រក់ត្រី, ឆាខ្ញីខ្មែរ, ត្រីអណ្តែងអាំង ជាមួយទឹកជ្រលក់អំពិល ស្វាយខ្ចី ។

ដោយភាពជោគជ័យ នៃជំនួញជួញដូរ កញ្ញា សុភី នាងបានក្លាយខ្លួនទៅជាថៅកែថ្មីមួយទៀត ដែលហាងថ្មីនោះគឺជាភោជនីយដ្ឋាន និងរង្គសាល វិឡាមាស (Golden Villa) សំរាប់បំរើអតិថិជនទៅទទួលទានអាហារ (ថ្មីណាក៏បាន)ភោជនីយដ្ឋាន និងរង្គសាលនេះនឹង ត្រូវបានដំណើរការចាប់ពីខែវិច្ឆិកានេះតទៅ ។

ក្នុងក្តីមោទនភាព សុភី បានបង្ហើបទៀតថា ផលរបរនេះដើរលូនទៅបាន ក៏ដោយសារការគាំទ្រពីបងប្អូនជាភ្ញៀវខ្មែរ ដែលចាប់យកកន្លែងនេះអង្គុយលេងកំសាន្ត និងទទួលទានជជែកគ្នាក្រោមសំលេងបំពេអារម្មណ៍ ពីចម្រៀងខ្មែរ ឬបរទេស ។ ហើយការលើកកំពស់តាមការផ្សព្វផ្សាយពីមន្ត្រីសាលាក្រុង Long Beach ក្រុមអ្នកកាសែតបរទេស ដែលបរិយាយអត្ថបទ របស់ពួកគេនូវអ្វីជាវប្បធម៌ខ្មែរ ជាមួយម្ហូបខ្មែរក្នុងជីវភាពរស់នៅប្រចាំថ្ងៃ របស់ជាតិអាស៊ីមួយនេះ ។ ដែលការផ្សព្វផ្សាយនោះ បានរុញច្រាន និងទាក់ទឹកចិត្តភ្ញៀវបរទេសឲ្យមានការចាប់អារម្មណ៍ពីម្ហូបខ្មែរ និងជនជាតិខ្មែរ ដោយពួកគេបានទៅកាន់ភោជនីយដ្ឋាននាង។ សុភី អាយុប្រមាណ៤០ឆ្នាំ ស្ថិតនៅវ័យលើវ បានបញ្ចប់ថ្នាក់បរិញ្ញាប័ត្រផ្នែកសេដ្ឋកិច្ច ពីសាកលវិទ្យាល័យ Portland, Oregon នាឆ្នាំ ១៩៨៩ ។ នាងមានបងប្អូន៧នាក់ដែលស្ថិតក្នុងក្រគូលមានឪពុកជាអ្នកនយោបាយ តស៊ូប្រយុទ្ធប្រឆាំងជាមួយពួកបារាំង ដើម្បីរំដោះស្រុក ក្រោមអាណានិគមបារាំង តាមរយៈចលនារំដោះខ្មែរឥស្សរៈជាមួយក្រុម លោក កៅ តក់ និង ដាប ឈួន នៅតំបន់ភូមិភាគពាយ័ព្យ ឧត្តរ និងជួរភ្នំដងរែក ។ បច្ចុប្បន្នឪពុកនាង ដែលមានឈ្មោះ យុត យាង អាយុប្រមាណជិត៨០ឆ្នាំ បានបំរើឲ្យគោលនយោបាយគណបក្សរាជានិយម FUNCINPEC ជាប្រធានបក្សប្រចាំតំបន់ West Coast នៃប្រទេសអាមេរិក ។ ប៉ុន្តែនាងមិនដើរតាមគន្លងឪពុកជាអ្នកនយោបាយ ដោយចង់ ប្រាថ្នាជាអ្នកធំក្នុងរាជការ ឬបក្សនយោបាយណាមួយទេ ។ ដោយគ្រាន់តែចង់រស់ជាអ្នកជំនួញ រកស៊ីសាមញ្ញម្នាក់ ដើម្បីរកប្រាក់កាសសន្សំ ជួយឪពុកម្តាយ និងរួមចំណែកកសាងប្រទេសជាតិ ពិសេសប្រជាជនក្រីក្រនៅភូមិស្រុក របស់នាងជាអ្នកស្រុកចុងកាល់ខេត្តឧត្តរមានជ័យ ។

ជីវិតពួកក្មេងកំព្រាបានទម្លុះបេះដូង និងទឹកចិត្តនាងឲ្យមានក្តីអាណិតអាសូរពីភាពលំបាកឯកោដែលរស់នៅគ្មានមេបំពេររហូត បានក្លាយឲ្យខ្លួននាងទៅជាម្តាយក្រមុំចិត្តធម៌ដល់ក្មេង៥នាក់ ដែលឪពុកម្តាយបានស្លាប់ចោល ព្រោះតែជម្ងឺអេដស៍ ។ សុភី បញ្ជាក់សំដីថា នាងនឹងបន្តជីវិតជាម្តាយក្រមុំចិត្តធម៌ ជួយដល់កុមារកំព្រាដទៃទៀតទៅតាមលទ្ធភាព ដែលនាងជួយទៅបាន តាមទឹកចិត្តជាអ្នកសន្សំបុណ្យកុសលតាមផ្លូវព្រះពុទ្ធសាសនានៃពុទ្ធិឱវាទ"ធ្វើបុណ្យបានបុណ្យ"នឹងចង់បន្សល់ទុកនូវដំណើរជីវិតតាមពាក្យស្លោកសុភាសិត "ទូកទៅកំពង់នៅ" នោះ ។ ដែលក្នុងទ្រឹស្តីសម្តេចទីបេទ៍ ដាឡាយឡាម៉ា ថែងថា "រស់នៅក្នុងភាពប្រសើរ និងកិត្តិយសក្នុងជីវិត ដល់ពេលយើងចាស់ទៅគិតត្រឡប់មកវិញយើងអាចសប្បាយចិត្ត ជាលើកទី២" ។/

(តមកពីទំព័រ 15 ង)

គ្រប់ៗគ្នាដែលជាខ្មែរ គ្រាន់តែឮដំណឹងថា បងប្អូនខ្មែរ Long Beach បានការអនុញ្ញាតឲ្យ






តំបន់របស់ខ្លួនក្លាយទៅជា "ក្រុងខ្មែរ" ក្នុង ប៉ុន្មានខែនេះ ។ ពីតំបន់ផ្សេងៗមិនថាបងប្អូន ដែលរស់នៅក្រៅប្រទេស ឬក្នុងស្រុកខ្មែរ តែងតែបង្ហើតសំណួរសួរខ្មែរប៉ុស្តិ៍យើងតាមលិខិត ឬ

(តទៅទំព័រ 19 ង)

# ហាងខ្មែរផលិតនំក្រួហ្សង់

-មានគុណភាពទុកបាន៣០ថ្ងៃ
-ដឹកជញ្ជូនដោយមិនគិតថ្លៃពីថ្ងៃចន្ទ-សុក្រ
-ហាងយើងខ្ញុំមានលក់ដុំតែប៉ុណ្ណោះ
-អ្នកទិញត្រូវឲ្យដឹងមុន១ថ្ងៃ

## C & B CROISSANTS

WHOLESALE ONLY

ORDER BY PHONE:
(562) 495-5713
(800) 974-3888
Cell: (562) 607-3258
Fax: (562) 495-7544

FREE DELIVERY

We guarantee our products up to 30 days. Order must be made 1 day in advance.

WHOLE SALE ONLY





| Item | Net Wt Each | Packaging | Price/Package |
|---|---|---|---|
| Butter Croissant | 4.50 oz | 50 | $17.00 |
| Triangle Croissant | 5.00 oz | 50 | $17.00 |
| Square Croissant | 5.00 oz | 50 | $17.00 |
| Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Blueberry Cream Cheese Croissant | 6.oo oz | 50 | $22.00 |
| Strawberry Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Raisin Cinnamon Croissant | 6.00 oz | 50 | $22.00 |
| Raisin Custard Croissant | 6.00 oz | 50 | $22.00 |
| Apple Croissant | 6.00 oz | 50 | $22.00 |
| Chocolate Croissant | 6.00 oz | 50 | $22.00 |
| Chocotate Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Pineapple Cream Cheese Croissant | 6.00 oz | 50 | $22.00 |

1339 W. Gaylord Street• Long Beach, CA 90813

## អ្នកស្រុកពួងនៅមណ្ឌលគិរីប្រឆាំងការអភិវឌ្ឍន៍លើដីផ្នូរដូនតា

ដីព្រៃកប់ខ្មោចដូនតា នៃអ្នកភូមិភូតាង នៅឃុំរមនា ស្រុកសែនមនោរម្យ ខេត្តមណ្ឌលគិរី បានប្រឆាំងតវ៉ាទៅនឹងផែនការអភិវឌ្ឍន៍មួយ ដែលសំរេចដោយរាជរដ្ឋាភិបាលឲ្យស្ថាបនាជាព្រលានយន្តហោះថ្មីមួយ ក្នុងទំហំដីជាង ១៥០ហិកតា ។

ទស្សនទានមួយនៅឡើយទេ ។ ក្រុមអ្នកភូមិដែលរារាំងការឈូសឆាយ កាលពីអាទិត្យមុននោះបានស្នើឲ្យអង្គការសិទ្ធិមនុស្ស Vigilance ជួយអន្តរាគមន៍ក្នុង ការតវ៉ាជាមួយអាជ្ញាធរ ដែលប្រើកម្លាំងមករានដីដូនតាខ្លួននេះ ។



អ្នកស្រុកពួងនៅមណ្ឌលគិរីប្រឆាំងការអភិវឌ្ឍន៍លើដីផ្នូរដូនតា

ពីល ជាអ្នកភូមិម្នាក់ដែលប្រឆាំងតវ៉ា និងការឈូសឆាយដីនេះ កាលពីអាទិត្យមុន អះអាងថា អ្នកភូមិមិនអនុញ្ញាតឲ្យធ្វើការឈូស ឆាយដីផ្នូររបស់អ្នកភូមិភូតាងនេះទេ ពីព្រោះវាជាដីដូនតាសណ្ឋិត និងជួយថែរក្សាអ្នកភូមិពួងឲ្យមានសេចក្តីសុខ ហើយថា ដីដូនតា នេះតែង តែជួយពួកគេពេលមានបញ្ហាកើតឡើង ។

មន្ត្រីអង្គការសិទ្ធិមនុស្ស អាដហុក ប្រចាំនៅខេត្តភាគឥសាននេះអះអាងថា អាចនឹងមានការប្រឈមដោយហិង្សា ប្រសិនមិនមានការដោះស្រាយឲ្យអ្នកភូមិ ទទួលយល់ព្រមដោយស្រួលទេ។ មន្ត្រីដដែលថា គេនឹងតាមអង្កេតមើលបន្តទៀត នូវភាពចម្រូងចម្រាស់រវាង អ្នកភូមិ និងអាជ្ញាធរនៅតំបន់នេះ ។

អភិបាលខេត្តលោក ឡាយ សុខា ប្រាប់កាសែតបរទេសថា ការពិតវាជាដីស្មៅមិនមែនជាដីព្រៃដូចអ្នកភូមិចោទនោះទេ ហើយថា រដ្ឋមានគំរោងសង់ព្រលានយន្តហោះថ្មីជំនួសព្រលានចាស់ដែលអ្នកស្រុក ចេះតែតាំងលំនៅច្រើនឡើងៗជិតនោះ ដែលនាំឲ្យពិបាកក្នុងការ ចុះចត ។

ចំណែកមន្ត្រីអាកាសចរណ៍ស៊ីវិល លោក ស៊ិន ចន្ទសេរីវុត្ថា ជាអនុប្រធានផែនការនយោបាយឲ្យដឹងថា គំរោងការសាង ព្រលានមាន តម្លៃពី ៦ ទៅ ៧ លានដុល្លារនេះស្ថិតនៅឆ្ងាយនៅឡើយ ហើយថា វាជា

លោកអភិបាលខេត្ត ឡាយ សុខា អះអាងដែរថា ប្រសិនណាជាអ្នកភូមិមានប័ណ្ណកម្មសិទ្ធ គេគួរតែបង្ហាញអំពីសិទ្ធិកាន់កាប់នោះដើម្បីមានការទទួលស្គាល់តាមផ្លូវច្បាប់ តែតាមលោកដឹងអាជ្ញាធរស្រុក ឃុំ ភូមិ បានប្រាប់ថា គ្មានអ្នកណាមានប័ណ្ណកម្មសិទ្ធិនៅលើដីត្រូវ អភិវឌ្ឍន៍នេះទេ ដូចនេះវាជាដីរបស់រដ្ឋ ។

មន្ត្រីអង្គការសិទ្ធិមនុស្ស Vigilance អះអាងថា ច្បាប់ភូមិបាលបានកំណត់ថា បើវាជាដីកប់ខ្មោចដូនតានោះ អាជ្ញាធរមិនអាចនឹងរំលោភទៅលើដី របស់សហគមន៍នេះបានឡើយ ។

តាមជំនឿរបស់បងប្អូន ជនជាតិពួងភាគតិចនៅភាគឥសានកម្ពុជា គឺថា ដីកប់ខ្មោចនេះជាដីពិសិដ្ឋ ដែលអាចកំណត់ពីវាសនារបស់ ពួកគេ ។ អ្នកភូមិបានសុខសប្បាយ ឬមានទុក្ខទោស តាមជំនឿអ្នកស្រុក គឺដោយសារតែការការពារដីផ្នូរនេះឯង ហេតុនេះប្រសិនមានការ ប៉ះពាល់ដល់ដីផ្នូរដូនតានេះ ពួកអ្នកភូមិអាចនឹងត្រូវអន្តរាយ ឬត្រូវរើទៅរកភូមិថ្មី ហើយនិងអាចត្រូវអារក្សខឹងដាក់បណ្តាសាឲ្យកើតជំងឺ ដង្កាត់ ឬក៏ស្លាប់មនុស្សសត្វ ហើយទាល់តែសែនព្រេនធំដុំទើបអាចបានសុខជាវិញ ។ តែបើមិនដូច្នោះទេ គឺពួកគេចាំបាច់ត្រូវតែទៅរក កន្លែងដើម្បីតាំងលំនៅថ្មីសំរាប់រស់នៅ។/ *ខ្មែរប៉ុស្តិ៍*

## មជ្ឈមណ្ឌលមាតុភូមិបើកបង្រៀនអក្សរខ្មែរហើយ

ដោយ ៖ សុវណ្ណារិទ្ធ

យ៉ាងហោចណាស់ក្មេងៗ កូនខ្មែរ-អាមេរិក ប្រមាណ២០នាក់ បានត្រូវឪពុកម្តាយបញ្ជូនទៅកាន់មជ្ឈមណ្ឌលអក្សរសាស្ត្រមាតុភូមិ ដើម្បីឲ្យកូនចៅខ្លួនចាប់យកការរៀនសូត្រ អក្សរខ្មែរ បំណងចង់ឲ្យពួកគេចេះនិយាយ អានភាសាខ្មែរ កាលពីសប្តាហ៍មុន ។

លោកនាយកមជ្ឈមណ្ឌល អក្សរសាស្ត្រមាតុភូមិ គុជ សុជាតិ បាននិយាយថា ទីកន្លែងរបស់លោក បានចាប់ផ្តើមបង្រៀនភាសាខ្មែរដល់កូនខ្មែរចាប់ពីថ្ងៃទី២២ តុលា មកម្ល៉េះ បំណងចង់ឃើញក្មេងៗជំនាន់ក្រោយ ពេលដែលឪពុកម្តាយតាយាយពួកគេចាកផុតទៅ ពួកគេ អាចបន្តរក្សាវប្បធម៌អក្សរសាស្ត្រខ្មែរតាមរយៈការចេះដឹងបែបនិយាយខ្មែរបាន អាន សរសេរ សំរាប់ជាតឹកតាង និងបង្ហាញដល់ សហគមន៍ អន្តរជាតិឲ្យយល់ដឹងពីអំបូរជាតិខ្មែរមួយនៅលើទឹកដីគេ ។

លោកនាយក គុជ សុជាតិ បន្តថា ឪពុកម្តាយគួរយល់នូវអ្វីដែលថា តម្លៃខ្មែរ បន្តវេនពីខ្លួនទៅឲ្យកូនចៅ គឺបញ្ហាភាសាខ្មែរនេះឯង ដូច្នេះគួរនាំកូនៗមករៀនសូត្រដោយមានគ្រូៗ ជំនាញបង្រៀនមិនគិតកម្រៃ ។

កុមារ កុមារី ដែលបានទៅចូលសាលារៀនក្នុងថ្ងៃដំបូងនោះ បាននិយាយថា ពួកគេចង់រៀននិយាយភាសាខ្មែរ អាន ឬសរសេរ ដោយមានការលើកទឹកចិត្តពីអាណាព្យាបាលរបស់គេ ។ ការចង់រៀននោះ ភាគច្រើនក្មេងៗនិយាយថា ឪពុកម្តាយពួកគេនៅផ្ទះនិយាយខ្មែរ រៀបចំផ្ទះសម្បែងជាលក្ខណៈខ្មែរ ធ្វើកិច្ចការជំនាញអាជីពក៏ក្នុងរង្វង់ខ្មែរ ម្ហូបអាហារប្រចាំថ្ងៃក៏លក្ខណៈខ្មែរ ដែលទាំងនេះជាការប្រទះភ្នែក ជារៀងរាល់ថ្ងៃ។

ដូច្នេះចំណង់ចំណូលចិត្តពួកគេ ត្រូវតែកើតមាន ។

ចាងហ្វាងផលិតកម្ម ព្រហ្មមាស លោក ជ័យ ប៊ុនវ័ត្ត និយាយថា មួយជីវិតរបស់គាត់ដេក ដើរ ឈរ អង្គុយ ប្រកបកិច្ចការងារ ជាខ្មែរ បេះដូងជាខ្មែរ ខិតខំធ្វើអ្វីៗក្នុងបំណងជួយថែរក្សាវប្បធម៌ជាតិមិនឲ្យបាត់បង់ គឺអក្សរសាស្ត្រ សិល្បៈជាដើម ។ ដូច្នេះដើម្បីបន្តការ ថែរក្សាអ្វីជាខ្មែរ រូបគាត់បានបញ្ជូនកូនបីនាក់ ឲ្យទៅរៀនភាសាខ្មែរ ដើម្បីអនាគតពួកគេអាចយល់ដឹងពីតម្លៃខ្មែរតាមការចេះអក្សរនេះ ឯង ។

# កំប្លែង

## "បង! ពេទ្យអូនពូកែណាស់"

ប្តីប្រពន្ធពីរនាក់ដេកផ្ទៃគ្នាពេលចូលដំណេក នារាត្រីមួយនោះ ។ នាងប្រពន្ធនិយាយប្រាប់ប្តីថា"បងដឹងទេ អូនទៅពេទ្យពីរអាទិត្យ ចុងក្រោយនេះ ដោយចេះតែឈឺក្បាលមិនឈប់ឈរសោះ គ្រូពេទ្យខាងជម្ងឺខួរនោះឲ្យអូនជំនះលើការឈឺ ដោយឲ្យគិត អញឥតឈឺក្បាលទេៗ ឥឡូវនេះ អូនបានជាស្រឡះមែន! "ប្រពន្ធក៏បន្តទៀតថា"បងឯងឥឡូវនេះហាក់ដូចមានមានជម្ងឺអ្វីម្យ៉ាងដែរណា! "ប្តីសួរថា"ជម្ងឺអ្វីទៅ?" ប្រពន្ធឆ្លើយតបថា "បងឥឡូវនៅលើគ្រែមិនពូកែដូចមុនសោះ បងគួរតែទៅពេទ្យហើយ ពេទ្យនោះពូកែណាស់ណា!"ដោយប្រពន្ធចេះតែ សង្កើញ ក៏ថ្ងៃមួយប្តីដាច់ចិត្តទៅរកពេទ្យដែលប្រពន្ធ ចង្អុលបង្ហាញនោះ។ មួយអាទិត្យក្រោយមកនៅលើគ្រែដំណេក ប្រពន្ធក៏សាកល្បង ប្រដាប់ប្រដាប្តី ឃើញដើរជាស្វ័យប្រវត្តិ ដល់ពេលត្រូវប្រតិបត្តិការ ប្តីក៏ប្រាប់ប្រពន្ធ "ចាំបន្តិចបងទៅបន្ទប់ទឹកមួយភ្លែត" ដល់ត្រឡប់មកវិញ ប្រតិបត្តិការសើកជាមួយប្រពន្ធខ្លួនយ៉ាងស្វាហាប់គួរឲ្យចម្លែក ធ្វើឲ្យប្រពន្ធសប្បាយចិត្តយ៉ាងខ្លាំងចំពោះលទ្ធផលដ៏ល្អនោះ ហើយក៏សួរទៀត ថា"បើអូនចង់ទៀត តើបងទៅរួចទៀតទេ?"ប្តីតបថា"អូខេ! តែចាំបន្តិច ទៅបន្ទប់ទឹកមួយភ្លែតសិន!"ថាហើយ ក៏រត់ទៅបន្ទប់ទឹកបាត់មួយ សន្ទុះត្រឡប់មកវិញ ក៏ផ្តើមបោសអង្អែលប្រពន្ធខ្លួនប្រតិបត្តិការសើកម្តងទៀតយ៉ាងស្រៀវស្រើបឥតឧបមា ។ ចង់ដឹងកម្លាំងប្តីខ្លួនថា តើប្តីអញទៅណា ក៏សួរទៀតថា "បើអូនចង់ទៀត តើបងទៅរួចទេ? "ប្តីឆ្លើយយ៉ាងស្វាហាប់ដដែលថា "អូខេ" តែចាំបន្តិចបងទៅបន្ទប់ទឹកមួយ ភ្លែកសិន!?" ថាហើយ ក៏លោតពីលើគ្រែទៅបន្ទប់ទឹកយ៉ាងរួសរាន់ ។ ប្រពន្ធឆ្ងល់ណាស់មិនដែលឃើញរបៀបនេះទេតាំងតែពីការគ្នារួចមក នោះ ធម្មតាប្តីនាងដេកងាប់ទើសភ្លឺបាត់ទៅហើយ ដល់ប្តីមកពីបន្ទប់ទឹកវិញ ក៏បោសអង្អែលសាជាថ្មីលើរូបរាងកាយប្រពន្ធ រួចហើយក៏ "ប្រព្រឹត្តបទល្មើស"យ៉ាងស្វាហាប់ជាថ្មីទៀត តែពេលនោះប្រពន្ធនាងស្រគាខ្លួនខ្លាំងណាស់ទៅហើយ តែដោយខ្លួនជាអ្នកបបួល ក៏បន្ត បេសកកម្មរហូតដល់ចប់យ៉ាងលំបាក តែប្តីវិញនៅកំលាំងដូចក្របីនៅឡើយ ហើយក៏សួរទៅប្រពន្ធថា "អូនចង់ឲ្យបងនាំទៅឋានសួគ៌ទៀត ទេ រាត្រីនេះជារាត្រីដំបូងរបស់យើងហើយ! "ប្រពន្ធទៅដល់ចំណុចមួយដែលទៅមុខលែងចង់រួច តែចង់ដឹងណាស់ថា តើប្តីមានថ្នាំអ្វីក៏ខ្លាំងអ្វីម្លេះ ដល់ប្តីចូលបន្ទប់ទឹកភ្លែត នាងប្រពន្ធក៏ទៅតាមលបមើលប្តីភ្លាមដែរ នាងលួចបង្អើបទ្វារតិចៗ ហើយឃើញប្តីរបស់ខ្លួនលើកដៃខ្ទប់ ត្រចៀកទាំងពីរ ប្រឹងធ្មេចភ្នែក ហើយឧទានថា "នាងនៅលើគ្រែនោះមិនមែនប្រពន្ធអញទេៗ"ប្រពន្ធភ្ញាក់ក្រញ៉ាំងថា "ចុម! គាត់នេះពុំមែនដេកជាមួយឯងឯណា ?" ។/

ក្របីព្រៃ

(តមកពីទំព័រ 12)

ប្រហែលជា២០០ម៉ែត្រ មុននិងបាក់បែកគូទៅមុខ



ក្រុមសង្គ្រោះ យន្តហោះធ្លាក់

ឡើងនៅម៉ោង ៩៖៣០នាទី ពីអាកាសយានដ្ឋានអន្តរជាតិភ្នំពេញ បានចម្ងាយប្រមាណ ១៤០ គីឡូម៉ែត្រ ក្រុមអាកាសយាននិក ក៏បានទាក់ទងសុំចុះចតនៅព្រលានដដែលវិញ ។ ប៉ុន្តែបន្ទាប់មក ក៏ដាច់ការ ទាក់ទង ហើយត្រូវបង្ខំចិត្តចុះចតនៅកណ្តាលស្រែអ្នកស្រុក ខណៈដែលនៅតែ៦នាទីដល់គោលដៅ ។

មន្ត្រីអាកាសចរណ៍ស៊ីវិលអះអាងថា គេបានរកឃើញប្រអប់ខ្មៅ និងកំពុងតែស៊ើបរកមូលហេតុនៃការធ្លាក់នោះនៅឡើយ តែថា ក្រុមអាកាសយាននិកអះអាងថា យន្តហោះនេះមុនពេលធ្លាក់បានរងរន្ទះបាញ់បណ្តាលឲ្យខូចម៉ាស៊ីនពីរមិនដំណើរការ។ ហើយដោយស្ថិតក្នុង សភាពអាសន្ន ពួកគេក៏ព្យាយាមស្វែងរកការចុះចតតែមិនបានសំរេច រួចក៏បង្ខំចុះចតនៅកណ្តាលវាលស្រែ ដែលមានទឹកយ៉ាងច្រើន ដោយ បានអូសកាត់ស្រែមានទឹកចំងាយ លែងរួច។

លោក ញឹមវណ្ណដា អនុប្រធានគណៈកម្មាធិការជាតិគ្រប់គ្រងគ្រោះមហន្តរាយមានប្រសាសន៍ថា លើកនេះដោយមានកិច្ចសហការ ពីកម្លាំងអង្គរក្សនាយករដ្ឋមន្ត្រី និង កម្លាំងខេត្តកណ្តាល គួបផ្សំនឹងការមានពិសោធន៍កន្លងមកផង ក្រុមសង្គ្រោះធ្វើកិច្ចការបានល្អ និងមិន បណ្តាលឲ្យគ្រោះថ្នាក់ធ្ងន់ធ្ងរ និងបាត់បង់របស់របរក្នុងយន្តហោះទេ ។ លោក ញឹម វណ្ណដា មិនបានប៉ាន់ប្រមាណថា ការខូចខាតមានតម្លៃ សរុបប៉ុន្មានទេ ខណៈដែលក្រុមសង្គ្រោះបានរកឃើញយន្តហោះនោះនៅម៉ោង ១១:៥០នាទីយប់ ។ ព្រឹកថ្ងៃ ១៨ តុលា គេឃើញយន្តហោះ នៅត្រាំទឹកបាក់ជាពីរ ដាច់កន្ទុយចេញពីតួ ហើយបាចសាយបំណែកក្នុងរង្វង់៣០០ម៉ែត្រជុំវិញ រហូតធ្វើឲ្យអ្នកស្រុកផ្អើលនាំគ្នាមកមើលលក់ ឲ្យអេដចាយ

(តទៅទំព័រ 17)

# បច្ចុប្បន្នភាពនៃរឿងមិនគួរកើតឡើងនៅកម្ពុជា

## • មេធាវីខ្មែរមានសញ្ជាតិអាមេរិកល្បីឈ្មោះជាប់ឃុំ ព្រោះតែការបាញ់បោះសេរី

លោក ដេវីត ឆាយណាយវ៉ា អាយុ៣៩ឆ្នាំ ជាមេធាវីធ្លាប់មានរឿងអាស្រូវ និងទើបត្រូវ បាន តែងតាំងជាទីប្រឹក្សាលោក ជា ស៊ីម ប្រធានព្រឹទ្ធសភា និងជាប្រធានគណបក្សប្រជាជនកម្ពុជា ត្រូវ ប៉ូលិសចាប់ឃុំកាលពីថ្ងៃទី១៦ តុលា ២០០៧ ក្រោយដែលត្រូវ ប៉ូលិសខណ្ឌដូនពេញ ក្រុង ភ្នំពេញ ចោទប្រកាន់ថា បានបាញ់បោះសេរីទាំងកណ្ដាលអាធ្រាត្រ ធ្វើឲ្យមានការភ័យខ្លាចដល់ អ្នកក្រុង ជិតនោះ និងខូចសណ្ដាប់ធ្នាប់ទីក្រុង។

កាលពីយប់ថ្ងៃអាទិត្យ ១៤ តុលា លោក ឆាយណាយវ៉ា ពេលចេញពីវង្គសាល River House Lounge នៅតាមដងផ្លូវសុធារស ស្ថិតតាមមាត់ទន្លេសាបក្រុងភ្នំពេញ បានបំបែកកញ្ចក់ឡាន BMW បញ្ចេញអាវុធខ្លីម៉ាក Glock 9mm បាញ់ឡើងលើ៤គ្រាប់។ អភិបាលរងខណ្ឌដូនពេញ អ្នក ស្រី ពេជ្រ សុជាតា ឲ្យដឹងថា ដេវីត ឆាយណាយវ៉ា បានខឹងមិត្តភក្តិ ដែលមិនព្រមហៅលោកថា "ឯកឧត្តម" ហើយជម្លោះក៏កើតមានឡើង។ ស្នងការប៉ូលិសភ្នំពេញ លោក ទូច ណារ៉ុថ មិនធ្វើ អត្ថាធិប្បាយពីករណីនេះទេ។

លោក ដេវីត ឆាយណាយវ៉ា ទើបតែទទួលបានតួនាទីជាទីប្រឹក្សាលោក ជា ស៊ីម ដែលគេឃើញ តាមការផ្សាយក្នុងកាសែតនានា តែខាងខុទ្ទកាល័យប្រធានព្រឹទ្ធសភាមិនអាចសុំការបញ្ជាក់បាន ឡើយ។

កាលពីខែសីហា ឆ្នាំ២០០៥ លោក ឆាយណាយវ៉ា ធ្លាប់ត្រូវប៉ូលិសចាប់ឃុំជិតមួយខែ ពីបទបើក រថយន្តហាំម័រ បំផ្លាញសួនច្បារ ហ៊ុនសែន នៅមាត់ទន្លេក្រុងភ្នំពេញ។ តែលោកបានឲ្យរួចមកវិញ ដោយការសុំការលើកលែងទោស និងចេញសំណងខូចខាតចំនួន ៣.៧៥០ដុល្លារ។/

## • ប្រពន្ធចិត្តខ្លាំងចាក់សាំងដុតខ្លួនស្លាប់បញ្ឈឺប្ដី

ឈ្មោះ ខៀវ សារឿន អាយុ៣៩ឆ្នាំ ជាភរិយាចិត្តខ្លាំងបានស្លាប់នៅវេលាម៉ោង ៨:០០ ថ្ងៃទី១០ ខែតុលា ឆ្នាំ២០០៧ បន្ទាប់ពី រងគ្រោះក្នុងហេតុការណ៍ចាក់សាំងដុតខ្លួនឯងកាលពីថ្ងៃទី០៩ ខែ តុលា ឆ្នាំ២០០៧ នៅភូមិវាលធ្នង់ ឃុំបុសខ្នុរ ស្រុកចំការលើ ខេត្ត កំពង់ចាម ។

សាក្សីនិយាយថា ស្ត្រីជាប្រពន្ធបានខឹងប្ដីឈ្មោះ ពិន ភាន់ អាយុ២៩ឆ្នាំ ដែលកំពុងផឹកស្រា ជាមួយមិត្តភ័ក្តិនៅលើផ្ទះ ស្រាប់តែ ស្ទុះទៅទាញដបស្រាមកលើកអករហូតស្រវឹង ហើយបានស្ទុះ រំងទៅយកកូយមុងមករំខ្លួនរួចយកសាំងចាក់ដុតឆេះអណ្ដាតភ្លើងសន្ធោ សន្ធៅឡើង ។ ភ្លាមនោះ បុរសជាប្ដីបានស្ទុះទៅបីប្រពន្ធលោតចុះមកដី យកទៅប្រមៀលលើភក់នៅមុខផ្ទះឲ្យរលត់ រួច ហើយក្រុម សាច់ញាតិក៏បាននាំអ្នកទាំងពីរមកមន្ទីរពេទ្យ។ តែអកុសលនាងជាប្រពន្ធក៏ត្រូវស្លាប់ ជាមួយទារក៨ខែនៅក្នុងផ្ទៃ ចំណែកបុរសជាប្ដី រលាកពេញខ្លួនរបួសធ្ងន់ធ្ងរកំពុងសំរាកព្យាបាល នៅមន្ទីរពេទ្យខេត្តកំពង់ចាម មិនទាន់អាចនិយាយបានផងទេ ។

កូនជនរងគ្រោះ អាយុ៩ឆ្នាំ និយាយថា នៅថ្ងៃកើតហេតុ ឪពុកខ្លួនបានប្រើឲ្យទៅទិញស្រា១លី ត្រ មកផឹកជាមួយមិត្តភ័ក្តិម្នាក់ ហើយក៏បន្តទិញថែម២លីត្រទៀត ផឹកព្រោកប្រាជ្ញមិនចប់តាំងពី ព្រឹករហូតដល់រសៀល ករណីនេះបានធ្វើឲ្យម្ដាយខ្លួនខឹងយ៉ាងខ្លាំង រួច ក៏ប្រព្រឹត្តរឿងអកុសលនេះ តែម្ដងទៅ។ ពិន ភាង ជាបង្រសីបុរសជាប្ដីជនរងគ្រោះ បញ្ជាក់ថា ប្អូនប្រុសគាត់ធ្លាប់មាន ប្រពន្ធដើម មានកូនមួយឈ្មោះ ភិន សុភាស់ តែបានលែងលះគ្នាទុក។ បន្ទាប់មកក៏បាននាង ខៀវ សារឿន ជាស្ត្រីមេម៉ាយធ្លាប់មានប្ដី២រួច ទៅហើយ ហើយទើបតែរស់នៅជាមួយគ្នាប្រហែលមួយឆ្នាំ ប្រពន្ធក៏មានផ្ទៃពោះ តែពួកគេទាំង២នាក់មិនសូវចុះសំរុងគ្នាទេរហូតដល់ ថ្ងៃកើតហេតុ។/

## • សម្លាប់ឪពុក ហើយទាក់កអូសយកទៅចោល

ពីខេត្តកំពង់ឆ្នាំងមានរបាយការណ៍ពីប៉ូលិសថា បុរសជាកូនប្រុសបង្កើតបានកាប់សម្លាប់ឪពុក ខ្លួនឯង រួចហើយទាក់កអូសសព យកទៅចោលក្នុងស្រះយ៉ាងព្រៃផ្សៃ ព្រោះតែបញ្ហាជម្លោះក្នុង គ្រួសារ ។ ប៉ូលិសឲ្យដឹងថា កាលពីវេលាម៉ោង ៨:៣០នាទីយប់ ថ្ងៃទី៤ ខែតុលា ឆ្នាំ២០០៧ ឈ្មោះ ទន ឡុង អាយុ២២ឆ្នាំ ជាកូនបានធ្វើឃាតឪពុកបង្កើតឈ្មោះ ប៉ក់ ឡូញ អាយុ៤០ឆ្នាំ នៅ នឹងផ្ទះរបស់ជន រងគ្រោះ ស្ថិតនៅភូមិទឹកល្អក់ ឃុំសេប ស្រុកកំពង់ត្រឡាច ខេត្តកំពង់ឆ្នាំង ។

កូនជាសាក្សីឈ្មោះ ទន ឡា អាយុ១៤ឆ្នាំ បានប្រាប់ប៉ូលិសថា ឪពុកម្ដាយជម្លោះលែងលះគ្នា កាលពីខែឧសភា ឆ្នាំ២០០៧។ ម្ដាយបានយកប្អូនប្រុសម្នាក់ទៀតទៅរស់នៅឯខេត្តពោធិ៍សាត់ ។ ឯ ទន ឡុង ជាជនដៃដល់បានទៅរស់នៅរកស៊ីឯច្រកឡែប ព្រំដែន ខ្មែរ-ថៃ រីឯរូបនាង ( ទន ឡា )និងប្អូន២នាក់ទៀតរស់នៅជាមួយឪពុក ។ មុនកើតហេតុមួយអាទិត្យ បង ទន ឡុង បាន មកលេងផ្ទះ ហើយក៏ឈ្លោះប្រកែកគ្នាពីរឿងដីកេរនៅក្នុងយប់កើតហេតុ ។ នាងថា បងប្រុសរបស់ នាងបានវាយឪពុក និងច្រានគាត់ទម្លាក់ពីលើ ផ្ទះ ហើយបានវាយបន្ថែម និងកាប់រហូតដល់ស្លាប់ និងបានយកខ្សែគោទាក់កអូសសាកសពឪពុកយកទៅទម្លាក់ក្នុងស្រះទឹកខាង ក្រោយផ្ទះចម្ងាយ ប្រហែល៥០ម៉ែត្រ ។ ដោយសារផ្ទះនៅឆ្ងាយដាច់ពីគេ គ្មានអ្នកភូមិណាបានដឹង និងមកជួយ អន្តរាគមន៍ទេ ហើយ នាងក៏មិនហ៊ានស្រែកឲ្យគេជួយដែរ ព្រោះខ្លាចបងសម្លាប់ ។ តមកបងប្រុស ជាឃាតករមុនពេលរត់គេចខ្លួនបាត់បានប្រាប់នាង ទន ឡា ថា ខ្លួនបានសម្លាប់ឪពុកហើយ-ឲ្យនាំ ប្អូនទៅដេកផ្ទះអ៊ុំទៅ ហើយក្រោយមកក៏េផ្អើលឆោឡោឡើង។

ប៉ូលិសឲ្យដឹងថា នៅលើខ្លួនសាកសពមានឃើញស្នាមវាយ និងស្នាមកាប់ជាច្រើនកន្លែង បន្ទាប់ ពីធ្វើកោសល្យវិច័យរួច សពជន រងគ្រោះត្រូវបានប្រគល់ទៅឲ្យក្រុមគ្រួសារយកទៅធ្វើបុណ្យ។ ប៉ូលិសអះអាងថា គេបានកសាងសំនុំរឿងទៅតុលាការ និងកំពុងស្វែង រកចាប់ខ្លួនជនល្មើសតាម ដីកាតុលាកា ដើម្បីយកមកផ្ដន្ទាទោសតាមច្បាប់។/

## • ក្មេងអាយុ៥ឆ្នាំនៅសៀមរាបដុះរោមសព្វកន្លែងដូចមនុស្សចាស់

នៅឯខេត្តសៀមរាប កុមារម្នាក់អាយុទើបតែ៥ឆ្នាំទេ តែបានកើតរឿងចម្លែកដោយសារតែគេឃើញ មានដុះរោមសព្វកន្លែង ដូច គ្នា និងមនុស្សចាស់ដែរ។ កុមារនោះឈ្មោះ ហុក សេងហៃ មានឪពុក ឈ្មោះ ម៉ើ ហុក អាយុ ២៥ឆ្នាំ ជាប៉ូលិសពិសេស ម្ដាយ ឈ្មោះ ពៅ ពិសី អាយុ ២១ឆ្នាំ តែបានលែង លះគ្នាតាំងពីកូនអាយុ៨ខែ ។ ឪពុកប្រាប់ថា ហុក សេងហៃ កើតឆ្នាំ ២០០២ អាយុ ១ខួបក៏មានដុះ ពុកមាត់ ពុកចង្កា សព្វថ្ងៃមានដុះទាំងរោមប្រដាប់ភេទ និងរោមជើងផង ។ ឪពុកដំណាលថា កាល អាយុ៤ឆ្នាំ សុខហៃ យំរំអុកចង់ទៅរៀន គាត់ក៏ទៅសុំគ្រូ តែលោកគ្រូមិនព្រមឲ្យរៀន ព្រោះមិនគ្រប់ អាយុ គេខឹងពេកក៏ស្រាតខោឲ្យគ្រូ មើលគ្រូចាញ់តំរិះក៏យល់ព្រមឲ្យចូលរៀនពីពេលនោះមក ។

## • បងប្រុសបង្កើតអាយុ១៧ឆ្នាំ ចាប់រំលោភប្អូនស្រីអាយុ១៥ឆ្នាំដល់ទៅបីលើក

របាយការណ៍ព័ត៌មានក្នុងស្រុកឲ្យដឹងថា នៅឯភូមិទទា ឃុំរំចេក ស្រុកស្វាយជ្រុំ ខេត្តស្វាយរៀង យុវ ជនជាបងប្រុសអាយុ១៧ឆ្នាំ បានចាប់រំលោភប្អូនស្រីបង្កើតម្ដាយជាមួយគ្នា បានសំរេចរហូតដល់ទៅ ពីរលើក ក្នុងការចាប់បង្ខំបីលើក។ តែលើកចុងក្រោយ ដែលកើតឡើងក្នុងព្រឹកថ្ងៃ ១៦ តុលា ២០០៧ ដោយសារនាងរត់រកគេជួយទាន់ ក៏បែកការនិងបានរួចពីកណ្ដាប់ដៃបងអប្រិយ។ ក្មេង ជំទង់ម្នាក់នោះឈ្មោះ ម៉ី ចន្ថន ត្រូវប៉ូលិសចាប់បញ្ជូនទៅតុលាការហើយ។ ហេតុដែលនាំឲ្យមានរឿង អាស្រូវនេះឡើង អាច មកពីស្ថានភាពគ្រួសារក្រីក្រម្ដាយស្លាប់ចោលកូនបីនាក់ ឲ្យរស់នៅកណ្ដោចក ណ្ដែងជាមួយឪពុកអាយុ៤១ឆ្នាំដែលបាត់បង់ស្មារតី និងខូចសតិ ។

## • ចាប់រំលោភហើយកាប់ចិញ្ច្រាំមុខសម្លាប់ចោលទាំងអាក្រាត

អំពើឃោរឃៅនៅតែកើតមានក្នុងសង្គមកម្ពុជានៅឡើយ ហើយករណីសម្លាប់ទាំងរូបកាយអាក្រាត វាជារឿងដ៏រន្ធត់សំរាប់ អ្នកភូមិអូរ ឃុំពេជ្រចិន្ដា ស្រុកភ្នំព្រឹក ខេត្តបាត់ដំបង។ ហេតុការណ៍នេះបាន ភ្ញាក់ផ្អើលក្រោយដែលឪពុកក្មេកបានប្រទះឃើញ សាកសពស្ត្រីកូនប្រសារឈ្មោះ នូវ ជៀវ អាយុ ៣៨ឆ្នាំ ពេលចុះទៅបន្ទោរបង់ក្រោយផ្ទះក្នុងព្រហាមថ្ងៃទី២០តុលា ២០០៧ ។

តាមប៉ូលិលពិនិត្យកន្លែងកើតហេតុថា មានការប្រតាយគ្នារើបម្រះខ្ទេចស្មៅនិងដីម៉្លុំនោះ ហើយថា ជនរងគ្រោះអាចត្រូវប្រចាប់ កមុននិងចាប់រំលោភ រួចហើយទើបគេកាប់ចិញ្ច្រាំមុខដើម្បីបំបិទតាង ។ ក្រុមគ្រួសារអះអាងថា ជនរងគ្រោះបានបាត់ខ្លួនតាំងពីថ្ងៃ ១៩ តុលា ពេលដែលឡើងទៅទិញឥវ៉ាន់ យកមកផ្ញើរឲ្យកូនយកមកផ្ទះលក់ និងទទួលយកសត្វមាន់ទឹកពីកូនទៅលក់ឯផ្សារជាលើក ទី២ តែ ក៏បាត់ខ្លួនតាមរកមិនឃើញរហូតដល់ឪក្មេកឃើញសាកសព។/

# កូនខ្មែរ៦នាក់ឈ្នះរង្វាន់អាហារូបករណ៍ពី Western Union

ដោយ ៖ មាជ សុវណ្ណារិទ្ធិ



Echo Huang



Kuch Kim Thai

កាលពីសប្តាហ៍មុន កូនខ្មែរ៦នាក់ បានឈ្នះរង្វាន់អាហារូបករណ៍ពី Western Union ដើម្បីគាំទ្រការសិក្សានៅមហាវិទ្យាល័យ ។

ថវិកាWestern Union ចំនួន៥០០០ដុល្លារ បានផ្តល់ដល់យុវសិស្សទាំងនោះ ក្នុងការទិញសម្ភារៈសិក្សា បង់ថ្លៃសាលាជាដើម ។

កញ្ញា Lynna Moy ដែលឈ្នះរង្វាន់មានមោទនភាពនិងក្តីរំភើបចំពោះការសិក្សារបស់នាង។




បើទោះបីរង្វាន់តិចតួចក៏ដោយប៉ុន្តែវាជាកិត្តិយសដែលយើងបានជ័យជំនះទៅលើសិស្សដទៃទៀតដែលប្រលងប្រជែងជាមួយគ្នា ។ កញ្ញា Lynna Moy បន្តថា នាងខិតខំ រៀនសូត្រពូកែទៅបាន ក៏ដោយសារឪពុកម្តាយតែងតែស្ថិតនៅជាប់ក្នុងការអប់រំខ្ញុំនាំឲ្យសង្វាតរៀនសូត្រដើម្បីអនាគត និងជួយសង្គម កម្ពុជា។

កញ្ញា Channy សំដែងភាពរីករាយថា នាងនឹងបញ្ចប់ថ្នាក់បរិញ្ញាប័ត្ររបស់នាង នៅសាកលវិទ្យាល័យ Long Beach តាម រយៈអាហារូបករណ៍ Western Union ឬអង្គការ, មូលនិធិនានាទៀត។ ព្រោះកន្លងមកនាងបានផ្អាកការសិក្សានៅឆ្នាំទី៣

កញ្ញា Channy ប្តេជ្ញាថា ក្នុងនាមយើងជាកូនស្រីត្រូវតែប្រឹងឲ្យស្មើប្រុសៗ ឬឈ្នះ ដើម្បីទាញយកថ្នាក់បណ្ឌិត, មេធាវី, តុលាការ ចៅក្រម។ល។

ដែលភាគច្រើនបំផុត ជាគូនាទីឃើញសុទ្ធតែប្រុសៗ ចំណែកស្រីៗគ្មានអ្វីក្រៅពី Nursing, Accounting គរជាន់ជើងគ្នាទៅនឹងជំនាញ នេះ

អាហារូបករណ៍ (Scholarship)តាមរយៈសមាគមខ្មែរឡុងបអាមេរិក លោក គុជ គឹមថៃ នាយកប្រតិបត្តិ និយាយថា ក្នុងនាម សមាគមខ្មែរ លោកនឹងប្រឹងប្រែងដើម្បីទាក់ទង កម្មវិធីអាហារូបករណ៍ពីបណ្តាអង្គការ, ស្ថាប័នរដ្ឋ និងឯកជនដើម្បីឲ្យមានកម្មវិធីនេះ សំរាប់សហគមន៍ខ្មែរ ។ ប៉ុន្តែលោក គឹមថៃ បានអំពាវនាវសុំឲ្យយុវជនខ្មែរខំប្រឹងប្រែងរៀនសូត្របានពិន្ទុះល្អ និងមិនគេចវេសសាលា ។

Echo Huang អ្នកគ្រប់គ្រងទីផ្សាររបស់ក្រុមហ៊ុនផ្ញើរប្រាក់ Western Union និយាយថា Scholarship នេះ វាជួយជំរុញឲ្យ ក្រុមយុវជនបន្តការសិក្សាឲ្យមានចំណេះដឹងខ្ពស់ ដើម្បីការលើកស្ទួយវប្បធម៌ជាតិខ្លួន និងធ្វើឲ្យមានភាពប្រសើរឡើងនៃសហគមន៍ តាមរយៈ ចំណេះដឹងពួកគេផងដែរ ។

ក្រុមហ៊ុនសេវាកម្ម ផ្ញើរប្រាក់រហ័សទាន់ចិត្តរបស់ Western Union បានចូលទៅរកស៊ីនៅប្រទេសកម្ពុជាតាំងពីឆ្នាំ១៩៩៩ ដែល ចរាចរលើទីផ្សារកម្ពុជាចំនួន១០០កន្លែង តាមបណ្តាខេត្តក្រុង២៤ ។ ដោយការចរាចរនោះ Western Union បានសហការរកស៊ីផ្ទេរ ប្រាក់ជាមួយធនាគារ ACLEDA, Cambodia Asia Bank Limited, Singapore Banking Corporation. តម្លៃឈ្នួលចំនួន ១១.៩៩ដុល្លារ សំរាប់អ្នកផ្ញើរប្រាក់ពី៥០០ដុល្លារ,១៦,៩៩ដុល្លារសំរាប់ ការផ្ញើរពី៥០០ដុល្លារទៅ១០០០ដុល្លារ រីឯអ្នកផ្ញើរប្រាក់ពី ១០០០ ដុល្លារឡើងទៅ តម្លៃឈ្នួលត្រឹមតែ២% ប៉ុណ្ណោះ ។

Western Union ក្រុមហ៊ុនផ្ញើរប្រាក់១នាទីសំរាប់លុយលោកអ្នកពីស្រុកអាមេរិកទៅកាន់កម្ពុជា ដែលរហ័ស និងទុកចិត្តបំផុត ។

Western Union បំរើសេវាកម្មទូទាំងពិភពលោកអស់រយៈពេល១៥០ឆ្នាំមកហើយ ។ Western Union នៅក្បែរលោកអ្នក ជានិច្ច។/





# ជាទីប្រវត្តិសាស្ត្រ៖
# ពីរចនាសម្ព័ន្ធ"កុលសម្ព័ន្ធ"ទៅរដ្ឋបាលជាតិ"

***រៀបរៀងដោយ ៖ ពិន សំខុន***

នៅភាគពីរ ដែលនឹងនិយាយអំពីការវិវត្តន៍រដ្ឋបាលសាធារណខ្មែរ ពីឆ្នាំ១៨៨៧ ដល់ឆ្នាំ ១៩២២ គឺជាការសង្ខេបយ៉ាងខ្លីដើម្បី ងាយស្រួលដល់ការចងចាំនូវការបរិច្ឆេទជាគោល។

ព្រឹត្តិការណ៍ជាច្រើនបានកើតឡើង ដែលចាស់ៗយើងបានដឹងហើយនិយាយតៗ គ្នា។ ខ្លះក៏ខឹងសម្បា ខ្លះក៏រីករាយ ហើយប្រមូលគ្នាធ្វើសកម្មភាពទៅតាមអារម្មណ៍ជឿតិច ឬច្រើន នាពេលនោះតទៅ ។ ឯកសារ ដែលលោកអ្នកអាននៅពេលនេះ គឺដកស្រង់ពីសៀវភៅ "គន្លឹះកម្ពុជា" របស់ រ៉ាំអុល ដេណា ដែលខ្ញុំយល់ថាមានសារសំខាន់ខ្លាំងណាស់ ក្នុងការជឿទៅលើអ្វីមួយដែលផ្តើមមានលក្ខណៈច្បាស់លាស់ នាពេលនេះ...

***តទៅនេះ គឺជាភាគទីពីរ***

***ឆ្នាំ១៨៨៧*** (១៧តុលា) បារាំងបានដាក់ការគ្រប់គ្រងកម្ពុជាដែលនៅជាអាណាព្យាបាលឲ្យនៅក្រោមអគ្គអភិបាលនៃឥណ្ឌូ ចិន ។

***ឆ្នាំ១៨៨៩*** (១០មិនា)តំណាងថ្នាក់ដឹកនាំបារាំងនៅកម្ពុជាបានប្តូរឈ្មោះជា "រ៉េស៊ីដង់ សូប៉េរីយ៉េរ"សម្រាប់អាណាព្យាបាល កម្ពុជា ។

***ឆ្នាំ១៨៩៧*** (១០មករា) រ៉េស៊ីដង់ សូប៉េរីយ៉េរ បារាំងបានបង្ខំឲ្យក្រុមមហាមន្ត្រី ប្រជុំគ្នាសម្រេចថា ព្រះមហាក្សត្រទ្រង់ អាពាធឡពុំអាចគ្រប់គ្រងប្រទេសកម្ពុជាបានទេ ហើយឲ្យមានអ្នកធ្វើការជំនួស ក៏ប៉ុន្តែពេលនោះច្បាប់នៅតែបន្តថា "ព្រះរាជាពុំអាច នរណារំលោភបានឡើយ ព្រះរាជាជាសក្ការៈ"។

(១១កក្កដា)ព្រះរាជក្រឹត្យព្រះបាទនរោត្តមបានកែទម្រង់ក្រុមមហាមន្ត្រី ឲ្យទៅជារដ្ឋមន្ត្រីចំនួន៥ក្រសួង តាមគំរូនៃប្រទេស ជឿនលឿនបានលុបបំបាត់នូវទាសភាព ។

នាអំឡុងឆ្នាំនោះ អំណាចព្រះរាជានរោត្តមបានចុះអន់ថយជាខ្លាំង ដោយសារការ"លូកដៃរបស់ រ៉េស៊ីដង់ បារាំង ក្នុងកិច្ចការ រដ្ឋ ដែលបានដើរតួជាប្រមុខរដ្ឋាភិបាលខ្មែរ"។ ពេលនោះលេខាទី១ នៃក្រុមមហាមន្ត្រីឈ្មោះ ជួន បានត្រូវគេចងចាំថា បានជួយ បារាំងយ៉ាងខ្លាំងឲ្យបានសម្រេចកិច្ចការរបស់ រ៉េស៊ីដង់ ឈ្មោះលោក ឧយកូស ហើយចាប់ផ្តើមរដ្ឋកាលថ្មីនៃអំណាចមន្ត្រីជាន់ខ្ពស់រូបនោះ (កូនចៅជំនាន់ក្រោយនៃមន្ត្រីជាន់ខ្ពស់ឈ្មោះ ជួន នោះ បាននាំគ្នាចូលធ្វើខ្មែរក្រហមទាំងអស់នាឆ្នាំ១៩៧០ មាន ជួន ជឿន,ជួន មុំ, ជួន ប្រសិទ្ធ...។ល។)

(៥តុលា) ព្រះអង្គម្ចាស់ យុគន្ធរ បានយាងទៅក្រសាលនៅប្រទេសបារាំង បានផ្តល់សេចក្តីរាយការណ៍មួយដល់កាសែត ឡឺ ម៉ាតាំង (LEMATIN) សេចក្តីរាយការណ៍នោះ បានធ្វើឲ្យមតិសាធារណបារាំងភ្ញាក់ផ្អើលជាខ្លាំងដោយការបកស្រាយអំពីការគ្រប់គ្រង កាចសាហាវរបស់រដ្ឋបាលបារាំងនៅកម្ពុជា ។

***ឆ្នាំ១៩០៤*** (២៥មេសា) ព្រះមហាក្សត្រព្រះបាទនរោត្តមចូលទីវង្គត់ ។

រ៉េស៊ីដង់ សូប៉េរីយ៉េរ ដឺឡាម៉ុត (LE LAMOTHE) បានកោះប្រជុំរដ្ឋមន្ត្រីទាំង៥រូប សម្តេចសង្ឃទាំងពីរគណៈ និងមេគណ ព្រាហ្មសាសនា ដើម្បីជ្រើសរើសមហាក្សត្រថ្មី ។ ព្រះអង្គម្ចាស់ស៊ីសុវត្ថិ បានត្រូវជ្រើសរើសឲ្យឡើងគ្រងរាជ្យ នាថ្ងៃដដែលនោះ ។

***ឆ្នាំ១៩០៥*** (១៧សីហា) បង្កើតសារមន្ទីរសិល្បៈបុរាណខ្មែរ (MUSEE ARCHEOLOGIAVE)នៅភ្នំពេញ ការបង្កើតនេះធ្វើ បានក៏ដោយសារការសិក្សាស្រាវជ្រាវ និងជួសជុលច្រើនឆ្នាំរបស់"សាលាចុងបូព៌ា បារាំង" (ECOLE FRANCAISE ď EXTREME ORIENT) ។

***ឆ្នាំ១៩០៦*** (២៧មេសា) ពិធីអភិសេកការឡើងគ្រងរាជ្យរបស់ព្រះបាទស៊ីសុវត្ថិ

***ឆ្នាំ១៩០៧*** (២៣មិនា)សន្ធិសញ្ញាបារាំងជាមួយនឹងសៀម"សៀមប្រគល់ទឹកដីខេត្តបាត់ដំបង ស៊ីសុផុន និងសៀមរាបឲ្យមកខ្មែរ វិញ"។

***ឆ្នាំ១៩០៨*** កំណើត សឺង ង៉ុកថាញ់ នៅ TRAVINH ហើយទៅរៀនបឋមសិក្សានៅទីក្រុងព្រៃនគរ

(១កក្កដា) នៅខេត្តបាត់ដំបង វិសេសញ្ញ ដឹកនាំការបះបោរដំបូងបង្អស់ ប្រឆាំងនឹងការត្រួតត្រាបារាំងអស់ពេញមួយខែ ។

***ឆ្នាំ១៩០៩*** (១០កុម្ភៈ ដល់២៩មិនា)ការបះបោរម្តងទៀតរបស់ក្រុមវិសេសញ្ញ

(១៤មេសា)ក្រុមបះបោរ បានវាយប្រហារលើអគារ រ៉េស៊ីដង់ នៅកំពត ស្លាប់មនុស្ស ២៣ នាក់

***ឆ្នាំ១៩១២*** បង្កើត និងអនុម័ត ច្បាប់ព្រហ្មទណ្ឌខ្មែរ

***ឆ្នាំ១៩១៣*** (២៨មិនា) ឈ្មោះ អ៊ុច ដឹកនាំក្រុមបះបោរប្រឆាំងបារាំងនៅកំពង់ស្វាយ និងបារាយ ចេញមុខវាយច្រើនលើករហូត ដល់ឆ្នាំ ១៩១៦ ទើបចប់ ។

***ឆ្នាំ១៩១៤*** (២មករា) លិខិតរបស់អគ្គទេសាភិបាល កូសាំងស៊ីន បារាំងមក រ៉េស៊ីដង់ សូប៉េរីយ៉េរ បារាំងនៅកម្ពុជា ស្តីអំពី កំណត់ព្រំដែនទឹក រវាងកម្ពុជា និងកូសាំងស៊ីន ។

(១៣មករា)បង្កើតសាលា"ក្រមការ"សម្រាប់មន្ត្រីរាជការមធ្យម ហើយសាលានោះនឹងបានក្លាយទៅជា"សាលារដ្ឋបាល"នៅ ឆ្នាំ១៩១៧

(២០វិច្ឆិកា) បង្កើតសាលាបាលីជាន់ខ្ពស់នៅទីក្រុងភ្នំពេញ

***ឆ្នាំ១៩១៦*** (៦មករា) ផ្តើមមានបាតុកម្មដោយមនុស្សច្រើនពាន់នាក់ប្រឆាំងនឹងច្បាប់យកពន្ធដារ និងការប្រើមនុស្ស បាតុកម្មរហូតដល់ពាក់កណ្តាលខែកុម្ភៈ បណ្តាលឲ្យមានការចាប់ខ្លួនរាប់រយនាក់ និងចោទប្រកាន់៥៦០ករណី

***ឆ្នាំ១៩២០*** (២៥កុម្ភៈ)អនុម័តច្បាប់"រដ្ឋប្បវេណី(ស៊ៀវេ ចិវិល)" និងច្បាប់ "រដ្ឋបាលស៊ីវិល" (CODE DE PROCEDURE CIVIL)

***ឆ្នាំ១៩២១*** (១៥កុម្ភៈ)បង្កើតបណ្ណាល័យកម្ពុជាមួយដែលនឹងប្តូរឈ្មោះទៅជាព្រះរាជបណ្ណាល័យ នៅថ្ងៃ១៥មករា ឆ្នាំ១៩២៥ ។

***ឆ្នាំ១៩២២*** (៣១តុលា) កំណើតព្រះអង្គម្ចាស់ នរោត្តម សីហនុ ។/

***សូមអញ្ជើញតាមដានភាគបន្តនៅលេខក្រោយ***

## គំនិតគួរចងចាំ

### ពុទ្ធោវាទ ១៤ ប្រការ

**Buddha's 14 Commandments**

១-សម្បត្តិដ៏មានតម្លៃជាងគេសម្រាប់ជីវិត គឺសុខភាពល្អ
One's Most Valuable Asset in Life is His Good Health

២-សត្រូវដែលធំជាងគេនៅក្នុងជីវិត គឺខ្លួនឯងផ្ទាល់ ឬ "អាត្មាអញ"
One's Worst Enemy in Life is Himself

៣-រង្វាន់ដែលប្រសើរបំផុតនៅក្នុងជីវិត គឺការអត់ឱន
One's Greatest Offering in Life is Forgiveness

៤-ការខូចខាតដ៏ច្រើនជាងគេបង្អស់ក្នុងជីវិត គឺការក្រអឺតក្រទម
One's Worst Failure in Life is Arrogance

៥-ភាពល្ងង់ខ្លៅក្នុងជីវិតដ៏ធំជាងគេបង្អស់គឺការគ្មានភាពទៀងត្រង់ និងភាពស្មោះសរ
One's Biggest Stupidity in Life is His Dishonesty and Sincerity

៦-បំណុលដ៏ធំជាងគេបង្អស់ក្នុងជីវិត គឺសេចក្តីស្រលាញ់ដែលមិនបានចែករំលែក
One's Worst Debt in Life is Unrequited Love

៧-ទុក្ខព្រួយដែលជ្រាលជ្រៅជាងគេក្នុងជីវិត គឺការប្រចណ្ឌច្រណែន
One's Deepest Sorrow in Life is His Jealousy

៨-ការភាន់ច្រឡំដ៏ធំបង្អស់ក្នុងជីវិត គឺការភ្លេចខ្លួនឯង
One's Worst Mistake in Life is Losing Himself

៩-អំពើបាបដ៏ធំជាងគេបង្អស់ក្នុងជីវិត គឺការមិនយកចិត្តទុក-
ដាក់ក្នុងករណីកិច្ចចំពោះឪពុកម្តាយ
In life is concerned for the responsabilities toward his parent.

១០-សតិអារម្មណ៍ដ៏កំសត់ជាងគេក្នុងជីវិត គឺការខ្មាសខ្លួនឯងអន់ជាងគេឯទៀត
One's Most Pitiful State of Mind in Life is His Inferiority Complex

១១-ជាគជ័យដ៏គួរឱ្យសរសើរបំផុតក្នុងជីវិត គឺងើបឡើងវិញ បន្ទាប់ពីដួលរលំ
One's Most Admirable Achievement in Life is rising after a fall

១២-ការក្ស័យធុនដ៏អាក្រក់ជាងគេក្នុងជីវិត គឺការអស់សង្ឃឹម
One's Worst Bankruptcy in Life is His Despair

១៣-ការខ្វះខាតជាងអ្វីទាំងអស់នៅក្នុងជីវិត គឺការគ្មានចំណេះយល់ដឹង
One's Worst Deprivation in Life is His Lack of Knowledge Understanding

១៤-ភាពសុខស្រួលប្រសើរបំផុតមួយក្នុងជីវិត គឺជួយដល់មនុស្សដែលគ្មានសំណាង
One's Greatest Comfort in Life is Helping Unlucky People.

# ហោរាសាស្ត្រប្រចាំខែវិច្ឆិកាថ្ងៃទី ០១~១៥

**ឆ្នាំ ជូត: (ពន្យទេវតាប្រុស ធាតុទឹក)**


រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីផ្ទួញដូរមានការរីកចម្រើនល្អគួរលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេល នេះ បើលោកអ្នកមានគម្រោងការអ្វីត្រូវធ្វើនោះ ចូរអនុវត្តភ្លាមៗ ចុះមិនខុសបំណងឡើយ ព្រោះ បើនៅតែអែអង់យូរ គឺពិតជាលាភសក្ការៈ អាចធ្លាក់ដល់ដៃអ្នកដទៃជាក់ជាមិនខាន ។ ចំពោះ ស្ត្រីភេទមិនត្រូវសប្បាយដោយលង់ខ្លួនឡើយ ប្រយ័ត្នសប្បាយក្លាយជាទុក្ខ ។

**ឆ្នាំ ឆ្លូវ: (ពន្យមនុស្សប្រុស ធាតុដី)**


រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីផ្ទួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែ ប្រួលពុំទៀងទាត់ឡើយ ។ ដូច្នេះបើលោកអ្នកមានទិញលក់ដីធ្លីផ្ទះ ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាម ដោយមានចុះហត្ថលេខា ឬផ្តិត ស្នាមមេដៃ ឲ្យបានត្រឹមត្រូវ ទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ។

**ឆ្នាំ ខាល: (ពន្យយក្សស្ត្រី ធាតុឈើ)**


រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីផ្ទួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ លោកអ្នកអាចរកផល ចំណូលបានច្រើន ក្រាស់ក្រែលគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទុកធំក្តោង ធំនោះដែរ គឺបានត្រឹមតែចំណាយកម្លាំង និងពេលវេលាឥតអំពើតែប៉ុណ្ណោះ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចធម្មតា ។

**ឆ្នាំថោះ (ពន្យមនុស្សស្រី ធាតុឈើ)**


រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីផ្ទួញដូរជួបបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបាន ប្រកបកិច្ចការងារអ្វីក៏ដោយ ចូរមានការប្រុងប្រយ័ត្នជាប់ជានិច្ច ជាពិសេសចំពោះអ្នកជំនួញផ្ទួញដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វ សារពើត្រូវចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវ ទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍មានរឿងរកាំរកូសកើតឡើងច្រើន។

**ឆ្នាំ រោង (ពន្យទេវតាប្រុស ធាតុមាស)**


រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីផ្ទួញដូរជួបនឹងបញ្ហាលំបាកច្រើន ។ ក្នុងរយៈពេលនេះ បើមានជនចម្លែកយក របស់របរមានតម្លៃមកបញ្ចាំ ឬលក់ឲ្យធូរថ្លៃយ៉ាងណាក្តី ក៏មិនត្រូវទទួល ឬទិញយកដែរ ប្រយ័ត្ននឹងបានជាន់ដានចោរ អាចោររួចខ្លួន ម្ចាស់ ផ្ទះជាប់គុក ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមាន ភាពស្និទ្ធស្នាលដូចប្រក្រតី ។

**ឆ្នាំ ម្សាញ់ (ពន្យមនុស្សប្រុស ធាតុភ្លើង)**


រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីផ្ទួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ ភ្លឺថ្លា គំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីៗក៏ដោយ ក៏អាចទទួលបានផលសម្រេចសម តាមបំណងប្រាថ្នាទាំងអស់ តែចូរ កុំមានចិត្តលោភលន់ឲ្យសោះ ព្រោះការលោភលន់នាំមក នូវក្តីវិនាសអន្តរាយ ។ ចំពោះគូស្នេហ៍មានភាពល្អកល្អិនយល់ចិត្តគ្នាល្អណាស់ ។

**ឆ្នាំ មមី (ពន្យទេវតាស្រី ធាតុភ្លើង)**


រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីផ្ទួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបាន ប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅផ្ទួញ ដូរផ្លូវឆ្ងាយ គឺសមប្រកបតែទាំងអស់ ។ ចំពោះគូស្នេហ៍ មានការយល់ចិត្តគ្នាល្អណាស់ ។

**ឆ្នាំ មមែ (ពន្យទេវតាស្រី ធាតុមាស)**


រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីផ្ទួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នក បានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីប្តូរប្រាក់ ឬលក់គ្រឿងអលង្ការសព្វសារពើ ចូរប្រយ័ត្នប្រយែងក្រែងមានជនខិលខូចលួចបន្លំ ឬក៏ ឆក់ប្លន់ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានរឿងរកាំរកូសច្រើន ។

**ឆ្នាំ វក (ពន្យយក្សប្រុស ធាតុដែក)**


រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីផ្ទួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះ ប្រកែកកើតឡើង ចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឲ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់នឹងកំហល់ឡើយ ពុំនោះសោតអាចកើត ជារឿងធំរហូតដល់មានការប្តឹងផ្តល់គ្នាដល់តុលាការ ឬក៏អាចបង្កឲ្យមានស្លាកស្នាមរបួសទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ច្រើន ពាក់មុខយក្សដាក់គ្នា ។

**ឆ្នាំ រកា (ពន្យយក្សប្រុស ធាតុដែក)**


រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីផ្ទួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបាន ប្រកបការងារអ្វីក៏ដោយ ចូរមានលក្ខណៈត្រៀមទុកសម្រាប់ទប់ទល់ទៅនឹងបញ្ហាខ្លះៗដែលអាចកើតមានឡើង ទើបមិនរាំងស្ទះដល់កិច្ច ការងាររកស៊ី ។ ចំពោះស្ត្រីភេទមានជោគល្អកម្រកបាន ព្រោះមានប្រុសៗចោមរោមស្រលាញ់ ។

**ឆ្នាំ ច (ពន្យយក្សស្រី ធាតុដី)**


រាសីរបស់លោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីផ្ទួញ ដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះលោកអ្នកមាន អារម្មណ៍ភ្លឺថ្លា គំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីៗ ក៏អាចដំណើរការបានស្រួលដែរ ជាពិសេស បើបានជួបពិគ្រោះពិភាក្សា ការងាររកស៊ីផ្សេងៗ គឺឆាប់និយាយត្រូវរ៉ូវ និងឆាប់ចុះ សម្រុងនឹងគ្នា ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អណាស់ ។

**ឆ្នាំកុរ (ពន្យមនុស្សស្រី ធាតុទឹក)**


រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីផ្ទួញដូរបានកាក់កបល្អគ្រាន់បើ។ ក្នុងរយៈពេលនេះទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយគឺអាចទទួលបានផលសម្រេចត្រឹមតែពាក់កណ្តាលប៉ុណ្ណោះដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំឡើយព្រោះកាលបើមានការភ្លាត់ភ្លៀងអាចបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចសព្វមួយដង ។/




# First AMERICAN TEAM REALTY, INC

## ជំនាញឯកទេសជាទីទុកចិត្តនិងស្មោះត្រង់ចំពោះលោក-អ្នក

- ពន្យល់ណែនាំពីកិច្ចការទូទៅដែលទាក់ទងនឹងការលក់, ទិញផ្ទះ, ហាងជំនួញនិងដីធ្លី ។
- បង្ហាញលោក-អ្នកឲ្យយល់នូវពិធីខ្ចីប្រាក់សាងសង់ឬផ្ទះសុំលុះផ្ទះជាដើម ។
- បើលោក-អ្នកមានចម្ងល់ពីវិញការលក់ផ្ទះនិងទិញផ្ទះ សូមអញ្ជើញទាក់ទងខ្ញុំបាទគ្រប់ពេលវេលាតាមអាស័យដ្ឋានខាងក្រោម៖





Mr. Monorom Neth
Licensed Realtor
2501 Cherry Ave., #100 • Signal Hill, CA 90755
Office (562) 427-7765 Ext.333
Cell (562) 483-7333 Fax (562) 427-0767






យុន ហេង គឺជាផ្សារខ្មែរដ៏ធំមួយតាមផ្លូវអាណាហែម មានលក់ទំនិញគ្រប់មុខ៖
- សាច់ បន្លែ ផ្លែឈើស្រស់ៗ
- អាហារស្ងួតនិងម្ហូបកំប៉ុងមកពីអាស៊ី
- និងមានលក់ម្ហូបឆ្អិនស្រាប់ៗផងដែរ
- ហើយនឹងមានលក់បាច់ផ្កាសម្រាប់ពិធីបុណ្យនានា ។

**ទោះនៅទីណា សូមកុំភ្លេចផ្សារ**

# យុន ហេង

915 E. Anaheim Street
Long Beach, CA 90813

**(562) 599-7240**



# PHNOM PENH EXPRESS



## ក្រុមហ៊ុនទទួលផ្ញើប្រាក់, និងលក់សំបុត្រយន្តហោះ

ក្នុងឱកាសបុណ្យអុំទូកប្រពៃណីជាតិខ្មែរខាងមុខនេះ ក្រុមហ៊ុន PHNOM PENH EXPRESS មានរៀបចំចាប់ឆ្នោតផ្សងសំណាងជូនដល់បងប្អូនខ្មែរដែលផ្ញើប្រាក់និងទិញសំបុត្រយន្តហោះនៅក្រុមហ៊ុនយើងខ្ញុំ !!!

★ ជូនឆ្នោតផ្សងសំណាង១សន្លឹក ចំពោះអ្នកផ្ញើប្រាក់ចំនួន $២០០ ។ បើលោកអ្នកផ្ញើកាន់តែច្រើននឹងទទួលបានសន្លឹកឆ្នោតរឹតតែច្រើន ។
★ ជូនឆ្នោតផ្សងសំណាង២សន្លឹក ចំពោះអ្នកទិញសំបុត្រយន្តហោះ១សន្លឹក ។

- ការចាប់ឆ្នោតនឹងប្រព្រឹត្តទៅថ្ងៃអាទិត្យ ទី២៥ ខែ១១ ឆ្នាំ២០០៧ វេលាម៉ោង១២ថ្ងៃត្រង់ ។
- ទទួលនូវអាហារថ្ងៃត្រង់ និងអ្នកដែលគ្មានសំណាងត្រូវឆ្នោតនឹងបានទទួលនូវ Phone Card មួយសន្លឹកតម្លៃ$5.00 ។




យុត្តិធម៌នឹងមានចំពោះលោកអ្នក

**បំណងល្អពី PHNOM PENH EXPRESS**

**រង្វាន់មានដូចខាងក្រោមនេះ :**

- រង្វាន់ទី១ : សំបុត្រយន្តហោះទៅ-មកស្រុកខ្មែរចំនួន១សន្លឹក ។ លោកអ្នកអាចជ្រើសរើសក្រុមហ៊ុន យន្តហោះដែលចូលចិត្តបាន ។
- រង្វាន់ទី២: ទូរស័ព្ទដៃទំនើបបំផុតម៉ាក NOKIA -N95 ចំនួន១គ្រឿង ។
- រង្វាន់ទី៣: MOTOROLA - V3 ចំនួន១គ្រឿង ។
- រង្វាន់ទី៤: កាតទូរស័ព្ទ $៥ ចំនួន៥០សន្លឹក ។

2140 E. Anaheim St., Long Beach, CA 90804
Tel: (562) 434-3322 / (562) 434-3760




# ភោជនីយដ្ឋានសូភី

## Sophy's THAI & CAMBODIAN CUISINE

ភោជនីយដ្ឋានជាទីពេញចិត្តរបស់លោក-អ្នក ជាមួយម្ហូបខ្មែរ-ថៃចំរុះគ្រប់មុខដែលមានរសជាតិឈ្ងុយឆ្ងាញ់ពិសារ ។



សូមស្វាគមន៍!



Mon-Sun 9:00 am - 10:00 pm
3720 E. Anaheim St., Ste 102 • Long Beach, CA 90804
Tel: (562) 494-1763 Delivery is FREE with purchase of $15.00 or More